## គណៈកម្មការបកប្រែ

គណកម្មការបកប្រែប្រចាំនៅការិយាល័យនៃសមាគមសប្បុរសធម៌ដើម្បីអភិវឌ្ឍន៍កម្ពុជា បានធ្វើការបកប្រែសៀវភៅ **ការស្គាល់អល់ឡោះ** ពីភាសាអារ៉ាប់ មកជាភាសាខ្មែរ ហើយត្រួតពិនិត្យខ្លឹមសារភាសាអារ៉ាប់ និងភាសាខ្មែររួចរាល់ ជាស្ថាពរ។

<u>សមាសភាពលំអិត</u>

*ផ្នែកបកប្រែ*

អ៊ិលយើស អ៊ីស្មាឯល

*ផ្នែកត្រួតពិនិត្យភាសា (អារ៉ាប់-ខ្មែរ)និងការប្រើប្រាស់វាក្យស័ព្ទ*

១. សាហ្វអះ ទុលឡោះ

២. សុះ សៅអ៊ី

*ផ្នែកអ្នករចនា និងរៀបចំជាសៀវភៅ*

ម៉ាត់ អះម៉ាត់

សហការត្រួតពិនិត្យដោយ

ដេប៉ាតឺម៉ង់ភាសាវិទ្យាខ្មែរនៃសាកលវិទ្យាល័យភូមិន្ទភ្នំពេញ

ដែលមានសមាសភាពដូចខាងក្រោម៖

១. លោកសាស្ត្រាចារ្យ ឆាន់ គឹមសឿន (អនុបណ្ឌិតភាសាវិទ្យាខ្មែរ)

២. លោក សំ អេងលាង (អនុបណ្ឌិតភាសាវិទ្យាខ្មែរ)

៣. លោក វ៉ាន់ វី (អនុបណ្ឌិតភាសាវិទ្យាខ្មែរ)

-----------------------------------
-------------------------
----------

# មាតិកា

# ការស្គាល់អល់ឡោះ

## អល់ឡោះជានរណា ?

ប្រភពនៃពាក្យ "អល់ឡោះ"

១- អល់ឡោះ ជានាមសព្វឧត្តុង្គឧត្តម ខ្ពង់ខ្ពស់ មានប្រភពចេញពីភាសាអារ៉ាប់។ ជនជាតិអារ៉ាប់បានប្រើពាក្យនេះមុនសម័យឥស្លាម។ អល់ឡោះជាម្ចាស់ គឺជាព្រះដ៏មហាខ្ពង់ខ្ពស់ទ្រង់គ្មានដៃគូជាដាច់ខាត។ នៅសម័យអវិជ្ជាជនជាតិអារ៉ាប់បានជឿចំពោះទ្រង់។ ប៉ុន្តែពួកគេមួយចំនួនក៏បានគោរពបូជារួមជាមួយនឹងទ្រង់នូវព្រះផ្សេងៗទៀតផង ហើយអ្នកខ្លះក៏បានគោរពរូបសំណាករួមជាមួយនឹងទ្រង់តែម្តង។

## អល់ឡោះជាម្ចាស់មានពិត និងលក្ខណសម្បត្តិរបស់ទ្រង់

ការឯកភាពគ្នាអាចមានក្នុងចំណោមមនុស្សទូទៅ( ទាំងអ្នកដែលមានជំនឿ និងអ្នកដែលគ្មានជំនឿ ) ដោយផ្អែកលើតក្កវិទ្យាដ៏ត្រឹមត្រូវដែលជាផ្លូវតែមួយគត់ ដើម្បីឈានទៅដល់ភាពមានវត្តមានពិតរបស់អល់ឡោះ និងលក្ខណសម្បត្តិរបស់ទ្រង់។ គ្រប់គ្នាទទួលស្គាល់ថា រាល់អំពើទាំងឡាយតែងមានអ្នកធ្វើនិងអ្វីគ្រប់យ៉ាងកើតឡើងដោយមានមូលហេតុ ហើយគ្មានករណីលើកលែងជាដាច់ខាតក្នុងរឿងនេះ។ គ្មានអ្វីកើតឡើងពីភាពទទេ ឬពីអនត្តភាព ហើយក៏គ្មានអ្វីមួយកើតឡើងដោយគ្មានមូលហេតុ ឬគ្មានអ្នកបង្កមូលហេតុនោះដែរ។ ឧទាហរណ៍ចំពោះរឿងបែបនេះមានច្រើនរាប់មិនអស់ ហើយក៏គ្មានរណាម្នាក់មិនដឹងអំពីឧទាហរណ៍ទាំងនេះដែរ។ ចក្រវាលទាំងមូល ទាំងសត្វមាន

ជីវិតក្ដី ទាំងវត្ថុក្ដី មានចលនា ឬគ្មានចលនាក្ដី តែងកើតមានឡើងពីចំណុចសូន្យ។ ភាពសមហេតុផល និងវិទ្យាសាស្ត្រពិតបញ្ជាក់ថា ពិតជាមានអ្នកបង្កើតចក្រវាល។ ទោះជាអ្នកបង្កើតនោះមានឈ្មោះថា អល់ឡោះ ឬអ្នកបង្កើត ឬអ្នកឆ្នៃប្រឌិត ឬអ្នកចាប់ផ្ដើមក៏ដោយ ក៏គ្មានឥទ្ធិពលអ្វីដល់ភាពពិតនោះឡើយ។ ចក្រវាលទាំងមូល និងអ្វីដែលមាននៅក្នុងចក្រវាល បង្ហាញជាភស្តុតាងគ្រប់គ្រាន់ចំពោះវត្តមានរបស់ព្រះជាម្ចាស់ដែលជាអ្នកបង្កើត។

ការណែនាំឱ្យស្គាល់ពីលក្ខណសម្បត្តិរបស់អ្នកបង្កើតនេះ នឹងប្រព្រឹត្តទៅតាមរយៈការសិក្សាស្វែងយល់អំពីអ្វីដែលទ្រង់បានសម្រេចជាសមិទ្ធផលនៃការងារទាំងឡាយពោលគឺសត្វលោក។ ឧទាហរណ៍ដូចជា សៀវភៅមួយច្បាប់ អាចបង្ហាញអំពីចំណេះដឹង បទពិសោធនិងវប្បធម៌របស់អ្នកនិពន្ធ រចនាបថ ការគិត និងសមត្ថភាពរបស់គាត់ក្នុងការសម្រេចជាស្នាដៃ និងការវិភាគទិន្នន័យ។ ដូចគ្នានេះដែររាល់ផលិតផលគឺសុទ្ធតែឆ្លុះបញ្ចាំងឱ្យឃើញពីរូបភាព និងគំនិតដ៏ទូលំទូលាយនៃលក្ខណសម្បត្តិរបស់អ្នកផលិត។ បើសិនជាមនុស្សប្រើតក្កភាពនៃវិទ្យាសាស្ត្រពិតនេះជាមួយនឹងចក្រវាល និងសភាវសត្វលោកដែលមាននៅក្នុងចក្រវាល គឺមនុស្សអាចមានលទ្ធភាពឈានទៅដល់ការស្គាល់ពីលក្ខណសម្បត្តិរបស់អ្នកបង្កើត (អ្នកផលិត)។ ទិដ្ឋភាពដ៏ស្រស់ត្រកាលនៃសមុទ្រ ធម្មជាតិ ភាពល្អិតនៃកោសិកា និងគតិបណ្ឌិតដ៏ពិស្តារ ដែលបង្កប់ក្នុងនោះចក្រវាលទាំងមូលដែលមានតុល្យភាពក្នុងប្រព័ន្ធចលនារបស់វា និងវិទ្យាសាស្ត្រទាំងឡាយដែល

នាំឱ្យមនុស្សយល់ដឹងពីចក្រវាល។ សុទ្ធតែជាភស្តុតាងបង្ហាញពីឧត្តមភាព ពុទ្ធិចំណេះដឹង និងគតិបណ្ឌិតរបស់អ្នកបង្កើត។

បើទោះបីជាមនុស្សឯកភាព ឬមិនឯកភាព ក្នុងការបង្កើតឱ្យមានគតិបណ្ឌិតនៃការកកើត ឬពួកគេរកមិនឃើញ ឬក៏ពួកគេឯកភាពលើគតិបណ្ឌិតនៃការមានភាពឈឺចាប់ ផលលំបាកក្នុងការរស់នៅ ឬក៏ពួកគេមិនឯកភាពក្តី។ ទាំងនេះពិតជាពុំអាចកែប្រែលទ្ធផលដែលតក្កវិទ្យាបែបវិទ្យាសាស្ត្របានរកឃើញ។ ហេតុផលពោលគឺបញ្ជាក់ពីវត្តមានរបស់អ្នកបង្កើតដ៏មហាឧត្តុង្គឧត្តម ទ្រង់ជ្រាបពីអ្វីគ្រប់យ៉ាងប្រកបដោយគតិបណ្ឌិត ដែលអ្នកមានជំនឿទាំងឡាយបានឯកភាពគ្នាហៅថា អល់ឡោះជាព្រះជាម្ចាស់ដ៏មហាឧត្តុង្គឧត្តមថ្លៃថ្លា។

## តើអានុភាពរបស់អល់ឡោះមានដែនកំណត់ដែរឬទេ ?

## តើអល់ឡោះអាចធ្វើអ្វីបានគ្រប់យ៉ាងមែនទេ ?

ឧទាហរណ៍តើទ្រង់អាចបង្កើតផ្ទាំងថ្មដ៏ធំដោយគ្មានអ្វីអាចធ្វើឱ្យវាកម្រើកបានដែរឬទេ ? បើទ្រង់អាចបង្កើតផ្ទាំងថ្មដ៏ធំដែលគ្មានអ្វីធ្វើឱ្យវាកម្រើកបាន តើមានន័យថាអល់ឡោះទ្រង់ក៏មិនអាចធ្វើឱ្យវាកម្រើកដែរមែនទេ ? ឬក៏ទ្រង់ពិតជាមិនអាចបង្កើតវត្ថុដ៏ធំរហូតដល់ទ្រង់មិនអាចធ្វើឱ្យវា កម្រើកបាន ?

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលប្រាប់យើងថា ទ្រង់ធ្វើអ្វីដែលទ្រង់ប្រាថ្នា ហើយទ្រង់មានលទ្ធភាពគ្រប់យ៉ាង។ ចាំបាច់ត្រូវពិចារណាលើភាពជាក់ស្តែងនៃសាសនាឥស្លាម យើងនឹងបានជ្រាប

យ៉ាងច្បាស់ថា អល់ឡោះជាម្ចាស់ទ្រង់មិនសព្វព្រះទ័យ ធ្វើអ្វីឱ្យខុសពីលក្ខណសម្បត្តិនៃភាពជាព្រះជាម្ចាស់របស់ទ្រង់នោះឡើយ។ មានន័យថា ទ្រង់នឹងមិនសុគតជាដាច់ខាត។ ពីព្រោះវាផ្ទុយនឹងលក្ខណសម្បត្តិរស់របស់ទ្រង់ដែលគ្មានថ្ងៃសុគត (ជាលក្ខណៈដែលទ្រង់បានមានព្រះបន្ទូលប្រាប់ក្នុងគម្ពីរអាល់គួរអានដ៏ប្រពៃ)។

ដូច្នេះដែរ ទ្រង់អាចបង្កើតផ្ទាំងថ្ម ឬ(អ្វីផ្សេងទៀត)មានទំហំធំមហិមា និងមានទម្ងន់ធ្ងន់ ដែលគ្មានអ្វីមួយក្នុងលោកអាចធ្វើឱ្យវាកម្រើកបាន។ រីឯទ្រង់វិញ ទ្រង់អាចធ្វើឱ្យវាកម្រើកបាន ព្រោះទ្រង់មិនមែនឋិតនៅក្នុងចំណោមសត្វលោកទេ។ ទ្រង់ក៏មិនដូចសត្វលោកផងដែរ។ ដូច្នេះ អល់ឡោះជាម្ចាស់ទ្រង់មិនរណបក្រោមក្រឹត្យក្រមសត្វលោកទេ ពីព្រោះទ្រង់ជាអ្នកបង្កើតសត្វលោក និងជាអ្នកបង្កើតក្រឹត្យក្រមទាំងឡាយ។ រាល់ពេលដែលទ្រង់ប្រាថ្នាបង្កើតអ្វីមួយគឺងាយបំផុតដោយគ្រាន់តែទ្រង់មានព្រះបន្ទូលថា ចូរកើត! គឺកើតភ្លាម។

អល់ឡោះជាម្ចាស់ទ្រង់មានព្រះបន្ទូលប្រាប់អំពីព្រះអង្គឯងថា៖

﴿ بَدِيعُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ وَإِذَا قَضَىٰٓ أَمْرًا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ﴿١١٧﴾ ﴾

سورة البقرة / الآية: ١١٧

មានន័យថា៖ « ទ្រង់ជាអ្នកច្នៃ (បង្កើត)មេឃទាំងឡាយ និងផែនដី ហើយពេលដែលទ្រង់សម្រេចព្រះទ័យធ្វើកិច្ចការអ្វីមួយ។ គ្រាន់តែទ្រង់មានព្រះបន្ទូលថា ចូរកើត! វានឹងកើតឡើងភ្លាមៗតែម្តង »។

﴿ قَالَتْ رَبِّ أَنَّىٰ يَكُونُ لِي وَلَدٌ وَلَمْ يَمْسَسْنِي بَشَرٌ ۖ قَالَ كَذَٰلِكِ اللَّهُ يَخْلُقُ مَا يَشَاءُ ۚ إِذَا قَضَىٰ أَمْرًا فَإِنَّمَا يَقُولُ لَهُ كُن فَيَكُونُ ﴿٤٧﴾ ﴾ سورة آل عمران / الآية: ٤٧

មានន័យថា៖ « នាងម៉ារីបាននិយាយថា បពិត្រព្រះជាម្ចាស់ តើឱ្យខ្ញុំមានកូនយ៉ាងដូចម្ដេច បើគ្មានបុរសណាមកប៉ះពាល់ខ្ញុំផង? ទ្រង់បានឆ្លើយថា ដូច្នោះឯង អល់ឡោះទ្រង់បង្កើតអ្វីមួយតាមតែទ្រង់ប្រាថ្នា។ នៅពេលដែលទ្រង់សម្រេចកិច្ចការអ្វីមួយគឺទ្រង់គ្រាន់តែមានព្រះបន្ទូលទៅកាន់របស់នោះថា ចូរកើតចុះ វាក៏កើតឡើងភ្លាម »។

﴿ إِنَّ مَثَلَ عِيسَىٰ عِندَ اللَّهِ كَمَثَلِ آدَمَ ۖ خَلَقَهُ مِن تُرَابٍ ثُمَّ قَالَ لَهُ كُن فَيَكُونُ ﴿٥٩﴾ ﴾ سورة آل عمران/ الآية: ٥٩

មានន័យថា៖ « ពិតប្រាកដណាស់ ប្រៀបធៀបការបង្កើតអ៊ីសាចំពោះអល់ឡោះដូចជាការបង្កើតអាដាំដែរ គឺទ្រង់បានបង្កើតគេពីដីបន្ទាប់មក ទ្រង់បានមានព្រះបន្ទូលទៅកាន់គេថា ចូរកើតចុះ គេក៏កើតភ្លាម »។

﴿ وَهُوَ الَّذِي خَلَقَ السَّمَاوَاتِ وَالْأَرْضَ بِالْحَقِّ ۖ وَيَوْمَ يَقُولُ كُن فَيَكُونُ ۚ قَوْلُهُ الْحَقُّ ۚ وَلَهُ الْمُلْكُ يَوْمَ يُنفَخُ فِي الصُّورِ ۚ عَالِمُ الْغَيْبِ وَالشَّهَادَةِ ۚ وَهُوَ الْحَكِيمُ الْخَبِيرُ ﴿٧٣﴾ ﴾ سورة الأنعام / الآية: ٧٣

មានន័យថា៖ « ទ្រង់ជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីយ៉ាងពិតប្រាកដ ហើយនៅថ្ងៃបរលោកទ្រង់នឹងមានព្រះបន្ទូលថា ចូរកើតចុះ វានឹងកើតឡើងភ្លាម។ ព្រះបន្ទូលរបស់ទ្រង់គឺជា

ការពិត ហើយទ្រង់មានអំណាចនៅថ្ងៃផ្តុំត្រៃ ទ្រង់ជ្រាបពីប្រការអាថ៌កំបាំង និងប្រការលាតត្រដាង ហើយទ្រង់ជាព្រះមានគតិបណ្ឌិតខ្លាំងក្លា ទ្រង់មានបញ្ញាញាណមហាល្អិតល្អន់ »។

﴿ إِنَّمَا قَوْلُنَا لِشَيْءٍ إِذَآ أَرَدْنَٰهُ أَن نَّقُولَ لَهُۥ كُن فَيَكُونُ ﴿٤٠﴾ ﴾ سورة النحل / الآية: ٤٠

មានន័យថា៖ « ពិតប្រាកដ ព្រះបន្ទូលរបស់យើងចំពោះអ្វីមួយ នៅពេលដែលយើងប្រាថ្នា យើងគ្រាន់តែមានព្រះបន្ទូលថា ចូរកើតចុះ វាក៏កើតឡើងភ្លាម »។

﴿ مَا كَانَ لِلَّهِ أَن يَتَّخِذَ مِن وَلَدٍۖ سُبْحَٰنَهُۥٓۚ إِذَا قَضَىٰٓ أَمْرًا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ﴿٣٥﴾ ﴾ سورة مريم / الآية: ٣٥

មានន័យថា៖ « មហាស្អាតស្អំ អល់ឡោះជាម្ចាស់ ទ្រង់ពុំបានយកនរណាម្នាក់ធ្វើជាបុត្រនោះទេ។ នៅពេលដែលទ្រង់សម្រេចកិច្ចការអ្វីមួយ គឺទ្រង់គ្រាន់តែមានព្រះបន្ទូលទៅកាន់របស់នោះថាចូរកើតចុះ វាក៏កើតឡើងភ្លាម »។

﴿ إِنَّمَآ أَمْرُهُۥٓ إِذَآ أَرَادَ شَيْـًٔا أَن يَقُولَ لَهُۥ كُن فَيَكُونُ ﴿٨٢﴾ ﴾ سورة يس / الآية: ٨٢

មានន័យថា៖ « ពិតប្រាកដណាស់ ព្រះរាជបញ្ជារបស់ទ្រង់នៅពេលណាទ្រង់មានបំណងបង្កើតអ្វីមួយ ទ្រង់គ្រាន់តែមានព្រះបន្ទូលទៅកាន់វាថា ចូរកើតចុះ វាក៏កើតឡើងភ្លាម »។

﴿ هُوَ ٱلَّذِى يُحۡىِۦ وَيُمِيتُۖ فَإِذَا قَضَىٰٓ أَمۡرًا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ٦٨ ﴾

سورة غافر / الآية: ٦٨

មានន័យថា៖ « ទ្រង់ជាអ្នកធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់ ហើយនៅពេលទ្រង់សម្រេចកិច្ចការអ្វីមួយ គឺទ្រង់គ្រាន់តែមានព្រះបន្ទូលទៅកាន់វាថា ចូរកើតចុះ វានឹងកើតឡើងភ្លាម »។

ដូច្នេះ ដំណើរការនៃការបង្កើតសត្វលោក ដូចដែលយើងបានឃើញក្នុងព្រះបន្ទូលទាំងនេះ មិនមែនជាកិច្ចការពិបាកជាដាច់ខាតចំពោះអល់ឡោះជាម្ចាស់ គឺទ្រង់គ្រាន់តែចេញព្រះរាជបញ្ជានោះ អ្វីគ្រប់យ៉ាងនឹងកើតឡើងតាមសេចក្តីប្រាថ្នារបស់ទ្រង់។

**តើអល់ឡោះទ្រង់ជ្រាបពីប្រការអាថ៌កំបាំងដែរឬទេ ?**

តើអល់ឡោះទ្រង់ជ្រាបពីរាល់ហេតុការណ៍ដែលកើតឡើង និងរាល់អ្វីដែលនឹងកើតឡើងនាពេលអនាគតទេ ? បើដូច្នោះមែន តើបែបនេះមានយុត្តិធម៌ទេចំពោះយើង ? អ៊ីចឹង ចុះឯណាសេរីភាពនៃការជ្រើសរើស និងចេតនារបស់យើង ?

អល់ឡោះទ្រង់ជ្រាបរាល់អ្វីដែលនឹងកើតឡើង។ អ្វីដែលទ្រង់បានបង្កើតមុនគេបង្អស់គឺស្លាបប៉ាកកា (ប៊ិក) ហើយទ្រង់បានប្រើប៊ិកនោះឱ្យសរសេរ ប៊ិកនោះក៏សរសេររហូត សរសេររាល់អ្វីដែលនឹងកើតឡើង។ បន្ទាប់មក អល់ឡោះជាម្ចាស់ទ្រង់បានចាប់ផ្តើមបង្កើតចក្រវាល។ អ្វីទាំងអស់នេះទ្រង់ស្គាល់មុនទ្រង់បង្កើតវាមក។ ទ្រង់មានអំណាចដែលអាចក្តាប់បានទាំងស្រុង និងគ្រប់ពេលវេលា។ អ្វីមួយ

ដែលអាចកើតឡើង លុះត្រាតែឆ្លងការត្រួតពិនិត្យ និងការគ្រប់គ្រងរបស់ទ្រង់យ៉ាងល្អិតល្អន់ និងសុក្រឹតជាទីបំផុត។

﴿وَيَتُوبُ ٱللَّهُ عَلَىٰ مَن يَشَآءُ ۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ١٥﴾ سورة التوبة / الآية: ١٥

មានន័យថា៖«អល់ឡោះទ្រង់នឹងទទួលយកការសារភាពកំហុសចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ ហើយអល់ឡោះទ្រង់មានបញ្ញាញាណ ប្រកបដោយគតិបណ្ឌិត»។

﴿إِنَّ رَبِّى لَطِيفٌ لِّمَا يَشَآءُ ۚ إِنَّهُۥ هُوَ ٱلْعَلِيمُ ٱلْحَكِيمُ ١٠٠﴾ سورة يوسف / الآية: ١٠٠

មានន័យថា៖ «ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំមហាល្អិតល្អន់ចំពោះអ្វីដែលទ្រង់ប្រាថ្នា។ ពិតណាស់ ទ្រង់មានមហាបញ្ញាញាណ ទ្រង់មានមហាគតិបណ្ឌិត»។

អល់ឡោះជាម្ចាស់ទ្រង់តែមួយគត់ដែលជាម្ចាស់កម្មសិទ្ធិនៃសេចក្តីប្រាថ្នាដែលសេរី ទ្រង់សព្វព្រះទ័យអ្វីដែលទ្រង់ប្រាថ្នា ហើយអ្វីដែលទ្រង់ប្រាថ្នា គឺនឹងកើតឡើងជានិច្ច។ មនុស្សយើងក៏មានអ្វីដែលគេហៅថា "សេរីភាពក្នុងការជ្រើសរើស"ដែរ។ ប៉ុន្តែអ្វីដែលអល់ឡោះប្រាថ្នានឹងកើតឡើងជានិច្ច គ្រាន់តែអ្វីដែលយើងជ្រើសរើស អាចកើតឬអាចមិនកើតឡើងតែប៉ុណ្ណោះ។

អល់ឡោះនឹងមិនជំនុំជម្រះទៅលើវាសនានោះទេ ក៏ប៉ុន្តែទ្រង់នឹងជំនុំជម្រះលើជម្រើសរបស់យើង។ មានន័យថា ការប៉ងប្រាថ្នារបស់យើងនឹងក្លាយជាខ្លឹម ឬធាតុស្នូលនៃរាល់អ្វីគ្រប់យ៉ាង។ សូម្បីការប៉ងប្រាថ្នារបស់យើងយ៉ាងណាក៏ដោយ ក៏គេនឹងជំនុំជម្រះយើងតាមនោះ។

បុគ្គលម្នាក់ៗនឹងត្រូវជំនុំជម្រះតាមអ្វីដែលអល់ឡោះទ្រង់ប្រទានឱ្យនូវកាយសម្បទា ទេពកោសល្យ។ តើពួកគេបានប្រើប្រាស់យ៉ាងដូចម្ដេច ហើយប្រាថ្នាអ្វីខ្លះ?។

ជាពិសេសទាក់ទងនឹងថ្ងៃជំនុំជម្រះ អល់ឡោះមានព្រះបន្ទូលថា រាល់អ្វីដែលមនុស្សយើងធ្វើគឺត្រូវគេកត់ត្រា ហើយសូម្បីអ្វីមួយតូចល្អិតក៏មិនរួចផុតពីការកត់ត្រាដែរ។ ដូច្នេះ អ្នកណាធ្វើល្អប៉ុនសត្វស្រមោចគង់តែនឹងបានឃើញនៅថ្ងៃជំនុំជម្រះ រីឯអ្នកដែលធ្វើអាក្រក់ប៉ុនសត្វស្រមោចវិញ ក៏គង់តែនឹងបានឃើញដូចគ្នាដែរ។

នៅថ្ងៃនោះ (ថ្ងៃជំនុំជម្រះ) គេបែកមនុស្សជាក្រុមផ្សេងៗគ្នា ហើយអំពើរបស់ពួកគេនឹងត្រូវលាតត្រដាង។ ដូច្នេះ នរណាធ្វើល្អប៉ុនសត្វស្រមោចគង់តែនឹងបានឃើញ។

﴿ يَوْمَئِذٖ يَصۡدُرُ ٱلنَّاسُ أَشۡتَاتٗا لِّيُرَوۡاْ أَعۡمَٰلَهُمۡ ٦ فَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٍ خَيۡرٗا يَرَهُۥ ٧ وَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٖ شَرّٗا يَرَهُۥ ٨ ﴾

سورة الزلزلة / الآية: ٦ - ٨

មានន័យថា៖ « នៅថ្ងៃនោះ មនុស្សលោកនឹងចេញពីផ្នូរមកទាំងក្រុមៗខុសៗគ្នា ដើម្បីគេបង្ហាញឱ្យឃើញអំពើទាំងឡាយរបស់ពួកគេ។ ដូច្នេះ អ្នកដែលធ្វើអំពើល្អប៉ុនសត្វស្រមោចគេនឹងឃើញអំពើនោះ ហើយអ្នកដែលធ្វើអំពើអាក្រក់ប៉ុនសត្វស្រមោច ក៏គេនឹងឃើញអំពើនោះផងដែរ »។

អ្វីដែលផ្ដល់ភស្តុតាងផ្ទុយនឹងយើង គឺខ្លួនយើងផ្ទាល់។ ត្រចៀក អណ្ដាត ភ្នែករបស់យើងនឹងធ្វើជាសាក្សីលើយើងនៅចំពោះមុខ

អល់ឡោះជាម្ចាស់នាថ្ងៃបរលោក។ គ្មាននរណាត្រូវគេរំលោភបំពានដោយអយុត្តិធម៌នៅថ្ងៃនោះទេ ហើយក៏គ្មាននរណាម្នាក់ត្រូវគេចោទប្រកាន់ដោយគ្មានកំហុសនោះដែរ។

គេអាចដាក់អ្វីគ្រប់យ៉ាងឱ្យឋិតនៅតាមកន្លែងដែលសមស្រប ក៏ប៉ុន្តែមនុស្សនឹងតវ៉ាថា ហេតុអ្វីទ្រង់បោះពួកគេចុះក្នុងនរក ដោយគ្មានបានផ្តល់ឱកាសដល់ពួកគេ ហើយការរស់នៅក្នុងលោកីយ៍នេះគ្មានអ្វីផ្សេងក្រៅពីជាឱកាសសម្រាប់បញ្ជាក់ប្រាប់ខ្លួនឯងថា តើយើងជានរណាពិតប្រាកដ ហើយយើងនឹងធ្វើអ្វីឱ្យប្រាកដ? ព្រោះយើងមានការជ្រើសរើសដោយសេរី។

អល់ឡោះទ្រង់ជ្រាបរាល់អ្វីដែលនឹងកើតឡើង ប៉ុន្តែយើងមិនដឹងដូចព្រះអង្គទេ។ ដូច្នេះ ការសាកល្បងគឺជារឿងមួយយុត្តិធម៌។

### បើកាលណាអ្នកចង់ស្គាល់ទ្រង់ ចូរគោះទ្វារ

មានវិធីជាច្រើនដែលមនុស្សអាចស្គាល់អ្វីៗនៅជុំវិញខ្លួនឯង ដូចជាវត្ថុ សត្វលោក បាតុភូតធម្មជាតិ និងមិនមែនធម្មជាតិ ហើយអ្វីគ្រប់យ៉ាងសុទ្ធតែជាផ្លូវណែនាំឱ្យយើងស្គាល់ព្រះជាម្ចាស់។

ឧទាហរណ៍អ្នកចង់ស្គាល់នរណាម្នាក់ ជួនកាលអ្នកអាចទៅក្បែរធ្វើល្អចំពោះគេ លើកតម្កើងគេ និងគោរពចំពោះគេ។ សូម្បីតែក្រុមដែលមានភាសាខុសគ្នា ពួកគេប្រើសញ្ញាពិសេស សម្រាប់បុគ្គលដែលខ្លួនមិនធ្លាប់ស្គាល់ ឬពួកអ្នកដែលមកចង់ស្គាល់រូបគេ គេហៅថា “ សំនួនពាក្យគោរព និងលើកតម្កើង”។ ជួនកាលអាចណែនាំខ្លួនឯង

ឱ្យអ្នកដទៃស្គាល់ ឬមិត្តភ័ក្តិណែនាំជំនួសឱ្យអ្នកដទៃស្គាល់អ្នក។ យើងអាចស្គាល់មនុស្សជាច្រើនផងដែរតាមរយៈទំព័រកាសែត កញ្ចក់ទូរទស្សន៍ ហើយយើងអាចស្គាល់អ្នកដទៃផ្សេងទៀតតាមរយៈរឿងនិទាន រឿងព្រេងដែលអ្នកដទៃទៀតបានតែងនិពន្ធអំពីពួកគេ។ ជួនកាលអាចស្រដៀងនឹងការពិត ហើយជួនកាលឃ្លាតឆ្ងាយពីការពិត។

មានវិធីសាស្ត្រជាច្រើនសម្រាប់ស្គាល់អ្វីមួយ និងបុគ្គលណាម្នាក់ ហើយវិធីសាស្ត្រដែលងាយបំផុតនោះគឺ ការស្តាប់អ្នកដទៃដែលគេណែនាំឱ្យស្គាល់។ សង្ឃឹមថា នេះជាវិធីដែលអ្នកពេញចិត្តប្រើជាងគេនៅពេល និយាយអំពីការស្គាល់អល់ឡោះជាម្ចាស់?

**ដូច្នេះ អល់ឡោះជានរណា?**

សំណួរនេះ អល់ឡោះឆ្លើយតបដោយព្រះអង្គផ្ទាល់ ទ្រង់បានមានព្រះបន្ទូលថា៖

﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلۡحَيُّ ٱلۡقَيُّومُۚ لَا تَأۡخُذُهُۥ سِنَةٞ وَلَا نَوۡمٞۚ لَّهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ مَن ذَا ٱلَّذِي يَشۡفَعُ عِندَهُۥٓ إِلَّا بِإِذۡنِهِۦۚ يَعۡلَمُ مَا بَيۡنَ أَيۡدِيهِمۡ وَمَا خَلۡفَهُمۡۖ وَلَا يُحِيطُونَ بِشَيۡءٖ مِّنۡ عِلۡمِهِۦٓ إِلَّا بِمَا شَآءَۚ وَسِعَ كُرۡسِيُّهُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۖ وَلَا يَـُٔودُهُۥ حِفۡظُهُمَاۚ وَهُوَ ٱلۡعَلِيُّ ٱلۡعَظِيمُ ٢٥٥ ﴾ سورة البقرة / الآية: ٢٥٥

មានន័យថា៖ « អល់ឡោះមានតែមួយគត់ គ្មានទេម្ចាស់ដែលត្រូវគេគោរពដោយពិតប្រាកដផ្សេងពីទ្រង់។ ទ្រង់មានព្រះជន្មគង់ជាអមតៈ ទ្រង់មិនងងុយ ហើយក៏មិនផ្ទុំដែរ។ អ្វីដែលមាននៅលើមេឃ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ គ្មានបុគ្គលណាហ៊ានធ្វើអន្តរាគមន៍

ចំពោះព្រះភ័ក្ត្រអល់ឡោះឡើយ។ លើកលែងតែមានការអនុញ្ញាតពីទ្រង់។ ទ្រង់ជ្រាបនូវអ្វីៗដែលមាននៅពីមុខនិងនៅពីក្រោយពួកគេ។ ពួកគេមិនដឹងអ្វីសោះពីពុទ្ធិរបស់ទ្រង់ លើកលែងអ្វីដែលទ្រង់សព្វព្រះទ័យ។ អាសនៈរបស់ទ្រង់គឺធំមហាសាលគ្របលើមេឃ និងផែនដី ហើយទ្រង់មិននឿយហត់ក្នុងការរក្សាមេឃ និងផែនដីឡើយ។ ទ្រង់ជាព្រះដ៏មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម»។

នៅទីនេះព្រះអង្គណែនាំពីព្រះកាយរបស់ទ្រង់ ដោយមានព្រះបន្ទូលថា ពិតណាស់ ទ្រង់គឺជាព្រះ ដែលគ្មានទេម្ចាស់ក្រៅពីទ្រង់ ហើយមានតែទ្រង់មួយអង្គគត់ជាព្រះជាម្ចាស់នៃសត្វលោកទាំងមូល។ ព្រះបន្ទូលរបស់ទ្រង់ « ទ្រង់មានព្រះជន្មគង់ជាអមតៈ គឺទ្រង់មានព្រះជន្មរស់ មិនសុគតជាដាច់ខាត ទ្រង់កំពុងតែចាត់ចែងការងារដើម្បីអ្នកផ្សេងក្រៅពីទ្រង់។ ដូច្នេះ សភាវៈសត្វលោកទាំងអស់ត្រូវការទ្រង់ ហើយទ្រង់មិនត្រូវការពួកគេឡើយ។ ក៏គ្មានអ្វីឋិតថេរដោយគ្មានការចាត់ចែងរបស់ទ្រង់នោះដែរ។

ព្រះបន្ទូលរបស់ទ្រង់ « ទ្រង់មិនងងុយ ហើយក៏មិនផ្ទុំដែរ » គឺភាពខ្វះខាតមិនកើតមានដល់ទ្រង់ឡើយ។ គ្មានការភ្លេចភ្លាំង គ្មានភាពស្រលាំងកាំងចំពោះសត្វលោករបស់ទ្រង់ តែទ្រង់គង់ជាសាក្សីចំពោះជីវិត សត្វគ្រប់រូបដែលបានប្រព្រឹត្តអ្វីគ្រប់យ៉ាង។ គ្មានអ្វីលាក់បាំងនឹងទ្រង់ ហើយក៏គ្មានប្រការអាថ៌កំបាំងជាមួយទ្រង់ដែរ។ ភាពគង់វង្សគ្មានទីអវសានរបស់ទ្រង់ គឺទ្រង់គ្មានការងងុយ និងការផ្ទុំ។ ព្រះបន្ទូលរបស់ទ្រង់គឺថា៖ « ទ្រង់មិនចាញ់ » មិនចាញ់ការងងុយ ការស្ងាប និង

ងងុយផ្ទុំ។ ដូច្នេះ ទើបទ្រង់បានមានព្រះបន្ទូលថាៈ «ហើយក៏មិនផ្ទុំ» ពីព្រោះ ការផ្ទុំមានសភាពខ្លាំងក្លាជាងការងងុយ។ ព្រះបន្ទូលរបស់ទ្រង់ «អ្វីៗដែលមាននៅលើមេឃ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់»។ បានសេចក្ដីថា អ្វីទាំងអស់ជាខ្ញុំបម្រើរបស់ទ្រង់ ជាកម្មសិទ្ធិរបស់ទ្រង់នៅក្រោមអំណាច និងការគ្រប់គ្រងរបស់ទ្រង់។ ព្រះបន្ទូលទ្រង់ថាៈ « គ្មាននរណាម្នាក់ហ៊ានធ្វើអន្តរាគមន៍នៅចំពោះព្រះភ័ក្ត្ររបស់អល់ឡោះ លើកលែងតែមានការអនុញ្ញាតពីទ្រង់»។ បង្ហាញពីឧត្តមភាព ឥស្សរភាព ភាពឧត្តុង្គឧត្តម និងមោទនភាពរបស់ទ្រង់ គ្មាននរណាម្នាក់ហ៊ានធ្វើអន្តរាគមន៍នៅចំពោះព្រះភ័ក្ត្ររបស់ទ្រង់ លើកលែងតែមានការអនុញ្ញាតពីទ្រង់ចំពោះគេ។ ព្រះបន្ទូលរបស់ទ្រង់ «ទ្រង់ជ្រាបនូវអ្វីដែលមាននៅពីមុខ និងនៅពីក្រោយពួកគេ»។ ជាភស្ដុតាងបញ្ជាក់ពីពុទ្ធិចំណេះដឹងរបស់ទ្រង់គ្របដណ្ដប់លើសត្វលោកទាំងឡាយ តាំងពីអតីតកាល បច្ចុប្បន្នកាល និងទៅអនាគតកាល។

ព្រះបន្ទូលរបស់ទ្រង់ថាៈ «ហើយពួកគេ មិនដឹងអំពីពុទ្ធិរបស់ទ្រង់ លើកលែងតែអ្វីដែលទ្រង់សព្វព្រះទ័យឱ្យដឹង»។ គឺគ្មាននរណាដឹងនូវពុទ្ធិចំណេះដឹងរបស់អល់ឡោះ លើកលែងតែអ្វីដែលអល់ឡោះបានប្រាប់ឱ្យដឹង និងបង្ហាញឱ្យឃើញ។

ព្រះបន្ទូលរបស់ទ្រង់ថាៈ «អាសនៈរបស់ទ្រង់ធំមហាសាលគ្របដណ្ដប់លើមេឃ និងផែនដី»។ គឺអំណាច និងបល្ល័ង្ករបស់ទ្រង់ធំមហាសាលគ្របដណ្ដប់លើអ្វីគ្រប់យ៉ាង។

ព្រះបន្ទូលរបស់ទ្រង់ថា៖ «ហើយការថែរក្សាភព ទាំងពីរនេះមិនធ្វើឱ្យទ្រង់លំបាកឡើយ»។ មិនធុន់ដល់ទ្រង់ មិនធ្វើឱ្យទ្រង់នឿយហត់ក្នុងការថែរក្សាមេឃ និងដី ហើយនិងអ្វីៗដែលនៅលើនិងនៅចន្លោះភពទាំងពីរ។ ផ្ទុយទៅវិញ រឿងទាំងនេះងាយស្រួលចំពោះទ្រង់ ត្បិតទ្រង់ចាត់ចែងទទួលខុសត្រូវចំពោះរាល់ជីវិតគ្រប់រូបដែលបានប្រព្រឹត្ត ហើយឃ្លាំមើលអ្វីទាំងឡាយ មិនមានអ្វីរបូតចេញ និងអវត្តមានពីទ្រង់ឡើយ។ ចំពោះទ្រង់ សភាវៈទាំងឡាយតូចទាបទន់ខ្សោយ ក្រខ្សត់ខ្វះខាត ឱនលំទោន ហើយទ្រង់ជាអ្នកមានដ៏គួរឱ្យគេសរសើរ ទ្រង់ធ្វើកើតចំពោះអ្វីទ្រង់ប្រាថ្នា គ្មាននរណាមានសិទ្ធិសួរអំពីអ្វីដែលទ្រង់ធ្វើ។ ផ្ទុយទៅវិញពួកគេទេដែលត្រូវគេសួរនោះ។ ទ្រង់មានអានុភាពលើអ្វីគ្រប់យ៉ាង ទ្រង់ជាអ្នកជំនុំជម្រះលើអ្វីគ្រប់យ៉ាង ទ្រង់ជាអ្នកឃ្លាំមើលអ្វីគ្រប់យ៉ាង ទ្រង់ជាព្រះដ៏មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម គ្មានទេព្រះពិតផ្សេងពីទ្រង់ ហើយគ្មានទេម្ចាស់ផ្សេងក្រៅពីទ្រង់។ ព្រះបន្ទូល របស់ទ្រង់ថា៖ «ទ្រង់ជាព្រះដ៏មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម» គឺទ្រង់ខ្ពស់ និងធំមហិមាជាងអ្វីៗទាំងអស់។

នេះជាកូនសៀវភៅណែនាំដំបូងដែលខ្ញុំស្នើឡើងចំពោះមិត្តអ្នកអានជាទីស្រលាញ់ បើសិនជាអ្នកចង់ស្គាល់អល់ឡោះជានរណានោះ ខ្ញុំមិនបានខិតខំណែនាំអ្នកដោយនាំមកបង្ហាញនូវភស្តុតាង និងអំណះអំណាងទាំងឡាយនោះទេ ហើយខ្ញុំក៏មិនបានសរសេរកំណាព្យ ឬពាក្យសរសើរអំពីទ្រង់ដែរ។ ម្យ៉ាងវិញទៀត ខ្ញុំក៏មិនបាននិយាយដោយខ្លួនឯងអំពីទ្រង់ផងដែរ។ ក៏ប៉ុន្តែ អល់ឡោះបានណែនាំដោយព្រះ

អង្គឯង ទ្រង់ជាព្រះដ៏មហាបវរ មហាខ្ពង់ខ្ពស់ ឧត្តុង្គឧត្តម។ ពិតប្រាកដ ណាស់ វាក្យខណ្ឌដ៏ប្រពៃ ដែលគេហៅថា អាយ៉ាត់គួរស៊ី ជាវាក្យខណ្ឌដ៏ឧត្តមជាងគេបំផុតនៃវាក្យខណ្ឌទាំងឡាយ ក្នុងគម្ពីរអាល់គួរអាន។ ចូរត្រិះរិះពិចារណាឱ្យបានល្អិតល្អន់ ចូរស្តាប់អល់ឡោះទ្រង់ថ្លែងអំពីព្រះអង្គឯង ហើយព្យាយាមស្គាល់ទ្រង់ឱ្យស្និទ្ធបន្តិច បើអ្នកមិនមានលទ្ធភាព ចូរអានអត្ថបទរបស់យើងខ្ញុំដូចខាងក្រោម។

## អ្នកស្វែងរកការពិត... មិនទាន់ស្គាល់ទ្រង់នៅឡើយទេ

ចូរកុំបារម្ភ! មានមនុស្សជាច្រើនមិនអាចស្គាល់ទ្រង់ដោយងាយ ហើយផ្លូវទៅរកអល់ឡោះពុំមែនក្រាលលម្អដោយផ្កាជានិច្ចនោះដែរ។ អ្នកនាំសារមូហាំម៉ាត់បានមានប្រសាសន៍ថា៖

عَنْ أَنَسِ بْنِ مَالِكٍ قَالَ قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( حُفَّتْ الْجَنَّةُ بِالْمَكَارِهِ ) صحيح مسلم

មានន័យថា៖ «ឋានសួគ៌ហ៊ុមព័ទ្ធដោយភាពស្អប់ខ្ពើម»។ ដូច្នេះការឈានដល់ការស្គាល់អល់ឡោះមិនងាយស្រួលទេ។ លើកនេះ សូមភ្ជាប់មកជាមួយនូវជីវប្រវត្តិយុវជនជំទង់ម្នាក់កាន់សាសនាព្រះអគ្គី។ គាត់ជាអ្នកយាមភ្លើង គឺទទួលខុសត្រូវបង្កាត់ភ្លើងដែលសាសន៍របស់គាត់កំពុងគោរពបូជា ហើយគាត់ជាអ្នករក្សាភ្លើងនោះឱ្យឆេះរហូត មិនត្រូវឱ្យរលត់ជាដាច់ខាត។

នៅថ្ងៃមួយយុវជននេះចេញក្រៅបានជួបអ្នកគោរពបូជាអល់ឡោះពួកគេកាន់សាសនាគ្រិស្ត។ ពួកគេកំពុងគោរពបូជាអល់ឡោះ នៅក្នុង

វិហារមួយ យុវជននេះក៏ពេញចិត្តនឹងរបៀបគោរពរបស់ពួកគេ។ គេមានអារម្មណ៍ចម្លែក មានអារម្មណ៍ថា ពួគេកាន់តាមសាសនាត្រឹមត្រូវ ហើយអ្វីដែលខ្លួនគេកំពុងកាន់តាមនោះគឺខុស...។ គេមានជំនឿជាក់ចំពោះពួកគេ ហើយប្រាថ្នាចង់ដឹងពីប្រភពសាសនារបស់ពួកគេ។ ក្រោយមកដឹងថា ប្រភពសាសនានេះមកពីស្យាម ហើយគេរង់ចាំឱកាសនឹងចាកចោលភូមិកំណើត ផ្ទះសម្បែង គ្រួសាររបស់គេ ភៀសខ្លួនទៅស្យាមស្វែងរកប្រភពសាសនានេះ។ ពេលទៅដល់ស្រុកស្យាមត្រូវគេជ្រើសឱ្យធ្វើការជាអ្នកបម្រើបព្វជិតរបស់ពួកគេ។ គេប្រទះឃើញថា បព្វជិតម្នាក់នេះជាមនុស្សមានល្បិចកល។ លុះបព្វជិតនេះស្លាប់បាត់ រូបគេបានចាកចេញ ហើយទៅនៅជាមួយបព្វជិតផ្សេងទៀត។ គេឃើញថាបព្វជិតនេះកាន់បានត្រឹមត្រូវ គេស្តាប់ដំបូន្មានរបស់បព្វជិតម្នាក់នេះ។ មុននឹងស្លាប់បព្វជិតនេះបានប្រគល់រូបគេឱ្យទៅបព្វជិតផ្សេងទៀត។ បព្វជិតចុងក្រោយនេះ គឺជាចំណុចផ្លាស់ប្តូរនៃជីវិតយុវជនម្នាក់នេះ។ ខណៈនោះ លោកបានផ្តាំឱ្យដើរតាមអ្នកនាំសារម្នាក់ដែលនឹងចាប់កំណើតមកនាសម័យនោះ។ តែនឹងកើតមកក្នុងទឹកដីដែលមិនមែនជាទឹកដីរបស់គាត់ ក្នុងពូជសាសន៍មួយដែលមិនមែនជាពូជសាសន៍របស់គាត់ ហើយយុវជននោះក៏ចេញដំណើរស្វែងរកអ្នកនាំសារនេះ ស្វែងរកសាសនានេះ រកព្រះនេះ!!។ រូបគេសុខចិត្តលក់អ្វីៗនៅជាប់នឹងខ្លួនឱ្យទៅក្រុមពួកអ្នកដំណើរ ជាថ្នូរនឹងការនាំផ្លូវរូបគេទៅកាន់កន្លែងដែលបព្វជិតនោះបានរៀបរាប់ប្រាប់។ ពួកគេបានចាប់យុវជនម្នាក់នេះជាចំណាប់ខ្មាំង ហើយលក់គេជាទាសករ ដែលពីមុន

គាត់ធ្លាប់តែជាកូនរបស់ចៅហ្វាយស្រុកម្នាក់នៃអាណាចក្រពែក។ មិនយូរប៉ុន្មាន អល់ឡោះបានកំណត់វាសនាឱ្យរូបគេបានជួបអ្នកនាំ សារនោះដោយផ្ទាល់។ រូបគេស្គាល់លោក និងស្គាល់លក្ខណសម្បត្តិរបស់លោកដែលបព្វជិតបានរៀបរាប់ប្រាប់ ហើយស្គាល់អល់ឡោះជាម្ចាស់នៅពេលនោះផងដែរ។ គេជាអ្នកស្វែងរកការពិតយ៉ាងប្រាកដ ដូចជា សេកខលេត មូហាំម៉ាត់ខលេត បានដាក់ងារក្នុងសៀវភៅ« ជនជំនិតរបស់អ្នកនាំសារ» មួយច្បាប់របស់គាត់ថា សាល់ម៉ាន អាល់ហ្វារីស៊ីយ៍ដែលដើរឆ្លងកាត់វាលខ្សាច់សាហារ៉ាពីទិសខាងកើតដល់ទិសខាងលិចដើម្បីស្វែងរកព្រះ ស្វែងរកម្ចាស់ នៅពេលដែលគាត់រកឃើញទ្រង់ហើយ គាត់ជាខ្ញុំបម្រើដ៏ល្អជាទីបំផុតរបស់ទ្រង់។

បងប្អូនមិត្តអ្នកអានជាទីស្រលាញ់! បើអ្នកមិនទាន់ស្គាល់ទ្រង់នៅឡើយទេ ចូរដើរតាមជំហានរបស់សាល់ម៉ាន ចូរព្យាយាមស្វែងរក ចូរលះបង់កម្លាំងកាយចិត្តដើម្បីឱ្យស្គាល់ថា តើអល់ឡោះជានរណា..? សូមស្បថចំពោះអល់ឡោះ! ពិតណាស់ ការស្វែងរកដើម្បីស្គាល់អល់ឡោះជាម្ចាស់មានភាពរីករាយសុខដុមដ៏អស្ចារ្យ ដែលមនុស្សទទួលតាមរយៈអារម្មណ៍ នៅពេលដែលខ្លួនគេ បានស្គាល់អល់ឡោះ ហើយស្គាល់យ៉ាងពិតប្រាកដទៀតផង។

**សត្វលោករបស់ទ្រង់បញ្ជាក់ពីទ្រង់!!**

ជាការពិតណាស់ អ្វីភាគច្រើនដែលបង្ហាញថាមានអល់ឡោះនោះ គឺការបង្កើតរបស់ទ្រង់ដែលជាការបង្កើតដ៏ល្អឥតខ្ចោះ និងសត្វលោក

ដែលទ្រង់បានបង្កើត ពរជ័យដែលទ្រង់បានប្រទានស្រោចស្រពមកលើមនុស្សលោកទាំងអ្នកមានជំនឿ និងអ្នកប្រឆាំង។

សង្ឃឹមថា គម្ពីរអាល់គួរអានជាសាក្សីដ៏កំពូលបញ្ជាក់ពីមហិទ្ធឫទ្ធិ និងអានុភាពរបស់ទ្រង់។ ពិតណាស់ អល់ឡោះបានចែងក្នុងគម្ពីរអំពីប្រវត្តិមនុស្សជំនាន់មុន និងជំនាន់ក្រោយ។ ទ្រង់បានបង្ហើបបង្ហាញនូវប្រការអាថ៌កំបាំងដែលមនុស្សលោកមិនបានដឹងពីមុនមក។ ឥឡូវនេះ យើងសូមលើកយកអច្ឆរិយភាពមួយចំនួន ដែលមានក្នុងគម្ពីរអាល់គួរអាន និងបង្ហាញភស្តុតាងដ៏មានសក្តានុពលភាពខ្លាំងក្លាបញ្ជាក់ថា មានអល់ឡោះ និងពុទ្ធិរបស់ទ្រង់ដឹងមុននឹងអ្វីគ្រប់យ៉ាងកើតឡើង។

អ្នកវិទ្យាសាស្ត្រជាច្រើនមានភាពច្របូកច្របល់ក្នុងការព្យាយាមស្វែងយល់ការពិតអំពីរ៉ែលោហៈ (ដែក) ព្រោះកម្លាំងថាមពលដែលអាចស្លរំលាយរ៉ែដែកឱ្យរលាយចូលគ្នាត្រូវការកម្លាំងខ្លាំងលើសពីថាមពលដែលមានក្នុងប្រព័ន្ធព្រះអាទិត្យទ្វេជាបួន....ហើយនេះជារឿងចម្លែកមែនទែនសម្រាប់អ្នកវិទ្យាសាស្ត្រ។ តែវាមិនចម្លែកចំពោះអ្នកវិទ្យាសាស្ត្រឥស្លាម ដែលបានឃើញផ្ទាល់នូវព្រះបន្ទូលរបស់អល់ឡោះជាម្ចាស់៖

﴿ وَأَنزَلْنَا ٱلْحَدِيدَ فِيهِ بَأْسٌ شَدِيدٌ وَمَنَٰفِعُ لِلنَّاسِ وَلِيَعْلَمَ ٱللَّهُ مَن يَنصُرُهُۥ وَرُسُلَهُۥ بِٱلْغَيْبِ ۚ إِنَّ ٱللَّهَ قَوِىٌّ عَزِيزٌ ﴿٢٥﴾ ﴾ سورة الحديد / الآية: ٢٥

មានន័យថា៖ «យើងបានបញ្ចុះដែកដែលរឹងមាំបំផុត និងមានសារប្រយោជន៍សម្រាប់មនុស្សលោក។ អល់ឡោះទ្រង់ចង់ជ្រាបថា នរណាម្នាក់គាំទ្រទ្រង់ និងពួកអ្នកនាំសាររបស់ទ្រង់ដោយអាថ៌កំបាំង។ ពិតណាស់អល់ឡោះមហាខ្លាំងក្លា មហាពូកែ»។

ពួកគេបានដឹងអំពីកន្សោមពាក្យ «យើងបានបញ្ចុះ» ដែកមិនមែនជាធាតុផ្សំចេញពីដីទេ តែគេបានបញ្ចុះពីលើមេឃមក ហើយនៅសម័យបច្ចុប្បន្ន អ្នកវិទ្យាសាស្ត្រលោហធាតុបញ្ជាក់ថា ធាតុផ្សំរបស់ដែកមិនមែនផ្សំចេញដីនោះទេ។

យើងនាំគ្នាជ្រមុជចូលក្នុងជម្រៅសមុទ្របន្តិចសិន នៅទីនោះពួកភូគព្ភវិទូសមុទ្រ បានរកឃើញថា លក្ខណៈសណ្ឋាណភូគព្ភសមុទ្រគឺដូចទៅនឹងអ្វីដែលអល់ឡោះបានប្រាប់ដោយព្រះបន្ទូលរបស់ទ្រង់ថា៖

﴿ أَوْ كَظُلُمَٰتٍ فِى بَحْرٍ لُّجِّىٍّ يَغْشَىٰهُ مَوْجٌ مِّن فَوْقِهِۦ مَوْجٌ مِّن فَوْقِهِۦ سَحَابٌ ۚ ظُلُمَٰتٌۢ بَعْضُهَا فَوْقَ بَعْضٍ إِذَآ أَخْرَجَ يَدَهُۥ لَمْ يَكَدْ يَرَىٰهَا ۗ وَمَن لَّمْ يَجْعَلِ ٱللَّهُ لَهُۥ نُورًا فَمَا لَهُۥ مِن نُّورٍ ﴿٤٠﴾ ﴾ سورة النور / الآية: ٤٠

មានន័យថា៖ «ឬប្រៀបដូចជាភាពងងឹតក្នុងសមុទ្រជ្រៅគ្របដោយទឹករលក នៅពីលើរលកមានរលក នៅពីលើរលកមានពពក ភាពងងឹតត្រួតលើគ្នា បើគេដកដៃចេញ គេស្ទើរតែមើលមិនឃើញដៃខ្លួនឯង។ នរណាដែលអល់ឡោះមិនធ្វើឱ្យគេមានពន្លឺ គេនឹងគ្មានពន្លឺជាដាច់ខាត »។

នេះជាវិទ្យាសាស្ត្រពិតដែលបានស្រាវជ្រាវរកឃើញ បន្ទាប់ពីធ្វើការសាងសង់ដំឡើងស្ថានីយ៍ពិសោធន៍រាប់រយនៅក្នុងសមុទ្រ ថតរូបភាពដោយផ្កាយរណប។ នេះជាសម្តីរបស់សាស្ត្រាចារ្យ ស្រាយឌីរ ជាអ្នកវិទ្យាសាស្ត្រស្រាវជ្រាវខាងលំហសមុទ្រប្រចាំនៅអាល្លឺម៉ង់ខាងលិច។ នៅពេលដែលលោកបានស្តាប់លឺវាក្យខណ្ឌទាំងនេះ លោកបាននិយាយថា ពិតណាស់ នេះមិនអាចជាសម្តីរបស់មនុស្សនោះទេ។ សាស្ត្រាចារ្យម្នាក់ទៀតគឺលោក ដូរចារូ ជាសាស្ត្រាចារ្យផ្នែកភូគព្ភសាស្ត្រសមុទ្រលោកធ្វើការបង្ហាញយើងអំពីវិទ្យាសាស្ត្រពិតបញ្ជាក់ពីសុក្រឹតភាពនៃវាក្យខណ្ឌទាំងនេះដោយពោលថា « ពិតប្រាកដណាស់ មនុស្សជំនាន់មុនមិនអាចជ្រមុជលើសពីជម្រៅ២០ម៉ែត្រដោយគ្មានប្រើឧបករណ៍នោះឡើយ។ ប៉ុន្តែបច្ចុប្បន្ន យើងអាចជ្រមុជដល់ជម្រៅបាតសមុទ្រដោយប្រើឧបករណ៍ទំនើប នៅទីនោះយើងបានប្រទះឃើញភាពងងឹតខ្លាំងមែនទែនក្នុងជម្រៅ២០០ម៉ែត្រចុះក្រោម។

ក្នុងវាក្យខណ្ឌព្រះគម្ពីរ (សមុទ្រជ្រៅ) ដូចជារបកគំហើញបានផ្តល់ជាព័ត៌មានឱ្យយើងដឹងថា ក្នុងជម្រៅបាតសមុទ្រមានសភាពដូចអត្ថន័យនៃព្រះបន្ទូលរបស់អល់ឡោះជាម្ចាស់(ភាពងងឹតត្រួតលើគ្នា)។ តាមធម្មតាពណ៌នៃវិសាលគមមាន៧ មានពណ៌ក្រហម លឿង ខៀវ បៃតង ពណ៌ទឹកក្រូច។ល។ បើសិនជាយើងជ្រមុជជ្រៅក្នុងបាតសមុទ្រ ពណ៌ទាំងនោះនឹងចាប់ផ្តើមបាត់ម្តងមួយៗរហូតដល់បាត់ពណ៌ទាំងស្រុងធ្វើឱ្យបាតសមុទ្រងងឹតឈឹងលែងមានពន្លឺ។ ពណ៌ក្រហមបាត់បង់មុនគេ បន្ទាប់មក ពណ៌ទឹកក្រូច បន្ទាប់មកទៀត ពណ៌លឿង

រហូតដល់ពណ៌ចុងក្រោយបង្អស់គឺពណ៌ខៀវក្នុងជម្រៅ២០០ម៉ែត្រ។ រាល់ពេលដែលពណ៌នីមួយៗបាត់បង់ ភាពងងឹតបានកើនឡើងមួយកម្រិតរហូតដល់ងងឹតទាំងស្រុង។ រីឯបន្ទូលរបស់ទ្រង់ (រលកនៅពីលើរលកមានរលក) ពិតប្រាកដណាស់ វិទ្យាសាស្ត្រពិតបានរកឃើញថា ក្នុងសមុទ្រមានកន្លែងខណ្ឌចែករវាងសមុទ្រជ្រៅ និងសមុទ្រផ្ទៃខាងលើ។ ក្នុងចន្លោះផ្ទៃសមុទ្រទាំងពីរមានរលក ហាក់បីដូចជាមានរលកក្នុងផ្ទៃសមុទ្រជ្រៅងងឹត ដែលយើងមិនអាចមើលឃើញ ហើយមួយទៀតគឺរលកនៅលើផ្ទៃសមុទ្រដែលយើងអាចមើលឃើញផ្ទាល់នឹងភ្នែក។ នេះហាក់បីដូចជារលកនៅពីលើរលក ហើយនេះជាវិទ្យាសាស្ត្រពិតដែលបញ្ជាក់ដោយលោកសាស្ត្រាចារ្យ ដូរចារ៉ូ អំពីវាក្យខណ្ឌទាំងនេះថា ពិតប្រាកដ នេះពុំមែនជាចំណេះដឹងរបស់មនុស្សនោះទេ។

នេះគឺជាអល់ឡោះជាម្ចាស់ តើអ្នកពុំទាន់ស្គាល់ទ្រង់ទៀតមែនទេ ?

ចូរត្រិះរិះពិចារណាក្នុងវាក្យខណ្ឌគម្ពីរអាល់គួរអាន និងសភាវៈសត្វលោករបស់ទ្រង់ !

ចូរក្រឡេកមើលទៅលើមេឃ តើនរណារក្សាការពារមិនឱ្យមេឃទាំងនោះបាក់រលំ ?

ចូរក្រឡេកមើលទៅផែនដី តើទ្រង់បានបង្កើតវាឱ្យរាបស្មើនៅក្រោមជើងរបស់អ្នកបានយ៉ាងដូចម្ដេច ?

ចូរមើលទៅដង្ហើមចេញចូលរបស់អ្នក តើនរណាជាអ្នកគ្រប់គ្រងលើប្រព័ន្ធដង្ហើមទាំងនេះ ?

ពិតប្រាកដណាស់ ទ្រង់ជាអល់ឡោះជាម្ចាស់ គ្មានព្រះជាម្ចាស់ណាដែលគេត្រូវគោរពសក្ការៈ លើកលែងតែទ្រង់ដែលមានព្រះជន្មរស់គង់វង្សជាអមតៈ។

## ជឿចំពោះអល់ឡោះជាម្ចាស់

ជឿចំពោះអល់ឡោះជាម្ចាស់ ជាគ្រឹះទីមួយនៃគោលជំនឿឥស្លាម ពោលគឺជាមូលដ្ឋានគ្រឹះដំបូងបង្អស់។ ដោយសារតែជំនឿនេះ ទើបអល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃ និងផែនដី បង្កើតឋានសួគ៌ ឋាននរក ទ្រង់ដាក់ជញ្ជីងសម្រាប់ថ្លឹង បង្កើតស្ពានឆ្លងភ្លើងនរក ហើយក៏ព្រោះតែហេតុផលនេះដែរ ទើបទ្រង់បង្កើតមនុស្សលោក ដូចទ្រង់ជាព្រះមហាជ្រះស្អាតមានព្រះបន្ទូលថា៖

﴿ وَمَا خَلَقْتُ ٱلْجِنَّ وَٱلْإِنسَ إِلَّا لِيَعْبُدُونِ ﴿٥٦﴾ ﴾ سورة الذاريات / الآية: ٥٦

មានន័យថា៖ «យើងមិនបង្កើតជិន និងមនុស្ស លើកលែងតែដើម្បីឱ្យពួកគេគោរពសក្ការៈចំពោះយើង »។

ការស្គាល់អល់ឡោះ ការទទួលស្គាល់ភាពជាព្រះជាម្ចាស់ និងការគោរពសក្ការៈចំពោះទ្រង់ ការទទួលស្គាល់ព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់ជាមូលដ្ឋានគ្រឹះនៃជំនឿចំពោះអល់ឡោះជាម្ចាស់។ អ្នកមូស្លីមចាំបាច់ត្រូវស្វែងយល់អំពីចំណេះដឹងទាំងនេះ និងអ្វីទាំងឡាយដែលពាក់ព័ន្ធនឹងអល់ឡោះជាម្ចាស់ ដើម្បីឱ្យជំនឿរបស់គេមានភាពត្រឹមត្រូវពេញលក្ខណៈនិងជំនឿរបស់គេមានប្រសិទ្ធភាព។ ខាងក្រោមនេះជាសេចក្តីពន្យល់សង្ខេបអំពីគោលការណ៍គ្រឹះនៃជំនឿ៖

ជំនឿតាមន័យរបស់ភាសា គឺការជឿជាក់

អត្ថន័យនៃជំនឿគឺពោលនឹងអណ្តាត ជឿនឹងចិត្ត អនុវត្តនឹងអវយវៈ។ គឺជាជំនឿម៉ឺងម៉ាត់ដែលជឿថា អល់ឡោះជាព្រះនៃអ្វីគ្រប់យ៉ាង ជាម្ចាស់កម្មសិទ្ធិ ទ្រង់ជាអ្នកបង្កើត ជាអ្នកផ្តល់លាភសក្ការៈ

ជាអ្នកផ្តល់ជីវិត និងជាអ្នកដកយកជីវិត។ ទ្រង់ជាព្រះតែមួយអង្គគត់ ដែលសក្តិសមនឹងទទួលនូវរាល់ការគោរពសក្ការៈគ្រប់ប្រភេទ និងសេចក្តីឱនលំទោនរណប ហើយទ្រង់ជាព្រះតែមួយគត់មានព្រះលក្ខណៈពេញលេញ សុក្រឹត ស្អាតស្អំពីរាល់ភាពខ្វះខាតទាំងឡាយ។

ជំនឿចំពោះអល់ឡោះចែកចេញជាបីប្រភេទ៖

១ ជឿចំពោះភាពជាព្រះជាម្ចាស់របស់ទ្រង់

២ ជឿចំពោះការគោរពសក្ការៈចំពោះទ្រង់

៣ ជឿចំពោះព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់

**ជឿចំពោះភាពជាព្រះជាម្ចាស់របស់ទ្រង់:**

អត្ថន័យសង្ខេបរួមគឺត្រូវជឿយ៉ាងមុតមាំថា អល់ឡោះជាព្រះជាម្ចាស់នៃអ្វីគ្រប់យ៉ាង ទ្រង់គ្រប់គ្រង រៀបចំ ចាត់ចែងអ្វីទាំងនោះ គ្មានម្ចាស់ផ្សេងក្រៅពីទ្រង់ គ្មានអ្នកគ្រប់គ្រងផ្សេងក្រៅពីទ្រង់។

អត្ថន័យពិស្តារនៃពាក្យថា ម្ចាស់ក្នុងភាសាមានន័យថា អ្នកកាន់កាប់ និងអ្នកគ្រប់គ្រង ហើយភាពជាព្រះជាម្ចាស់របស់អល់ឡោះចំពោះសត្វលោកមានន័យថា ទ្រង់តែមួយគត់ដែលបានបង្កើត គ្រប់គ្រង ចាត់ចែងការងាររបស់សត្វលោក...។ ជឿចំពោះអល់ឡោះក្នុងភាពជាព្រះជាម្ចាស់គឺទទួលស្គាល់ថា ទ្រង់ជាអ្នកបង្កើត និងជាស្តេចគ្រប់គ្រងពួកគេ ទ្រង់ជាអ្នកផ្តល់ជីវិត និងដកយកជីវិតរបស់ពួកគេ ទ្រង់ជាអ្នកផ្តល់ប្រយោជន៍ និងគ្រោះថ្នាក់ដល់ពួកគេ ទ្រង់ជាអ្នកទទួលនូវការបួងសួងរបស់ពួកគេនៅពេលមានអាសន្នអន់ក្រ។ ទ្រង់មានអានុភាពលើពួកគេ ទ្រង់ជាអ្នកប្រទាន និងជាអ្នករារាំងផងដែរ។ ការបង្កើត

និងសេចក្តីបង្គាប់បញ្ជាទាំងឡាយជាកម្មសិទ្ធិរបស់ទ្រង់។ ដូចទ្រង់បានមានព្រះបន្ទូលអំពីព្រះអង្គឯងថា៖

﴿أَلَا لَهُ ٱلۡخَلۡقُ وَٱلۡأَمۡرُۗ تَبَارَكَ ٱللَّهُ رَبُّ ٱلۡعَٰلَمِينَ ٥٤﴾ سورة الأعراف / الآية: ٥٤

មានន័យថា៖ «តើមិនមែនទេឬសម្រាប់ទ្រង់គឺការបង្កើត និងការបង្គាប់បញ្ជា? អល់ឡោះមហាឧត្តុង្គឧត្តមជាព្រះជាម្ចាស់នៃសកលលោក»។

គេរាប់បញ្ចូលក្នុងជំនឿឯកទេវៈផងដែរគឺការជឿចំពោះព្រះលិខិតរបស់អល់ឡោះ ជឿថាអ្វីៗទាំងអស់ដែលកើតឡើងមានប្រភពចេញមកពីពុទ្ធិចំណេះដឹងរបស់ទ្រង់ ព្រះចេតនា អនុភាពរបស់ទ្រង់។ ពិតប្រាកដណាស់ ទ្រង់ដឹងដូច្នោះពីបុព្វ ទ្រង់បានលិខិតកំណត់ និងកត់ត្រាក្នុងបញ្ជីព្រះលិខិត។ អ្វីទាំងឡាយកើតឡើងតាមព្រះចេតនារបស់ទ្រង់ គ្មាននរណាម្នាក់នៃសត្វលោកអាចរួចផុតពីការលិខិតកំណត់របស់ទ្រង់បានឡើយ។

ម្យ៉ាងទៀតបានសេចក្តីថា ជំនឿឯកទេវៈគឺជាការទទួលស្គាល់ថាអល់ឡោះជាអ្នកធ្វើសកម្មភាពពេញលេញឥតដែនកំណត់ក្នុងចក្រវាលទាំងការបង្កើត ការចាត់ចែង ការបកស្រាយ ការសម្រួល ការបន្ថែម ការបន្ថយ ការបង្កើតឱ្យមានជីវិតរស់រាន ការដកយកជីវិត។ល។ គ្មាននរណាម្នាក់ចូលរួមជាមួយនឹងទ្រង់ ក្នុងការធ្វើសកម្មភាពទាំងនេះឡើយ។

ជាការពិតណាស គម្ពីរអាល់គួរអានបានបង្ហាញអំពីប្រភេទនៃជំនឿឯកទេវៈយ៉ាងច្បាស់ក្នុងគ្រប់ជំពូកទាំងអស់ស្ទើរតែគ្មានចន្លោះ

តាមរយៈការលើកឡើង ឬបង្ហាញប្រាប់។ បើប្រៀបនឹងប្រភេទផ្សេងទៀតវាជាគ្រឹះ ព្រោះអ្នកបង្កើត អ្នកគ្រប់គ្រង អ្នកចាត់ចែង ទ្រង់ជាព្រះតែមួយអង្គគត់ដែលសក្តិសមគេថ្វាយការគោរពសក្ការៈ សេចក្តីកោតខ្លាច និងការឱនលំទោន។ ទ្រង់តែមួយអង្គគត់សក្តិសមនឹងគេសរសើរដឹងគុណ សូត្រធម៌រំលឹក បួងសួង មានសេចក្តីសង្ឃឹម កោតខ្លាច។ល។ ...ការគោរពសក្ការៈជាទូទៅមិនអាចកើតឡើង មិនអាចអនុញ្ញាត លើកលែងតែចំពោះព្រះជាម្ចាស់ដែលមានសិទ្ធិបង្កើត និងបង្គាប់បញ្ជា។

ម្យ៉ាងវិញទៀត ព្រះជាអ្នកបង្កើត ជាអ្នកគ្រប់គ្រង ជាអ្នកចាត់ចែងទ្រង់ជាព្រះតែមួយអង្គគត់សក្តិសម និងទទួលនូវព្រះលក្ខណៈប្រពៃថ្លៃថ្លា និងសុក្រឹតពេញលេញ។ ពីព្រោះព្រះលក្ខណៈទាំងនេះមានតែចំពោះព្រះជាម្ចាស់នៃសកលលោកតែប៉ុណ្ណោះ មិនអាចកំណត់ភាពជាព្រះជាម្ចាស់ និងភាពមានអំណាចចំពោះវត្ថុដែលគ្មានជីវិត គ្មានសោតវិញ្ញាណ គ្មានចក្ខុ គ្មានអានុភាព មិនចេះស្រដី មិនអាចធ្វើអ្វីតាមចេតនារបស់ខ្លួន គ្មានភាពសុក្រឹតក្នុងការនិយាយ និងការធ្វើសកម្មភាពគ្រប់បែបយ៉ាង។

ដូច្នេះ យើងសង្កេតឃើញថា គម្ពីរអាល់គួរអានបានចែងអំពីជំនឿឯកទេវៈក្នុងបរិបទនៃការសរសើរសម្រាប់អល់ឡោះ ការគោរពសក្ការៈចំពោះទ្រង់ ការអនុវត្តតាមទ្រង់ និងការប្រគល់ខ្លួនជូនទ្រង់។ ម្យ៉ាងទៀតនៅក្នុងបរិបទនៃការបកស្រាយអំពីលក្ខណៈដ៏ថ្លៃថ្លា និងព្រះនាមដ៏ល្អប្រពៃរបស់ទ្រង់។

- ក្នុងបរិបទនៃការសរសើរ អ្នកមូស្លីមសូត្ររាល់ពេលថ្វាយបង្គំក្នុងរ៉ាកអាត់នីមួយៗថា៖

﴿ ٱلْحَمْدُ لِلَّهِ رَبِّ ٱلْعَٰلَمِينَ ﴿٢﴾ ﴾ سورة الفاتحة / الآية: ٢

មានន័យថា៖ «សេចក្តីសរសើរទាំងឡាយសម្រាប់អល់ឡោះជាម្ចាស់នៃសកលលោកទាំងមូល»។

ព្រះបន្ទូលរបស់ទ្រង់មួយទៀតថា៖

﴿ فَلِلَّهِ ٱلْحَمْدُ رَبِّ ٱلسَّمَٰوَٰتِ وَرَبِّ ٱلْأَرْضِ رَبِّ ٱلْعَٰلَمِينَ ﴿٣٦﴾ ﴾ سورة الجاثية / الآية: ٣٦

មានន័យថា៖ «សម្រាប់អល់ឡោះគឺសេចក្តីសរសើរទាំងឡាយទ្រង់ជាព្រះជាម្ចាស់មេឃ ជាម្ចាស់ផែនដី និងជាម្ចាស់សកលលោកទាំងមូល»។

- ក្នុងបរិបទនៃការប្រគល់ខ្លួន និងការឱនលំទោនចំពោះទ្រង់ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُلْ إِنَّ هُدَى ٱللَّهِ هُوَ ٱلْهُدَىٰ ۖ وَأُمِرْنَا لِنُسْلِمَ لِرَبِّ ٱلْعَٰلَمِينَ ﴿٧١﴾ ﴾
سورة الأنعام / الآية: ٧١

មានន័យថា៖ «មូហាំម៉ាត់ ចូរមានប្រសាសន៍ចុះថា ពិតប្រាកដ ការចង្អុលបង្ហាញរបស់អល់ឡោះជាការចង្អុលបង្ហាញដ៏ត្រឹមត្រូវ ហើយគេបង្គាប់ឱ្យយើងប្រគល់ខ្លួនជូនព្រះជាម្ចាស់នៃសកលលោកទាំងមូល »។

- ក្នុងបរិបទនៃការតម្រង់ឆ្ពោះ និងមានសទ្ធាជ្រះថ្លា។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُلْ إِنَّ صَلَاتِي وَنُسُكِي وَمَحْيَايَ وَمَمَاتِي لِلَّهِ رَبِّ الْعَالَمِينَ ﴿١٦٢﴾ ﴾

سورة الأنعام / الآية: ١٦٢

មានន័យថា៖ «មូហាំម៉ាត់ចូរមានប្រសាសន៍ចុះថា ពិតប្រាកដការថ្វាយបង្គំរបស់ខ្ញុំ ការគោរពសក្ការៈរបស់ខ្ញុំ ជីវិតរបស់ខ្ញុំ សេចក្តីស្លាប់របស់ខ្ញុំសម្រាប់អល់ឡោះជាម្ចាស់នៃសកលលោកទាំងមូល»។

- ក្នុងបរិបទនៃការទទួលអល់ឡោះជាម្ចាស់គ្មានម្ចាស់ផ្សេងក្រៅពីព្រះអង្គ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُلْ أَغَيْرَ اللَّهِ أَتَّخِذُ وَلِيًّا فَاطِرِ السَّمَاوَاتِ وَالْأَرْضِ وَهُوَ يُطْعِمُ وَلَا يُطْعَمُ ۗ قُلْ إِنِّي أُمِرْتُ أَنْ أَكُونَ أَوَّلَ مَنْ أَسْلَمَ ۖ وَلَا تَكُونَنَّ مِنَ الْمُشْرِكِينَ ﴿١٤﴾ ﴾

سورة الأنعام / الآية: ١٤

មានន័យថា៖ «មូហាំម៉ាត់ចូរមានប្រសាសន៍ចុះថា តើខ្ញុំយកអ្នកផ្សេងពីអល់ឡោះធ្វើជាម្ចាស់ឬ? ទ្រង់ជាអ្នកបង្កើតមេឃ និងផែនដី ទ្រង់ផ្តល់ចំណីអាហារ ហើយទ្រង់មិនត្រូវការចំណីអាហារពីគេទេ។ មូហាំម៉ាត់ចូរមានប្រសាសន៍ចុះថា គេប្រើឱ្យខ្ញុំក្លាយជាអ្នកកាន់សាសនាឥស្លាមមុនដំបូងគេបង្អស់ ហើយចូរកុំក្លាយទៅជាពួកអ្នកដែលគោរពពហុទេពឱ្យសោះ»។

- ក្នុងបរិបទនៃការបួងសួងសុំពីអល់ឡោះជាម្ចាស់។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ أَلَا لَهُ ٱلْخَلْقُ وَٱلْأَمْرُ تَبَارَكَ ٱللَّهُ رَبُّ ٱلْعَالَمِينَ ﴿٥٤﴾ ٱدْعُوا۟ رَبَّكُمْ تَضَرُّعًا وَخُفْيَةً إِنَّهُۥ لَا يُحِبُّ ٱلْمُعْتَدِينَ ﴿٥٥﴾ ﴾ سورة الأعراف / الآية: ٥٤ - ٥٥

មានន័យថា៖ «តើមិនមែនទេឬការបង្កើត និងការបង្គាប់ប្រើជាកម្មសិទ្ធិរបស់ទ្រង់? អល់ឡោះមហាបវរទ្រង់ជាព្រះជាម្ចាស់នៃសកលលោកទាំងមូល។ ចូរបួងសួងចុះចំពោះព្រះជាម្ចាស់របស់ពួកអ្នក ដោយការទទូចអង្វរករ។ ពិតប្រាកដណាស់ទ្រង់មិនសព្វព្រះទ័យចំពោះពួកអ្នក ដែលរំលោភបំពាននោះឡើយ»។

- ក្នុងបរិបទនៃការគោរពសក្ការៈចំពោះអល់ឡោះ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَمَا لِىَ لَآ أَعْبُدُ ٱلَّذِى فَطَرَنِى وَإِلَيْهِ تُرْجَعُونَ ﴿٢٢﴾ ﴾ سورة يس / الآية: ٢٢

មានន័យថា៖ «រឿងអ្វី ខ្ញុំមិនគោរពសក្ការៈចំពោះព្រះដែលបានបង្កើតខ្ញុំ ហើយចំពោះទ្រង់ដែលពួកអ្នកនឹងវិលត្រឡប់»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ يَـٰٓأَيُّهَا ٱلنَّاسُ ٱعْبُدُوا۟ رَبَّكُمُ ٱلَّذِى خَلَقَكُمْ وَٱلَّذِينَ مِن قَبْلِكُمْ لَعَلَّكُمْ تَتَّقُونَ ﴿٢١﴾ ٱلَّذِى جَعَلَ لَكُمُ ٱلْأَرْضَ فِرَٰشًا وَٱلسَّمَآءَ بِنَآءً وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءً فَأَخْرَجَ بِهِۦ مِنَ ٱلثَّمَرَٰتِ رِزْقًا لَّكُمْ فَلَا تَجْعَلُوا۟ لِلَّهِ أَندَادًا وَأَنتُمْ تَعْلَمُونَ ﴿٢٢﴾ ﴾

سورة البقرة / الآية: ٢١ - ٢٢

មានន័យថា៖ «ម្នាលមនុស្សទាំងឡាយចូរគោរពសក្ការៈចុះចំពោះព្រះជាម្ចាស់របស់ពួកអ្នកដែលបានបង្កើតពួកអ្នក

និងមនុស្សជំនាន់មុនពួកអ្នក សង្ឃឹមថា ពួកអ្នកនឹងកោតខ្លាច។ ព្រះជាម្ចាស់ទ្រង់បានបង្កើតផែនដីរាបស្មើសម្រាប់ពួកអ្នក ហើយបង្កើតមេឃជាសំណង់ដ៏រឹងមាំ ទ្រង់បានប្រទានទឹកភ្លៀងធ្លាក់ពីលើមេឃ។ បន្ទាប់មកទ្រង់ធ្វើឱ្យកើតផលានុផលដោយសារទឹកភ្លៀងនោះជាអាហារសម្រាប់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកកុំបង្កើតសម្រាប់អល់ឡោះនូវដៃគូក្នុងការគោរពសក្ការៈ ខណៈដែលពួកអ្នកដឹងច្បាស់ថា មានទ្រង់តែមួយអង្គគត់ដែលជាអ្នកបង្កើត និងជាអ្នកផ្តល់អាហារសម្រាប់ទ្រទ្រង់ជីវិតរបស់ពួកអ្នក»។

ជឿថាមានព្រះតែមួយពុំទាន់គ្រប់គ្រាន់ក្នុងការចូលឥស្លាមឡើយ ដូចមានក្នុងសេចក្តីបញ្ជាក់ខាងក្រោម៖

ដូចជាព្រះបន្ទូលរបស់ទ្រង់បង្គាប់ចំពោះអ្នកនាំសារឱ្យសួរសាសន៍របស់គាត់នៅពេលដែលពួកគេបានបដិសេធ មិនព្រមសូត្រពាក្យ (لا إله إلا الله)មានន័យថា គ្មានព្រះដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដ លើកលែងតែអល់ឡោះចូរសួរពួកគេថា តើអ្នកណាជាអ្នកគ្រប់គ្រង ជាអ្នកបង្កើត ជាអ្នកផ្តល់អាហារ? ពួកគេឆ្លើយថា អល់ឡោះ។ ពួកគេទទួលស្គាល់ថាមានអល់ឡោះ ជាអ្នកបង្កើតសត្វលោក និងជាអ្នកផ្តល់លាភសក្ការៈដល់ពួកគេ។ ពួកគេទទួលស្គាល់អានុភាពរបស់ទ្រង់ក្នុងការចាត់ចែងក្រឹត្យក្រម ប៉ុន្តែនៅពេលដែលគេប្រើឲ្យថ្វាយការគោរពសក្ការៈចំពោះទ្រង់ ពួកគេបែរជាបដិសេធ ហើយប្រកែកទៅវិញ។ ពួកគេនិយាយថា៖

﴿ أَجَعَلَ ٱلۡأٓلِهَةَ إِلَٰهٗا وَٰحِدًاۖ إِنَّ هَٰذَا لَشَيۡءٌ عُجَابٞ ٥ ﴾ سورة ص / الآية: ٥

មានន័យថា៖ «តើគេយកព្រះជាច្រើនបង្កើតជាព្រះតែមួយឬ? ពិតប្រាកដ នេះជារឿងដែលគួរឱ្យចម្លែកជាទីបំផុត»។

នៅពេលដែលពួកគេបដិសេធចំពោះការគោរពសក្ការៈ ពួកគេមិនបានក្លាយជាអ្នកចូលឥស្លាមនោះទេ ថ្វីបើទាំងនោះជាសកម្មភាពរបស់អល់ឡោះ ពីព្រោះសកម្មភាពរបស់ទ្រង់គ្មាននរណាអាចលូកដៃបានឡើយ។ ប៉ុន្តែអ្វីដែលគេទាមទារចង់បានគឺឱ្យពួកគេបំពេញតាមវត្ថុបំណងដែលគេបង្កើតពួកគេមក។ ពីព្រោះអល់ឡោះជាម្ចាស់បានផ្តល់សិទ្ធិសេរីភាពចំពោះទង្វើសកម្មភាពរបស់មនុស្សតាមចេតនាជម្រើសរបស់ពួកគេបន្ទាប់ពីព្រះចេតនារបស់ទ្រង់។ រីឯការបង្កើតសត្វលោកគ្មានអ្វីគួរឱ្យបដិសេធនោះឡើយ។ រហូតដល់ការបង្កើតពួកគេឱ្យកើតជាមនុស្សគឺកើតដោយបង្ខំពុំមែនជាជម្រើសរបស់ពួកគេនោះឡើយ។ ទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَمَا خَلَقۡتُ ٱلۡجِنَّ وَٱلۡإِنسَ إِلَّا لِيَعۡبُدُونِ ٥٦ ﴾ سورة الذاريات / الآية: ٥٦

មានន័យថា៖ «យើងពុំបានបង្កើតមនុស្សនិងជិន លើកលែងតែដើម្បីឱ្យពួកគេគោរពសក្ការៈចំពោះយើង»។

សកម្មភាពដំបូងបង្អស់ គឺជាសកម្មភាពរបស់ទ្រង់ ហើយគេទាមទារពីពួកគេនូវសកម្មភាពទីពីរ គឺការគោរពសក្ការៈចំពោះទ្រង់ ក៏ដូចជាអល់ឡោះទ្រង់បានបង្គាប់យ៉ាងដូច្នេះក្នុងព្រះបន្ទូលជាច្រើន។ ការគោរពសក្ការៈចំពោះអល់ឡោះគឺ អនុវត្តតាមការបង្គាប់ប្រើរបស់ទ្រង់

ហើយបោះបង់ចោលនូវការធ្វើសក្ការៈដែលល្មើសនឹងព្រះជាម្ចាស់ដែលជាអ្នកបង្កើតពួកគេ។ តាមរយៈការបកស្រាយដ៏សង្ខេបខ្លីនេះបង្ហាញឱ្យឃើញថា អត្ថន័យនៃពាក្យ(لا إله إلا الله)មានន័យថា (គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដនោះទេ លើកលែងតែអល់ឡោះ) គឺគ្មានព្រះដែលត្រូវគេគោរពយ៉ាងពិតប្រាកដនោះលើកលែងតែអល់ឡោះ ហើយនេះជាការបកស្រាយដែលច្បាស់លាស់ជាងគេ។ ភ្ជាប់បញ្ញត្តិ *ការគោរពសក្ការៈ* និងពាក្យ *យ៉ាងពិតប្រាកដ* មានន័យថា រាល់ការគោរពសក្ការៈទាំងឡាយថ្វាយជូនក្រៅពីអល់ឡោះជាការគោរពសក្ការៈដែលអសារបង់។

**ភស្តុតាងមួយចំនួនដែលបញ្ជាក់ថាគ្រាន់តែជឿចំពោះអល់ឡោះជាព្រះតែមួយមិនទាន់ចូលឥស្លាមនៅឡើយទេ៖**

អ្នកនាំសារបានធ្វើសង្គ្រាមជាមួយនឹងពួកអ្នកគ្មានជំនឿនៃអារ៉ាប់គូរេស្សដោយសារពួកគេជំទាស់នឹងអានុភាពរបស់អល់ឡោះ និងការបង្កើតរបស់ទ្រង់ចំពោះសត្វលោកទាំងឡាយ។ ទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُل لِّمَنِ ٱلۡأَرۡضُ وَمَن فِيهَآ إِن كُنتُمۡ تَعۡلَمُونَ ﴿٨٤﴾ سَيَقُولُونَ لِلَّهِۚ قُلۡ أَفَلَا تَذَكَّرُونَ ﴿٨٥﴾ قُلۡ مَن رَّبُّ ٱلسَّمَٰوَٰتِ ٱلسَّبۡعِ وَرَبُّ ٱلۡعَرۡشِ ٱلۡعَظِيمِ ﴿٨٦﴾ سَيَقُولُونَ لِلَّهِۚ قُلۡ أَفَلَا تَتَّقُونَ ﴿٨٧﴾ قُلۡ مَنۢ بِيَدِهِۦ مَلَكُوتُ كُلِّ شَيۡءٖ

وَهُوَ يُجِيرُ وَلَا يُجَارُ عَلَيْهِ إِن كُنتُمْ تَعْلَمُونَ ﴿٨٨﴾ سَيَقُولُونَ لِلَّهِ ۚ قُلْ فَأَنَّىٰ تُسْحَرُونَ ﴿٨٩﴾ ﴾ سورة المؤمنون / الآية: ٨٤ - ٨٩

មានន័យថា៖ «មូហាំម៉ាត់ចូរអ្នកសួរពួកគេថា តើនរណាជាម្ចាស់ផែនដី និងជាម្ចាស់នៃអ្នកនៅលើផែនដី បើសិនជាពួកអ្នកដឹងច្បាស់? ពួកគេនឹងឆ្លើយថា សម្រាប់អល់ឡោះ។ តើនរណាជាម្ចាស់នៃមេឃទាំងប្រាំពីរជាន់និងជាម្ចាស់នៃរាជបល្ល័ង្គដ៏មហាសាល? ពួកគេនឹងឆ្លើយថា ជាកម្មសិទ្ធិរបស់អល់ឡោះជាម្ចាស់តែមួយគត់។ ចូរសួរពួកគេថា តើពួកអ្នកមិនខ្លាចទ្រង់ទេឬ? ចូរសួរពួកគេថា តើនរណាជាអ្នកគ្រប់គ្រង់អ្វីគ្រប់យ៉ាង អាចការពារ ហើយគ្មាននរណាអាចទប់ទល់បាន បើសិនជាពួកអ្នកពិតជាមានចំណេះដឹងពិតប្រាកដមែននោះ? ពួកគេនឹងឆ្លើយថា សម្រាប់អល់ឡោះ។ ចូរសួរពួកគេថា ចុះហេតុអ្វីបានជាពួកអ្នកងាកចេញមិនព្រមមានជំនឿចំពោះទ្រង់?»។

ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَلَئِن سَأَلْتَهُم مَّنْ خَلَقَ السَّمَاوَاتِ وَالْأَرْضَ لَيَقُولُنَّ خَلَقَهُنَّ الْعَزِيزُ الْعَلِيمُ ﴿٩﴾ ﴾ سورة الزخرف / الآية: ٩

មានន័យថា៖ «បើសិនជាឯងសួរពួកគេថា តើនរណាជាអ្នកបង្កើតមេឃទាំងប្រាំពីរជាន់ និងផែនដី? ពួកគេនឹងឆ្លើយថា អ្នកដែលបានបង្កើតគឺព្រះជាម្ចាស់ដ៏មហាខ្លាំង មហាដឹង»។

រំលឹកអំពីការស្តីបន្ទោសចំពោះការងាកចេញរបស់គេគ្មានអ្វីក្រៅពីការបោះបង់ការគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់នោះឡើយ។

បើសិនជាគ្រាន់តែទទួលស្គាល់ពីអានុភាពរបស់អល់ឡោះ ក្លាយជាឥស្លាមនោះ ពួកគេនឹងក្លាយជាពួកអ្នកកោតខ្លាច បេះភ្ជាក់រលឹក មិនគួរណាត្រូវគេស្តីបន្ទោសដោយសារពួកគេគ្មានភាពកោតខ្លាច និងគ្មានភាពភ្ញាក់រលឹកនៅក្នុងខ្លួន ហើយត្រូវគេឱ្យឈ្មោះថាជាមនុស្សកុហកបោកប្រាស់។ ដូចទ្រង់បានមានព្រះបន្ទូលថាៈ

﴿ وَلَئِن سَأَلْتَهُم مَّنْ خَلَقَ السَّمَاوَاتِ وَالْأَرْضَ وَسَخَّرَ الشَّمْسَ وَالْقَمَرَ لَيَقُولُنَّ اللَّهُ ۖ فَأَنَّىٰ يُؤْفَكُونَ ﴿٦١﴾ ﴾ سورة العنكبوت / الآية: ٦١

មានន័យថាៈ«បើសិនជាឯងសួរពួកគេថា តើនរណាជាអ្នកបង្កើតមេឃទាំងប្រាំពីរជាន់និងផែនដី? ពួកគេនឹងឆ្លើយថា អល់ឡោះជាម្ចាស់ ចុះហេតុអ្វីបានជាពួកគេបដិសេធពុំព្រមទទួលស្គាល់»។

(ស្រង់ចេញពីសៀវភៅសំណួរចម្លើយក្នុងគោលជំនឿឥស្លាម)។

## តៅហេទអ៊ូលូហីយ៉ះ (ការគោរពសក្ការៈចំពោះទ្រង់តែមួយគត់)

**អត្ថន័យរួមគឺ** ត្រូវមានជំនឿយ៉ាងមុតមាំថា អល់ឡោះគឺជាព្រះជាម្ចាស់ដ៏ពិតប្រាកដ គ្មានម្ចាស់ផ្សេងក្រៅពីទ្រង់ ហើយទ្រង់តែមួយដែលត្រូវគេគោរពសក្ការៈ។

**អត្ថន័យពិស្តារ៖**

ពិតណាស់ព្រះគឺជាអ្នកដែលគេត្រូវគោរពសក្ការៈ។ ការគោរពសក្ការៈក្នុងភាសាគឺ ការប្រតិបត្តិតាមឱនលំទោន និងបន្ទាបខ្លួន។ សាសនវិទូខ្លះបានឱ្យនិយមន័យថា ការស្រលាញ់ស៊ប់ ព្រមជាមួយនឹងការបន្ទាបខ្លួនយ៉ាងពេញលេញ។

ជំនឿនៃការគោរពសក្ការៈចំពោះព្រះតែមួយអាស្រ័យលើភាពជ្រះស្អាតនៃការគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់ទាំងផ្លូវចិត្ត និងផ្លូវកាយដោយគ្មានការធ្វើសក្ការៈដល់អ្នកផ្សេងក្រៅពីទ្រង់។ អ្នកដែលជឿចំពោះអល់ឡោះគឺគោរពសក្ការៈចំពោះទ្រង់តែមួយគត់ មិនគោរពសក្ការៈអ្នកផ្សេងក្រៅពីទ្រង់ ស្រលាញ់អល់ឡោះដោយចិត្តជ្រះថ្លា ការកោតខ្លាច សេចក្តីសង្ឃឹម ការបួងសួង ការរំពឹងជឿទុកចិត្ត ការគោរពប្រតិបត្តិ ការឱនលំទោន ការបន្ទាបខ្លួន គ្រប់ប្រភេទ ហើយនិងគ្រប់រូបភាពនៃការគោរពសក្ការៈទាំងឡាយ។

ជំនឿនេះ រាប់បញ្ចូលទាំងប្រភេទនៃជំនឿផ្សេងទៀត។ មានទាំងជំនឿក្នុងភាពជាព្រះជាម្ចាស់តែមួយរបស់ទ្រង់ និងជំនឿលើព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់ តែមិនអាចផ្ទុយមកវិញឡើយ។ ពិតប្រាកដការជឿថាអល់ឡោះជាព្រះជាម្ចាស់តែមួយ ពុំមែនមានន័យថា គេមានជំនឿលើការគោរពសក្ការៈចំពោះទ្រង់តែមួយនោះឡើយ។ គេគ្រាន់តែទទួលស្គាល់ភាពជាព្រះជាម្ចាស់របស់ទ្រង់តែប៉ុណ្ណោះ។ គេមិនបានគោរពសក្ការៈចំពោះទ្រង់តែមួយនោះឡើយ។ ក៏ដូចគ្នាដែរ ជំនឿលើ

ព្រះនាម និងលក្ខណសម្បត្តិរបស់ទ្រង់មិនរួមបញ្ចូលទាំងប្រភេទជំនឿផ្សេងទៀតនោះឡើយ។ ក៏ប៉ុន្តែបុគ្គលដែលមានជំនឿលើការគោរពសក្ការៈចំពោះអល់ឡោះតែមួយ គឺគេទទួលស្គាល់ថា ទ្រង់តែមួយអង្គគត់សក្តិសមនឹងត្រូវគេគោរពសក្ការៈ ហើយអ្នកផ្សេងក្រៅពីទ្រង់មិនសក្តិសមនោះឡើយ។ គេទទួលស្គាល់ថា ទ្រង់ជាព្រះជាម្ចាស់នៃសកលលោក ទ្រង់មានព្រះនាមដ៏ប្រពៃ និងព្រះលក្ខណសម្បត្តិដ៏ប្រសើរថ្លៃថ្លា។ ពីព្រោះការថ្វាយសេចក្តីគោរពសក្ការៈដោយសទ្ធាជ្រះថ្លាមិនអាចថ្វាយជូនអ្នកផ្សេងក្រៅពីព្រះជាម្ចាស់ ហើយក៏មិនអាចថ្វាយជូនអ្នកដែលមិនពេញលក្ខណៈនោះដែរ។ តើគេអាចគោរពសក្ការៈអ្នកដែលមិនចេះបង្កើត មិនចេះចាត់ចែងក្នុងការបង្កើតយ៉ាងដូចម្តេច? តើគេគោរពសក្ការៈអ្នកខ្វះលក្ខណៈយ៉ាងដូចម្តេច?

ក្នុងន័យនេះពាក្យ (لا إله إلا الله) គ្របដណ្តប់លើប្រភេទជំនឿទាំងមូលគឺជឿថា អល់ឡោះតែមួយដែលគេត្រូវគោរពសក្ការៈ គ្របដណ្តប់ទាំងជំនឿដែលទទួលស្គាល់ភាពជាព្រះជាម្ចាស់តែមួយគត់របស់ទ្រង់ និងជំនឿចំពោះព្រះនាម និងព្រះលក្ខណសម្បត្តិរបស់ទ្រង់។

ព្រោះតែហេតុនេះ ជំនឿនៃការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់ជាចំណុចដំបូង និងចុងក្រោយបង្អស់នៃសាសនា ជាខ្លឹមសារទាំងស្រុងនៃសាសនា ទាំងខាងក្រៅ និងខាងក្នុង ព្រោះតែជំនឿនេះទើបគេបង្កើតសត្វលោក ដូចអល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَمَا خَلَقْتُ ٱلْجِنَّ وَٱلْإِنسَ إِلَّا لِيَعْبُدُونِ ﴿٥٦﴾ ﴾ سورة الذاريات / الآية: ٥٦

មានន័យថា៖ «យើងពុំបានបង្កើតមនុស្សនិងជិនលើកលែងតែដើម្បីឱ្យពួកគេគោរពសក្ការៈចំពោះយើង»។

លោកអ៊ីមុាំ អិពនូតៃមិយ៉ះបានពោលថា ជំនឿនៃការគោរពសក្ការៈនេះជាអ្នកបែងចែករវាងអ្នកជឿលើព្រះតែមួយ និងអ្នកជឿលើពហុទេព។ អាស្រ័យលើជំនឿនេះផងដែរ កើតមាននូវការតបស្នង និងផលបុណ្យទាំងនៅលោកីយ៍និងបរលោក។ ដូច្នេះ នរណាមិនប្រតិបត្តិតាមជំនឿនេះគឺនឹងក្លាយជាអ្នកជឿលើពហុទេព។

ដោយហេតុនៃជំនឿនេះ ទើបគេបញ្ជូនពួកអ្នកនាំសារ គេបញ្ចុះព្រះគម្ពីរ គ្មានអ្នកនាំសារណាម្នាក់ដែលព្រះបញ្ជូនមកកាន់មនុស្សលោក លើកលែងតែជំនឿនៃការគោរពសក្ការៈជាមូលដ្ឋាន និងជាវត្ថុវិស័យដ៏សំខាន់ក្នុងការអំពាវនាវរបស់គាត់។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ وَلَقَدْ بَعَثْنَا فِي كُلِّ أُمَّةٍ رَّسُولًا أَنِ اعْبُدُوا اللَّهَ وَاجْتَنِبُوا الطَّاغُوتَ ﴾
سورة النحل / الآية: ٣٦

មានន័យថា៖ «ពិតប្រាកដ យើងបានបញ្ជូនមកកាន់រាល់ប្រជាជាតិនីមួយៗនូវអ្នកនាំសារម្នាក់ បង្គាប់ប្រើឱ្យប្រជាជាតិនោះគោរពសក្ការៈចំពោះអល់ឡោះ និងជៀសវាងពីការគោរពសក្ការៈអ្វីផ្សេងពីទ្រង់»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَمَا أَرْسَلْنَا مِن قَبْلِكَ مِن رَّسُولٍ إِلَّا نُوحِي إِلَيْهِ أَنَّهُ لَا إِلَٰهَ إِلَّا أَنَا فَاعْبُدُونِ ﴿٢٥﴾ ﴾ سورة الأنبياء / الآية: ٢٥

មានន័យថា៖ «យើងពុំបានបញ្ជូនមុនឯងនូវអ្នកនាំសារ លើកលែងតែយើងត្រាស់បន្ទូលចំពោះគេថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពយ៉ាងពិតប្រាកដលើកលែងតែយើង ចូរគោរពសក្ការៈចុះមកចំពោះយើង»។

អល់ឡោះជាម្ចាស់បានប្រាប់ពីពួកអ្នកនាំសាររបស់ទ្រង់ ណួហ ហ៊ូទ សឡេះ ស៊ូអែប ពួកគេទាំងអស់បាននិយាយទៅកាន់សាសន៍របស់ខ្លួនថា៖

﴿ٱعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓ﴾ ( الأعراف: ٥٩ ، هود ٦١، المؤمنون ٢٣ )

មានន័យថា៖ «ចូរគោរពសក្ការៈចុះចំពោះអល់ឡោះ សម្រាប់ពួកអ្នកគ្មានព្រះណាផ្សេងក្រៅពីទ្រង់ឡើយ»។

ជំនឿនៃការគោរពសក្ការៈ ចាំបាច់ត្រូវតម្រង់ការគោរពសក្ការៈគ្រប់ប្រភេទ និងគ្រប់រូបភាពទាំងអស់ចំពោះទ្រង់ ត្រូវជម្រះសម្អាតចិត្តរបស់យើងក្នុងការគោរពសក្ការៈជាផ្នែកមួយផ្សេងទៀត ស្ដែងឡើងក្នុងកិច្ចការជាច្រើនដូចតទៅ:

១- ចាំបាច់ត្រូវតែមានចិត្តជ្រះថ្លាក្នុងការស្រលាញ់អល់ឡោះ បុគ្គលមូស្លីមពុំត្រូវយកដៃគូសម្រាប់អល់ឡោះ ក្នុងការស្រលាញ់អ្នកនោះដូចស្រលាញ់អល់ឡោះ មិនត្រូវស្រលាញ់អ្នកនោះខ្លាំងជាងស្រលាញ់អល់ឡោះ។ ចំពោះនរណាដែលប្រព្រឹត្តដូច្នេះគឺ នឹងក្លាយជាអ្នកគោរពពហុទេព។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ وَمِنَ ٱلنَّاسِ مَن يَتَّخِذُ مِن دُونِ ٱللَّهِ أَندَادًا يُحِبُّونَهُمْ كَحُبِّ ٱللَّهِ ۖ وَٱلَّذِينَ ءَامَنُوٓا۟ أَشَدُّ حُبًّا لِّلَّهِ ﴾ سورة البقرة / الآية: ١٦٥

មានន័យថា៖ «មនុស្សមួយចំនួនបានយកអ្នកផ្សេងក្រៅអំពីអល់ឡោះធ្វើជាដៃគូ ស្រលាញ់ពួកគេដូចជាស្រលាញ់អល់ឡោះ ហើយពួកអ្នកដែលមានជំនឿស្រលាញ់អល់ឡោះខ្លាំងលើសអ្វីៗទាំងអស់»។ នេះគេចាត់ទុកជាអំពើគោរពពហុទេពកម្រិតធ្ងន់អល់ឡោះទ្រង់មិនលើកលែងទោសជាដាច់ខាត លើកលែងតែបុគ្គលនោះសារភាពកំហុសនិងកែប្រែខ្លួន។ អំពើពហុទេពនេះមានដូចជា បុគ្គលម្នាក់យកអ្នកផ្សេងក្រៅពីអល់ឡោះជាដៃគូសម្រាប់ទ្រង់ ស្រលាញ់អ្នកនោះឬវត្ថុនោះដូចជាស្រលាញ់អល់ឡោះ។

២- ចាំបាច់ត្រូវតែថ្វាយជូនទ្រង់តែមួយគត់នូវរាល់ការបួងសួង ការរំពឹងជឿទុកចិត្ត និងសង្ឃឹមចំពោះអ្វីដែលគ្មាននរណាម្នាក់អាចធ្វើបានលើកលែងតែទ្រង់។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَلَا تَدْعُ مِن دُونِ ٱللَّهِ مَا لَا يَنفَعُكَ وَلَا يَضُرُّكَ ۖ فَإِن فَعَلْتَ فَإِنَّكَ إِذًا مِّنَ ٱلظَّٰلِمِينَ ﴿١٠٦﴾ ﴾ سورة يونس / الآية: ١٠٦

មានន័យថា៖ «ចូរកុំបួងសួងសុំក្រៅពីអល់ឡោះ ដែលពុំផ្តល់ប្រយោជន៍ ហើយក៏មិនបង្កគ្រោះថ្នាក់ដល់អ្នក បើសិនជាអ្នកធ្វើដូច្នោះមែន ពិតណាស់អ្នកនឹងក្លាយជាមនុស្សអគតិ»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَعَلَى ٱللَّهِ فَتَوَكَّلُوٓاْ إِن كُنتُم مُّؤۡمِنِينَ ٢٣ ﴾ سورة المائدة / الآية: ٢٣

មានន័យថា៖ «ចូររំពឹងជឿទុកចិត្តចុះចំពោះអល់ឡោះ បើសិនជាពួកអ្នកពិតជាមានជំនឿប្រាកដមែននោះ»។ ទ្រង់បានបន្ទូលទៀតថា៖

﴿ إِنَّ ٱلَّذِينَ ءَامَنُواْ وَٱلَّذِينَ هَاجَرُواْ وَجَٰهَدُواْ فِي سَبِيلِ ٱللَّهِ أُوْلَٰٓئِكَ يَرۡجُونَ رَحۡمَتَ ٱللَّهِۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ٢١٨ ﴾ سورة البقرة / الآية: ٢١٨

មានន័យថា៖ «ពិតប្រាកដ ពួកអ្នកដែលមានជំនឿ និងពួកអ្នកដែលបានតស៊ូក្នុងផ្លូវអល់ឡោះ ពួកគេទាំងនោះសង្ឃឹមចំពោះក្ដីមេត្តាករុណារបស់អល់ឡោះ។ អល់ឡោះទ្រង់មហាអភ័យ មហាមេត្តា»។

៣- ចាំបាច់ត្រូវប្រតិបត្តិជូនចំពោះអល់ឡោះតែមួយគត់នូវសេចក្ដីកោតខ្លាច។ នរណាជឿថាសភាវៈមួយចំនួន អាចបង្កគ្រោះថ្នាក់តាមចេតនា និងអំណាចរបស់ខ្លួន ហើយខ្លាចចំពោះសភាវៈនោះ បានសេចក្ដីថា គេក្លាយជាអ្នកគោរពពហុទេពនឹងអល់ឡោះជាម្ចាស់។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ فَإِيَّٰيَ فَٱرۡهَبُونِ ٥١ ﴾ سورة النحل / الآية: ٥١

មានន័យថា៖ «ចូរខ្លាចចុះចំពោះយើង»។

នេះជាចំណងទាក់ទងរវាងការខ្លាចបែបការគោរពសក្ការៈ និងខ្លាចបែបនិស្ស័យពីកំណើត។ ខ្លាចទីមួយគេមិនអនុញ្ញាតទេ លើកលែងតែចំពោះអល់ឡោះ។ ខ្លាចទីពីរដូចជាខ្លាចសត្វសាហាវ មនុស្សសាហាវ ខ្លាចបែបនេះអត់មានកំហុស ឬមានបាបកម្មឡើយ។

ជំនឿនៃការគោរពសក្ការៈចំពោះព្រះតែមួយ បានសេចក្តីថា នរណាពោលពាក្យ (لا إله إلا الله محمد رسول الله) និងបានប្រតិបត្តិចំពោះអល់ឡោះតែមួយគត់នូវរាល់ការគោរពសក្ការៈទាំងឡាយតាមអ្វីដែលអ្នកនាំសាររបស់ទ្រង់បានបញ្ញត្តិជាច្បាប់។ ជំនឿនេះក៏រួមបញ្ចូលទាំងជំនឿនៃភាពជាព្រះជាម្ចាស់តែមួយរបស់ទ្រង់ បានសេចក្តីថា រាល់ការគោរពសក្ការៈទាំងអស់មិនកើតចេញពីបញ្ញាការគិតនោះឡើយ។ ដូច្នេះនរណាគោរពសក្ការៈចំពោះអល់ឡោះ ចាំបាច់ត្រូវតែទទួលស្គាល់វត្តមានរបស់ទ្រង់ និងអានុភាពរបស់ទ្រង់។

ក៏ដូចគ្នាដែរជំនឿលើព្រះនាម និងព្រះលក្ខណៈ។ ពិតប្រាកដសម្រាប់អល់ឡោះជាម្ចាស់ទ្រង់មានព្រះនាមដ៏ប្រពៃថ្លៃថ្លា និងមានព្រះលក្ខណៈដ៏ឧត្តុង្គឧត្តម។ យើងពណ៌នាព្រះលក្ខណៈរបស់ទ្រង់តាមអ្វីដែលទ្រង់បានប្រសិទ្ធនាមដោយព្រះអង្គឯង និងតាមអ្វីដែលអ្នកនាំសាររបស់ទ្រង់បានប្រសិទ្ធនាម ដោយគ្មានការងឿងឆ្ងល់ថាដូចម្តេច គ្មានការប្រៀបប្រដូច។ ដូចអល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿لَيۡسَ كَمِثۡلِهِۦ شَيۡءٞۖ وَهُوَ ٱلسَّمِيعُ ٱلۡبَصِيرُ ١١﴾ سورة الشورى / الآية: ١١

មានន័យថា៖ «គ្មានអ្វីដូចទ្រង់ ហើយទ្រង់មហាឮមហាឃើញ»។ ពួកសាសនវិទូបានពោលថា៖ ពាក្យសច្ចា (لا إله إلا الله) គ្របដណ្តប់លើជំនឿនៃភាពជាព្រះជាម្ចាស់ ការគោរពសក្ការៈ និងជឿលើព្រះនាម

និងព្រះលក្ខណៈរបស់ទ្រង់។ (សូមអានសៀវភៅសំណួរចម្លើយក្នុងគោលជំនឿឥស្លាម)។

## ជំនឿលើព្រះនាមនិងព្រះលក្ខណៈ

ខ្លឹមសារនៃជំនឿលើព្រះនាមនិងព្រះលក្ខណៈគឺជាជំនឿជាច់ខាតចំពោះសុក្រឹតភាពពេញលេញរបស់អល់ឡោះ និងព្រះលក្ខណៈរបស់ទ្រង់ដ៏មហាថ្លៃថ្លា ត្រូវទទួលស្គាល់នូវអ្វីដែលអល់ឡោះជាម្ចាស់បានកំណត់សម្រាប់ព្រះអង្គផ្ទាល់ និងបានកំណត់សម្រាប់ទ្រង់ដោយអ្នកនាំសាររបស់ទ្រង់នៃព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់។ ទទួលស្គាល់នាមសព្ទទាំងឡាយ និងអត្ថន័យនៃព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់ដោយគ្មានការកែប្រែផ្លាស់ប្តូរ និងគ្មានបដិសេធចោលទុកជាមោឃៈ គ្មានការងឿងឆ្ងល់ និងប្រៀបប្រដូច។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿لَيۡسَ كَمِثۡلِهِۦ شَيۡءٞۖ وَهُوَ ٱلسَّمِيعُ ٱلۡبَصِيرُ ١١﴾ سورة الشورى / الآية: ١١

មានន័យថា៖ «គ្មានអ្វីដូចទ្រង់ ហើយទ្រង់មហាលឺមហាឃើញ»។ ត្រូវបួងសួង និងទទូចអង្វរសុំតាមរយៈព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា៖

﴿وَلِلَّهِ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰ فَٱدۡعُوهُ بِهَا﴾ سورة الأعراف / الآية: ١٨٠

មានន័យថា៖ «សម្រាប់អល់ឡោះជាម្ចាស់មានព្រះនាមដ៏ប្រពៃ ចូរបួងសួងសុំទ្រង់ចុះតាមរយៈព្រះនាមទាំងនោះ»។ ទ្រង់បានមានបន្ទូលទៀតថា៖

﴿ قُلِ ٱدۡعُواْ ٱللَّهَ أَوِ ٱدۡعُواْ ٱلرَّحۡمَٰنَۖ أَيّٗا مَّا تَدۡعُواْ فَلَهُ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰ ﴾

سورة الإسراء / الآية: ١١٠

មានន័យថា៖ «មូហាំម៉ាត់ចូរមានប្រសាសន៍ចុះថា ចូរបួងសួងចំពោះអល់ឡោះ ឬបួងសួងចំពោះព្រះជាម្ចាស់ដ៏មហាមេត្តា ទោះជាពួកអ្នកបួងសួងសុំតាមរយៈព្រះនាមណាមួយក៏បានដែរ ព្រោះទ្រង់មានព្រះនាមដ៏ប្រពៃជាច្រើន»។

ជំនឿលើព្រះនាម និងព្រះលក្ខណៈមានន័យថា អល់ឡោះជាម្ចាស់ទ្រង់មានព្រះលក្ខណៈសុក្រឹតពេញលេញ ស្អាតស្អំពីលក្ខណៈខ្វះខាត ទ្រង់ឯកអង្គខុសពីសភាវសត្វលោកទាំងឡាយ។ ត្រូវទទួលស្គាល់តាមការទទួលស្គាល់របស់ទ្រង់ចំពោះព្រះអង្គឯង ឬតាមការទទួលស្គាល់របស់អ្នកនាំសាររបស់ទ្រង់នៃព្រះនាម និងព្រះលក្ខណៈដែលមានចែងក្នុងគម្ពីរ និងធម្មនិយម (ស៊ុណ្ណះ) ហើយត្រូវហៅត្រាប់តាមដូចដែលគេបានចែងជាបញ្ញត្តិ។

សេចក្តីដូចបានពន្យល់ខាងលើឃើញថា ជំនឿលើព្រះនាម និងព្រះលក្ខណៈឈរលើគោលការណ៍បី៖

១- ថ្វាយសេចក្តីស្អាតស្អំដល់អល់ឡោះទ្រង់ជ្រះស្អាតពីភាពដូច ឬស្រដៀងនឹងសភាវសត្វលោក ជ្រះស្អាតពីភាពខ្វះចន្លោះ។

២- ជឿលើព្រះនាម និងព្រះលក្ខណៈដែលមានចែងក្នុងគម្ពីរ និងធម្មនិយម គ្មានការល្មើសបំពាន ទោះដោយការកាត់បន្ថយ ឬការដាក់បន្ថែម គ្មានការកែប្រែ ឬបដិសេធចោលទុកជាមោឃៈ។

៣- កាត់ផ្តាច់មហិច្ឆតាចង់ដឹងពីទម្រង់នៃព្រះលក្ខណៈទាំងឡាយរបស់ទ្រង់។

គោលការណ៍ទី១៖ ថ្វាយសេចក្តីស្អាតស្អំដល់អល់ឡោះទ្រង់ជ្រះស្អាតពីភាពដូច ឬស្រដៀងនឹងសភាវសត្វលោក គោលការណ៍នេះមានព្រះបន្ទូលជាអំណះអំណាង។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ لَيۡسَ كَمِثۡلِهِۦ شَيۡءٞۖ ﴾ سورة الشورى / الآية: ١١

មានន័យថា៖ «គ្មានអ្វីដូចទ្រង់» ទ្រង់មានព្រះបន្ទូលទៀតថា៖

﴿ وَلَمۡ يَكُن لَّهُۥ كُفُوًا أَحَدُۢ ﴾ سورة الإخلاص / الآية: ٤

មានន័យថា៖ «គ្មាននរណាម្នាក់ប្រៀបស្មើនឹងទ្រង់ឡើយ»។

- លោកអ៊ីមុាំ អាល់គួរទូពីយ៍និយាយក្នុងសៀវភៅគម្ពីរអធិប្បាយរបស់លោកថា៖ «គ្មានអ្វីដូចទ្រង់» ក្នុងជំពូកនេះគេជឿថាអល់ឡោះជាម្ចាស់មហាឧត្តុង្គឧត្តម មហាមោទនៈ អំណាចរបស់ទ្រង់ដ៏ខ្លាំងក្លា ព្រះនាមរបស់ទ្រង់ដ៏ប្រពៃ ព្រះលក្ខណៈរបស់ទ្រង់ដ៏ខ្ពង់ខ្ពស់ ទ្រង់មិនដូចសភាវសត្វលោក ហើយសភាវសត្វលោកក៏មិនដូចព្រះអង្គដែរ។ អ្វីដែលច្បាប់ឥស្លាមបានកំណត់ហៅ*ព្រះជាម្ចាស់ជាអ្នកបង្កើត* (الخالق) និងពាក្យ *សត្វលោក* (المخلوق)គ្មានភាពដូចគ្នា រវាងបញ្ញត្តិទាំងពីរក្នុង

ន័យចំរបស់វា។ លក្ខណៈបុព្វរបស់ទ្រង់ខុសពីលក្ខណៈរបស់សភាវសត្វលោក។

លោក អាល់វ៉ាសុីទីយ៍បាននិយាយថាៈ គ្មានរូបកាយណាដូចព្រះកាយ ឬអត្តៈរបស់ទ្រង់ គ្មាននាមណាដូចព្រះនាមរបស់ទ្រង់ គ្មានទង្វើណាដូចទង្វើរបស់ទ្រង់ គ្មានលក្ខណៈណាដូចព្រះលក្ខណៈរបស់ទ្រង់ គ្រាន់តែមានសូរដូចគ្នាតែប៉ុណ្ណោះ។

អត្តៈពីបុព្វេមិនអាចមានលក្ខណៈកើតថ្មី ក៏គ្មានរូបកាយកើតថ្មីណាដែលមានលក្ខណៈបុព្វេ នេះជាជំនឿរបស់ក្រុមនិកាយ ដែលប្រកាន់ត្រូវតាមធម្មនិយម (ស៊ុណ្ណះ) និងឯកភាពសាសនា(អាល់ហ្ជម៉ាអះ)។

- សៃយិត គូតុប បាននិយាយក្នុងគម្ពីរអធិប្បាយរបស់លោកទាក់ទងនឹងព្រះបន្ទូលដែលបានលើកឡើងខាងលើថាៈ និស្ស័យពីកំណើតរបស់មនុស្សជឿចំពោះរឿងនេះដោយអព្ភន្តរញ្ញាណ ព្រះជាម្ចាស់ដែលជាអ្នកបង្កើតមិនដូចនឹងអ្វីដែលទ្រង់បានបង្កើតនោះឡើយ។

គោលការណ៍ទី២ៈចាំបាច់ត្រូវកំណត់ត្រឹមអ្វីដែលទ្រង់បានទទួលស្គាល់ព្រះនាម និងព្រះលក្ខណៈដែលមានចែងក្នុងគម្ពីរអាល់គួរអាន និងធម្មនិយមរបស់អ្នកនាំសារដែលមានពិត។ ស្វែងយល់តាមរយៈការស្ដាប់ ពុំមែនដោយការបញ្ចេញទស្សនៈមតិ មិនត្រូវប្រទានលក្ខណៈណាមួយដល់ទ្រង់លើកលែងតែតាមអ្វី ដែលទ្រង់បានប្រទានព្រះលក្ខណៈដោយព្រះអង្គឯង ឬប្រទានដោយអ្នកនាំសាររបស់ទ្រង់។

មិនត្រូវប្រសិទ្ធនាមណាមួយលើកលែងតាមអ្វី ដែលទ្រង់បានប្រសិទ្ធនាមដោយព្រះអង្គឯង ឬប្រសិទ្ធនាមដោយអ្នកនាំសាររបស់ទ្រង់ ពីព្រោះទ្រង់មហាដឹងពីព្រះអង្គឯង ព្រះលក្ខណៈ និងព្រះនាមរបស់ទ្រង់ ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُلْ ءَأَنتُمْ أَعْلَمُ أَمِ ٱللَّهُ ﴾ سورة البقرة / الآية: ١٤٠

មានន័យថា៖ «មូហាំម៉ាត់ចូរសួរពួកគេថា តើពួកអ្នកដឹងជាង ឬក៏អល់ឡោះដឹងជាងពួកអ្នក?»។

ណាអ៊ីម ពិន ហាម៉ាត សេករបស់អ៊ីមុាំ អាល់ពូខោរីយ៍និយាយថា៖ នរណាប្រដូចអល់ឡោះនឹងសត្វលោករបស់ទ្រង់ អ្នកនោះបានក្បត់នឹងជំនឿ។នរណាប្រកែកចំពោះព្រះលក្ខណៈដែលអល់ឡោះបានកំណត់ដោយព្រះអង្គឯង ឬកំណត់ដោយអ្នកនាំសាររបស់ទ្រង់ អ្នកនោះបានក្បត់នឹងជំនឿ។ គ្មានព្រះលក្ខណៈណាដែលទ្រង់បានកំណត់ដោយព្រះអង្គឯង ឬកំណត់ដោយអ្នកនាំសារ មានភាពស្រដៀង និងដូចគ្នានោះទេ។

គោលការណ៍ទី៣៖ ចាំបាច់លើបុគ្គលដែលមានកាតព្វកិច្ចសាសនាត្រូវមានជំនឿចំពោះព្រះលក្ខណៈ និងព្រះនាមទាំងឡាយដែលមានចែងក្នុងគម្ពីរអាល់គួរអាន និងធម្មនិយមរបស់អ្នកនាំសារដោយពុំត្រូវឆ្ងល់ពីទម្រង់រូបរាងនៃព្រះលក្ខណៈនិងឈ្មោះទាំងនោះ។ ព្រោះការដឹងពីទ្រង់ទ្រាយអាស្រ័យលើការដឹងពីអត្តៈ ឬរូបកាយ ហើយលក្ខណៈមានភាពខុសគ្នាអាស្រ័យលើភាពខុសគ្នានៃរូបសម្បត្តិ។ អត្តៈរបស់អល់ឡោះគេពុំត្រូវសួរចង់ដឹងពីទ្រង់ទ្រាយ និងរូបរាងនោះ

ឡើយ។ ក៏ដូចគ្នាដែរ ព្រះលក្ខណៈរបស់ទ្រង់មិនត្រូវសួរចង់ដឹងពីទ្រង់ទ្រាយនោះឡើយ។

មានក្បួនតម្រាភាគច្រើនរបស់ពួកបុព្វបុរសនៅពេលដែលគេសួរពីសភាពនៃការគង់របស់ទ្រង់លើបល្ល័ង្កយ៉ាងដូចម្ដេចនោះ ពួកគាត់បានតបវិញថា៖ «ពាក្យថាគង់នៅគេយល់ន័យរបស់វាជាទូទៅ ហើយពាក្យថា ដូចម្ដេចគ្មាននរណាដឹងទេ ការជឿលើពាក្យនេះជាកាតព្វកិច្ច ហើយការសួរអំពីពាក្យនេះគឺជាទង្វើអត្តនោម័តិ(بدعة)»។

## ភាពខុសគ្នារវាងជំនឿនិងឥស្លាម

គ្មានការមន្ទិលសង្ស័យចំពោះភាពខុសគ្នារវាងអ្នកមូស្លីម និងអ្នកមានជំនឿ ឬរវាងជំនឿនិងឥស្លាម។ ជំនឿគឺជាពាក្យសម្ដី និងអំពើ សម្ដីចេញពីចិត្តនិងមាត់។ អំពើចេញពីចិត្ត និងកាយវិការ។ រីឯឥស្លាមសំដៅលើការប្រគល់ខ្លួនជូនអល់ឡោះឱនលំទោនចំពោះទ្រង់ ប្រណិប័តន៍តាមច្បាប់បញ្ញត្តិរបស់ទ្រង់។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ قَالَتِ ٱلۡأَعۡرَابُ ءَامَنَّاۖ قُل لَّمۡ تُؤۡمِنُواْ وَلَٰكِن قُولُوٓاْ أَسۡلَمۡنَا وَلَمَّا يَدۡخُلِ ٱلۡإِيمَٰنُ فِي قُلُوبِكُمۡۖ ﴾ سورة الحجرات / الآية: ١٤

មានន័យថា៖ «ពួកអារ៉ាប់ពនេចរបាននិយាយថា ពួកយើងជឿហើយ។ មូហាំម៉ាត់ប្រាប់ពួកគេថា ពួកអ្នកពុំទាន់មានជំនឿពេញលេញទេ។ ប៉ុន្តែពួកអ្នកត្រូវនិយាយថា ពួកយើងបានចូលឥស្លាមហើយ ពីព្រោះជំនឿពុំទាន់ចូលស៊ប់ក្នុងចិត្តរបស់ពួកអ្នកនៅឡើយទេ »។

ហេតុនេះបានជាពួកសាសនវិទូបានអធិប្បាយថា ជំនឿគឺជាអំពើខាងក្នុង ហើយឥស្លាមជាអំពើខាងក្រៅ ព្រោះប្រភពដើមនៃជំនឿគឺភាពជឿជាក់ក្នុងចិត្ត។ រីឯឥស្លាមវិញគឺការប្រកាសប្រណិប័តន៍តាមគឺជាការទាមទារដែលឆ្លើយតបដោយកាយវិការអនុវត្តជាក់ស្តែង។

អាស្រ័យហេតុនេះ អ្នកមូស្លីមគឺជាអ្នកដែលប្រគល់ខ្លួនគោរពតាមបទបញ្ជារបស់អល់ឡោះ ប្រណិប័តន៍ចំពោះទ្រង់ ឱនលំទោនបន្ទាបខ្លួន ប្រតិបត្តិដោយស្ម័គ្រចិត្ត ឬដោយបង្ខំគ្មានភាពស្ទាក់ស្ទើរចំពោះកិច្ចការណាមួយនៃកិច្ចការសាសនា។ បើសិនជាគេប្រើឱ្យធ្វើកិច្ចការអ្វីមួយត្រូវប្រញាប់អនុវត្ត ហើយបើសិនជាគេហាមឃាត់ពីអ្វីមួយក្នុងឥស្លាមចាំបាច់បោះបង់ និងជៀសវាងជាបន្ទាន់។ ជឿជាក់ថាអ្វីដែលអល់ឡោះជាម្ចាស់បង្គាប់បញ្ជាគឺជាប្រភពនៃគុណសម្បត្តិ ហើយអ្វីដែលទ្រង់ហាមឃាត់គឺជាប្រភពនៃគុណវិបត្តិ។ ការធ្វើបែបណាមួយជាការប្រតិបត្តិចំពោះអល់ឡោះជាម្ចាស់នោះ ចាំបាច់ត្រូវប្រញាប់ធ្វើជាបន្ទាន់ ធ្វើដោយសេចក្តីស្រលាញ់ពេញចិត្ត មានស្មារតីទទួលខុសត្រូវធ្វើដោយស្ម័គ្រចិត្ត ពុំមែនដោយបង្ខំចិត្ត បែបនេះគេហៅថាមូស្លីម។

ឆ្លៀតក្នុងឱកាសនេះក៏មិនភ្លេចរំលឹកដល់អ្នកអានផងដែរថា ក្នុងច្បាប់ឥស្លាមមានបរិបទជាច្រើនដែលគេប្រើពាក្យឥស្លាមក្នុងន័យជំនឿផងដែរ។ ប្រសាសន៍អ្នកនាំសារមូហាំម៉ាត់ដ៏ល្បីល្បាញទាក់ទងនឹងរឿងទេវតាជីព្រីលដែលបានញែកន័យនៃពាក្យទាំងពីរឱ្យដាច់ពីគ្នា ខណៈដែលជីព្រីលសួរថា បពិត្រអ្នកនាំសាររបស់អល់ឡោះ សូមមេត្តាប្រាប់ខ្ញុំពីជំនឿ។ លោកតបវិញថា៖ អ្នកត្រូវជឿចំពោះអល់ឡោះ ពួកទេវតា

ពួកអ្នកនាំសារ ថ្ងៃបរលោក ជឿចំពោះព្រះលិខិត វាសនាល្អ និងអាក្រក់។ ទេវតាសួរទៀតថា៖ សូមមេត្តាប្រាប់ខ្ញុំអំពីឥស្លាម។ លោកតបវិញថា៖ ត្រូវសច្ចាថាគ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដលើកលែងតែអល់ឡោះ ហើយមូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ ប្រតិបត្តិការថ្វាយបង្គំ បង់ហ្សាកាត់ បួសខែរ៉ម៉ាហ្ទន ធ្វើធម្មយាត្រានៅវិហារកៈហ្ពះ បើសិនជាអ្នកមានលទ្ធភាព»។

ប្រសាសន៍ខាងលើបានបកស្រាយឱ្យឃើញថា ជំនឿគឺជាការប្រតិបត្តិខាងក្នុង។ នេះជាប្រភពនៃភាពជឿជាក់ ឬជាការប្រតិបត្តិផ្លូវចិត្ត។ រីឯឥស្លាមវិញបានបកស្រាយឱ្យឃើញថា ជាការប្រតិបត្តិខាងក្រៅ។ ពីព្រោះពាក្យសច្ចាទាំងពីរ ត្បិតតែជាសម្ដី តែជាការប្រតិបត្តិខាងក្រៅ ការបង់ហ្សាកាត់ក៏ជាការងារខាងក្រៅ ការធ្វើធម្មយាត្រាក៏ជាការងារខាងក្រៅផងដែរ។

ទោះជាយ៉ាងក៏ដោយ ក៏ជំនឿពេលខ្លះមានន័យដូចឥស្លាមដែរ ក្នុងកំណត់ត្រា អិបនូ អាពើស និយាយអំពីប្រតិភូ អាប់ឌុលកើស។ អ្នកនាំសារលោកបានមានប្រសាសន៍ថា៖ ខ្ញុំបង្គាប់ពួកអ្នកបួនប្រការ គឺបង្គាប់ឱ្យពួកអ្នកជឿចំពោះអល់ឡោះ តើពួកអ្នកដឹងទេ អ្វីជាជំនឿចំពោះអល់ឡោះ? គឺសច្ចាថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដលើកលែងតែអល់ឡោះ ហើយមូហាំម៉ាត់ជាអ្នកនាំសាររបស់ទ្រង់ ប្រតិបត្តិការថ្វាយបង្គំ បង់ហ្សាកាត់ បង់មួយភាគប្រាំនៃទ្រព្យជ័យភ័ណ្ឌ លោកចាត់ទុកថានេះគឺជាជំនឿដែលមានពាក្យសច្ចាទាំងពីរ ការថ្វាយបង្គំ និងការបង់ហ្សាកាត់។

នៅត្រង់នេះបំណកស្រាយន័យនៃជំនឿមានន័យដូចឥស្លាមដែរ។

សរុបសេចក្តីមក ឥស្លាមគឺសំដៅលើការប្រតិបត្តិខាងក្រៅទាំងឡាយដូចជា ពាក្យសច្ចាទាំងពីរ ការថ្វាយបង្គំ ហ្សាកាត់ បួស ធ្វើធម្មយាត្រា ហើយការប្រតិបត្តិខាងក្រៅផ្សេងៗទៀតក៏រាប់បញ្ចូលផងដែរ។ គោលគ្រឹះទាំងប្រាំប្រៀបបាននឹងសសរស្តម្ភ ដែលឥស្លាមត្រូវស្ថាបនាឡើងបើពុំនោះទេឥស្លាមនឹងមិនអាចពេញលក្ខណៈជាដាច់ខាត។

រីឯជំនឿវិញ ជាពាក្យសម្តី ការប្រតិបត្តិ និងជំនឿ សម្តីក្នុងចិត្ត និងអណ្តាត ការប្រតិបត្តិផ្លូវចិត្ត និងផ្លូវកាយ។ សម្តីចេញពីមាត់រាប់បញ្ចូលទាំងការសូត្រធម៌រំលឹក ការអាន ការបួងសួង ណែនាំគ្នាឱ្យធ្វើល្អ ហាមឃាត់គ្នាពីអំពើអាក្រក់ និងដាស់តឿនគ្នាឱ្យប្រុងប្រយ័ត្នពីអំពើអាក្រក់ ការបង្ហាត់បង្រៀនប្រៀនប្រដៅគ្នា ជួយប្រាប់អ្នកវង្វេងផ្លូវ ការឱ្យសាឡាម ការទទួលសាឡាម...។ល។ ចំណែកឯការប្រតិបត្តិរាប់បញ្ចូលទាំងការប្រតិបត្តិផ្លូវចិត្ត និងផ្លូវកាយ។ ការប្រតិបត្តិផ្លូវចិត្តដូចជា ការស្រលាញ់ក្នុងផ្លូវអល់ឡោះ ស្អប់ក្នុងផ្លូវរបស់ទ្រង់ ទទួលយកនូវវាសនាកំណត់របស់ទ្រង់ អត់ធ្មត់លើការសាកល្បងរបស់ទ្រង់ កោតខ្លាចចំពោះទ្រង់ សង្ឃឹមចំពោះទ្រង់ រំពឹងជឿទុកចិត្តចំពោះទ្រង់ សារភាពកំហុសចំពោះទ្រង់...។ល។ ទាំងនេះគឺជាការប្រតិបត្តិផ្លូវចិត្ត។ ការប្រតិបត្តិផ្លូវកាយមានដូចជា ការឱនគោរព ការក្រាបគោរព ការឈរ និងអង្គុយ ការដើរប្រទក្សិណជុំវិញកៈហ្ពះ ការតស៊ូ ការធ្វើធម្មយាត្រា។ល។

## អល់ឡោះជាម្ចាស់នៅឯណា?

សាសនាផ្សេងមួយចំនួនជឿថា «អល់ឡោះជាម្ចាស់មាននៅគ្រប់ទីកន្លែង» តាមភាពជាក់ស្តែងគេហៅថា ជំនឿលើអាទិទេពគ្រប់កន្លែង ឬជំនឿលើធម្មជាតិ ដែលផ្ទុយនឹងប្រព័ន្ធជំនឿរបស់ឥស្លាម។ អល់ឡោះជាម្ចាស់ទ្រង់មានព្រះបន្ទូលប្រាប់យ៉ាងច្បាស់លាស់ថា គ្មានអ្វីមួយនៅកន្លែងណាមួយនៃចក្រវាលទាំងមូល អាចប្រៀបប្រដូចនឹងអល់ឡោះ ហើយទ្រង់ក៏ពុំមែនជាសភាវៈនៃចក្រវាលនោះដែរ។

អល់ឡោះជាម្ចាស់មានព្រះបន្ទូលក្នុងគម្ពីរអាល់គួរអានថា ទ្រង់បានបង្កើតចក្រវាលក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់បានគង់លើបល្ល័ង្ករបស់ទ្រង់ ទ្រង់គង់នៅជាអមតៈ។

អល់ឡោះជាម្ចាស់ទ្រង់មានពុទ្ធិពេញលេញដោយទ្រង់ដឹងពីអ្វីគ្រប់យ៉ាងតាំងពីអតីតៈ បច្ចុប្បន្ន និងទៅអនាគត ដឹងនៅគ្រប់ទីកន្លែងទាំងអស់ក្នុងពេលតែមួយដោយសុក្រឹត។ ក៏ដូចគ្នាដែរ ចំពោះការលឺ និងការមើលឃើញរបស់ទ្រង់។ លើសពីនេះ ការដឹងរបស់ទ្រង់ ការលឺរបស់ទ្រង់ ការឃើញរបស់ទ្រង់នៅគ្រប់ទីកន្លែងទាំងអស់ក្នុងពេលតែមួយ។

ក្នុងប្រធានបទនេះ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា៖ អល់ឡោះជាម្ចាស់នៅជិតពួកយើងជាងសរសៃក។ គាត់ក៏ប្រាប់បញ្ជាក់ថា អល់ឡោះជាម្ចាស់នៅជាមួយពួកយើង នៅពេលណាយើងគោរពសក្ការៈចំពោះទ្រង់ដោយចិត្តសទ្ធាជ្រះថ្លាក្នុងពេលចាំបាច់។

ទាំងនេះពុំបានធ្វើឱ្យថមថយដល់អំណាច និងអានុភាពរបស់ទ្រង់ឡើយ។ ទ្រង់មិនត្រូវការអ្វីពីសត្វលោករបស់ទ្រង់នោះទេ។

គម្ពីរអាល់គួរអានបានបកស្រាយប្រាប់យើងទាំងអស់គ្នាយ៉ាងពិស្តារទាក់ទងនឹងទីកន្លែងរបស់អល់ឡោះ ហើយទ្រង់ជានរណា។

ទ្រង់បានមានព្រះបន្ទូលថា៖

﴿ إِنَّ رَبَّكُمُ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ يُغْشِى ٱلَّيْلَ ٱلنَّهَارَ يَطْلُبُهُۥ حَثِيثًا وَٱلشَّمْسَ وَٱلْقَمَرَ وَٱلنُّجُومَ مُسَخَّرَٰتٍۭ بِأَمْرِهِۦٓ ۗ أَلَا لَهُ ٱلْخَلْقُ وَٱلْأَمْرُ ۗ تَبَارَكَ ٱللَّهُ رَبُّ ٱلْعَٰلَمِينَ ﴿٥٤﴾ ﴾ سورة الأعراف / الآية: ٥٤

មានន័យថា៖ «ពិតប្រាកដ ព្រះជាម្ចាស់របស់ពួកអ្នកគឺអល់ឡោះ ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក។ ទ្រង់ធ្វើឱ្យកើតមានពេលយប់ និងពេលថ្ងៃបន្តបន្ទាប់គ្នា ព្រះអាទិត្យ ព្រះចន្ទ្រ ផ្កាយទាំងឡាយ គោរពតាមការបង្គាប់បញ្ជារបស់ទ្រង់។ តើមិនមែនទេឬការបង្កើត និងការបង្គាប់បញ្ជាជាកម្មសិទ្ធិរបស់ទ្រង់។ អល់ឡោះមហាបវរជាព្រះជាម្ចាស់នៃសកលលោកទាំងមូល»។

﴿ إِنَّ رَبَّكُمُ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۖ يُدَبِّرُ ٱلْأَمْرَ ۖ مَا مِن شَفِيعٍ إِلَّا مِنۢ بَعْدِ إِذْنِهِۦ ۚ ذَٰلِكُمُ ٱللَّهُ رَبُّكُمْ فَٱعْبُدُوهُ ۚ أَفَلَا تَذَكَّرُونَ ﴿٣﴾ ﴾ سورة يونس / الآية: ٣

មានន័យថា៖ «ពិតប្រាកដ ព្រះជាម្ចាស់របស់ពួកអ្នកគឺអល់ឡោះ ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក ទ្រង់ចាត់ចែងការងារសព្វបែបយ៉ាង គ្មានអ្នកអន្តរាគមន៍ណាម្នាក់លើកលែងតែមានការអនុញ្ញាតពីទ្រង់។ ទ្រង់គឺអល់ឡោះជាម្ចាស់របស់ពួកអ្នក ចូរគោរពសក្ការៈចុះចំពោះទ្រង់ តើពួកអ្នកនឹកមិនឃើញទេឬ?»។

﴿ ٱللَّهُ ٱلَّذِى رَفَعَ ٱلسَّمَٰوَٰتِ بِغَيْرِ عَمَدٍ تَرَوْنَهَا ۖ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۖ وَسَخَّرَ ٱلشَّمْسَ وَٱلْقَمَرَ ۖ كُلٌّ يَجْرِى لِأَجَلٍ مُّسَمًّى ۚ يُدَبِّرُ ٱلْأَمْرَ يُفَصِّلُ ٱلْءَايَٰتِ لَعَلَّكُم بِلِقَآءِ رَبِّكُمْ تُوقِنُونَ ۝٢ ﴾ سورة الرعد / الآية: ٢

មានន័យថា៖ «អល់ឡោះជាម្ចាស់ដែលបានលើកមេឃពាជាន់ឱ្យខ្ពស់ដោយគ្មានសសរទល់ ដូចជាពួកអ្នកទាំងអស់គ្នាមើលឃើញស្រាប់ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក។ ទ្រង់បានសម្រួលព្រះអាទិត្យ និងព្រះចន្ទ្រដើម្បីជាប្រយោជន៍ដល់សត្វលោក ភពទាំងពីរធ្វើចលនាតាមគន្លងរបស់វារហូតដល់ថ្ងៃបរលោក។ ទ្រង់ចាត់ចែងការងារលោកីយ៍ និងបរលោក ទ្រង់បកស្រាយប្រាប់និមិត្តសញ្ញាទាំងឡាយសង្ឃឹមថាពួកអ្នកជឿជាក់ចំពោះការទៅជួបព្រះជាម្ចាស់របស់ពួកអ្នក»។

﴿ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَمَا بَيْنَهُمَا فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۚ ٱلرَّحْمَٰنُ فَسْـَٔلْ بِهِۦ خَبِيرًا ۝٥٩ ﴾ سورة الفرقان / الآية: ٥٩

មានន័យថា៖«ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ ផែនដី និងអ្វីៗដែលនៅចន្លោះភពទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក ទ្រង់ជាព្រះដ៏មហាមេត្តា មូហាំម៉ាត់ចូរបួងសួងសុំតាមរយៈព្រះនាមនេះ ទ្រង់មហាដឹងយ៉ាងល្អិតល្អន់»។

﴿ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَمَا بَيْنَهُمَا فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۖ مَا لَكُم مِّن دُونِهِۦ مِن وَلِىٍّ وَلَا شَفِيعٍ ۚ أَفَلَا تَتَذَكَّرُونَ ﴿٤﴾ ﴾ سورة السجدة / الآية: ٤

មានន័យថា៖«អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ និងផែនដី ហើយនិងអ្វីៗដែលនៅចន្លោះភពទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក សម្រាប់ពួកអ្នកគ្មានម្ចាស់ណាផ្សេងក្រៅពីទ្រង់ គ្មានអ្នកធ្វើអន្តរាគមន៍ណាក្រៅពីទ្រង់ តើពួកអ្នកមិនភ្ញាក់រលឹកទេឬ?»។

﴿ وَلَقَدْ خَلَقْنَا ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَمَا بَيْنَهُمَا فِى سِتَّةِ أَيَّامٍ وَمَا مَسَّنَا مِن لُّغُوبٍ ﴿٣٨﴾ ﴾ سورة ق / الآية: ٣٨

មានន័យថា៖ «ពិតប្រាកដ យើងបានបង្កើតមេឃប្រាំពីរជាន់ និងផែនដី ហើយនិងអ្វីៗដែលនៅចន្លោះភពទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ ហើយយើងគ្មាននឿយហត់អ្វីបន្តិចសោះឡើយ»។

﴿ هُوَ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۚ يَعْلَمُ مَا يَلِجُ فِى ٱلْأَرْضِ وَمَا يَخْرُجُ مِنْهَا وَمَا يَنزِلُ مِنَ ٱلسَّمَآءِ وَمَا يَعْرُجُ فِيهَا ۖ وَهُوَ مَعَكُمْ أَيْنَ مَا كُنتُمْ ۚ وَٱللَّهُ بِمَا تَعْمَلُونَ بَصِيرٌ ﴿٤﴾ ﴾ سورة الحديد / الآية: ٤

មានន័យថា៖ «ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក ទ្រង់ដឹងអ្វីដែលចូល និងចេញពីក្នុងដី អ្វីដែលចុះ និងអ្វីដែលឡើងទៅលើមេឃ ទ្រង់នៅជាមួយពួកអ្នក ទោះជាពួកអ្នកនៅទីកន្លែងណាក៏ដោយ ហើយអល់ឡោះទ្រង់ឃើញច្បាស់នូវអ្វីដែលពួកអ្នកកំពុងធ្វើ»។

## ភស្តុតាងមួយចំនួនបញ្ជាក់ពីវត្តមានរបស់អល់ឡោះជាម្ចាស់

### តើអល់ឡោះជាម្ចាស់មកពីណា?

ទាំងក្នុងគម្ពីរសញ្ញាណថ្មី និងគម្ពីរអាល់គួរអានប្រាប់យើងថា អល់ឡោះជាម្ចាស់ទ្រង់មានពីបុព្វហើយទ្រងគង់នៅជានិរន្តរ៍ គ្មានពេលឬខណៈណាមួយដែលទ្រង់មិនទាន់កើតមាននោះឡើយ។ ក្នុងន័យនេះ ទ្រង់គង់ជាអមតៈគ្មានថ្ងៃសាបសូន្យ ទ្រង់គ្មានការចាប់ផ្ដើមហើយក៏គ្មានទីបញ្ចប់។ ទ្រង់ជាអ្នកបង្កើតតែមួយគត់ ជាអ្នកផ្ដល់លាភសក្ការៈឬជីវិតរស់នៅសម្រាប់សត្វលោកទាំងមូល គ្មានព្រះណាផ្សេងក្រៅពីទ្រង់ ទ្រង់គ្មានដៃគូ។ អល់ឡោះជាម្ចាស់បានប្រាប់យើងថា គ្មាននរណាបង្កើតទ្រង់ ទ្រង់គ្មានគូប្រៀប គ្មានដៃគូ ហើយគ្មាននរណាម្នាក់ដូចទ្រង់នៃសការសត្វលោក ទោះជាក្នុងរូបភាពណាក៏ដោយ។ ទ្រង់បានប្រសិទ្ធនាមហៅសម្រាប់ព្រះអង្គនូវព្រះនាមជាច្រើន ខាងក្រោមនេះជាព្រះនាមខ្លះនៃព្រះនាមទាំងឡាយ៖

ទ្រង់ជាព្រះដំបូងបង្អស់

ទ្រង់ជាព្រះចុងក្រោយបង្អស់

ទ្រង់ជាព្រះគង់នៅជាអមតៈ

ទ្រង់មិនមែនជាបុរស ទ្រង់គ្មានកូន គ្មានសៃស្រឡាយ។

ទ្រង់ពុំមែនជាព្រះដែលត្រូវគេបង្កើត គេមិនអាចប្រដូចទ្រង់ទៅនឹងនរណាម្នាក់នៃសត្វលោករបស់ទ្រង់។

ទ្រង់មានវត្តមានជាអមតៈ គ្មាននរណាបង្កើតទ្រង់ គ្មាននរណាដូចទ្រង់ ទោះក្នុងរូបភាពអ្វីក៏ដោយគ្មាននរណាអាចប្រៀបប្រដូចនឹងទ្រង់ឡើយ។

អ្នកនាំសារមូហាំម៉ាត់លោកបានមានប្រសាសន៍ថា៖

عَنْ أَبِي هُرَيْرَةَ قَالَ قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( إِنَّ الشَّيْطَانَ يَأْتِي أَحَدَكُمْ فَيَقُولُ مَنْ خَلَقَ السَّمَاءَ فَيَقُولُ اللَّهُ عَزَّ وَجَلَّ فَيَقُولُ مَنْ خَلَقَ الْأَرْضَ فَيَقُولُ اللَّهُ فَيَقُولُ مَنْ خَلَقَ اللَّهَ فَإِذَا أَحَسَّ أَحَدُكُمْ بِشَيْءٍ مِنْ هَذَا فَلْيَقُلْ آمَنْتُ بِاللَّهِ وَبِرُسُلِهِ ) رواه أحمد

មានន័យថា៖ «ពិតប្រាកដ បិសាចសាតាំងនឹងមកឆាឆៅពួកអ្នកគេសួរថា តើនរណាបង្កើតមេឃ? គេឆ្លើយថា អល់ឡោះជាម្ចាស់។ បិសាចនោះសួរបន្តថា តើនរណាបង្កើតផែនដី? គេឆ្លើយថា អល់ឡោះជាម្ចាស់។ បិសាចនោះសួរបន្តទៀតថា ចុះនរណាបង្កើតអល់ឡោះ? បើនរណាម្នាក់មានអារម្មណ៍បែបនេះ ចូរតបទៅគេវិញថា ខ្ញុំជឿចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់»។

តាមធម្មតា អល់ឡោះជាម្ចាស់ជាព្រះដ៏ពិតប្រាកដ ទ្រង់ចាំបាច់ជាព្រះដែលអមតៈ ទ្រង់ពុំមែនត្រូវគេបង្កើតឡើយ។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلْحَىُّ ٱلْقَيُّومُ ۚ لَا تَأْخُذُهُۥ سِنَةٌ وَلَا نَوْمٌ ۚ لَّهُۥ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۗ مَن ذَا ٱلَّذِى يَشْفَعُ عِندَهُۥٓ إِلَّا بِإِذْنِهِۦ ۚ يَعْلَمُ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ ۖ

وَلَا يُحِيطُونَ بِشَيۡءٖ مِّنۡ عِلۡمِهِۦٓ إِلَّا بِمَا شَآءَۚ وَسِعَ كُرۡسِيُّهُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۖ وَلَا يَـُٔودُهُۥ حِفۡظُهُمَاۚ وَهُوَ ٱلۡعَلِيُّ ٱلۡعَظِيمُ ﴿٢٥٥﴾ سورة البقرة / الآية: ٢٥٥

មានន័យថា៖ « អល់ឡោះតែមួយគត់ គ្មានទេម្ចាស់ដែលត្រូវគោរពពិតប្រាកដផ្សេងក្រៅពីទ្រង់ ទ្រង់មានជីវិតគង់ជាអមតៈ ទ្រង់មិនងងុយ ហើយក៏មិនផ្ទំដែរ។ អ្វីដែលមាននៅលើមេឃ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ គ្មានបុគ្គលណាហ៊ានធ្វើអន្តរាគមន៍ចំពោះមុខអល់ឡោះលើកលែងតែមានការអនុញ្ញាតពីទ្រង់។ ទ្រង់ដឹងនូវអ្វីៗដែលមាននៅពីមុខនឹងនៅពីក្រោយពួកគេ។ ពួកគេមិនដឹងអ្វីសោះពីពុទ្ធិរបស់ទ្រង់ លើកលែងអ្វីដែលទ្រង់សព្វព្រះទ័យ។ អាសនៈរបស់ទ្រង់ធំទូលាយគ្របដណ្តប់មេឃ និងផែនដី ហើយទ្រង់មិននឿយហត់ក្នុងការរក្សាមេឃ និងផែនដី ទ្រង់មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម»។

ក្នុងព្រះបន្ទូលនេះផ្តល់ការពិពណ៌នាយ៉ាងពិតប្រាកដសម្រាប់អល់ឡោះជាម្ចាស់ ដោយគ្មានការប្រៀបធៀបជាមួយនឹងសត្វលោករបស់ទ្រង់ ក៏ប៉ុន្តែពណ៌នាដោយសុក្រឹតឥតខ្ចោះនូវគ្រប់ព្រះលក្ខណៈ និងលក្ខណៈពិសេសរបស់ទ្រង់។

## អល់ឡោះជាម្ចាស់ និងអ្វីៗដែលទ្រង់បានបង្កើត

### ហេតុអ្វីបានអល់ឡោះទ្រង់បង្កើតអ្វីគ្រប់យ៉ាង?

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលក្នុងគម្ពីររបស់ទ្រង់ដ៏ថ្លៃថ្លាថា ទ្រង់ពុំបានបង្កើតសកាវសត្វលោកទាំងនោះមកទទេៗឥតប្រយោជន៍នោះ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ وَمَا خَلَقْتُ ٱلْجِنَّ وَٱلْإِنسَ إِلَّا لِيَعْبُدُونِ ﴿٥٦﴾ ﴾ سورة الذاريات / الآية: ٥٦

មានន័យថា៖ «យើងពុំបានបង្កើតជិននិងមនុស្សលើកលែងតែដើម្បីឱ្យពួគគេគោរពសក្ការៈចំពោះយើង»។

ពិតប្រាកដ អល់ឡោះជាម្ចាស់ទ្រង់បង្កើតពួកយើងដើម្បីឱ្យយើងគោរពសក្ការៈចំពោះទ្រង់តែមួយគត់ យើងមិនត្រូវយកនរណាម្នាក់មកចូលហ៊ុនជាមួយនឹងទ្រង់ក្នុងការគោរពសក្ការៈ។

﴿ وَهُوَ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ وَكَانَ عَرْشُهُۥ عَلَى ٱلْمَآءِ لِيَبْلُوَكُمْ أَيُّكُمْ أَحْسَنُ عَمَلًا ۗ وَلَئِن قُلْتَ إِنَّكُم مَّبْعُوثُونَ مِنۢ بَعْدِ ٱلْمَوْتِ لَيَقُولَنَّ ٱلَّذِينَ كَفَرُوٓا۟ إِنْ هَٰذَآ إِلَّا سِحْرٌ مُّبِينٌ ﴿٧﴾ ﴾ سورة هود / الآية: ٧

មានន័យថា៖ «ទ្រង់ជាអ្នកដែលបានបង្កើតមេឃប្រាំពីរជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ ហើយបល្ល័ង្ករបស់ទ្រង់នៅលើទឹកដើម្បីសាកល្បងពួកអ្នក តើនរណាម្នាក់ក្នុងចំណោមពួកអ្នកប្រតិបត្តិបានល្អជាងគេ មូហាំម៉ាត់បើសិនជាឯងនិយាយថា ពួកអ្នកនឹងត្រូវគេ

បង្កើតឱ្យរស់ចេញពីផ្នូរឡើងវិញក្រោយពេលស្លាប់ ពួកអ្នកគ្មានជំនឿនឹងនិយាយថា នេះគ្មានរឿងអ្វីក្រៅពីមន្តអាគមន៍យ៉ាងជាក់ច្បាស់»។

ពិតប្រាកដ អល់ឡោះជាម្ចាស់បានបង្កើតអ្វីទាំងអស់ដែលយើងឱ្យឈ្មោះថា ពិភពលោកជាការសាកល្បងសម្រាប់ពួកយើង លោកីយ៍នេះពុំមែនជាឋានឋិតថេរ ហើយយើងក៏មិនអាចចាត់ទុកថាជាឋានល្អ ឬអាក្រក់ផងដែរ តាមស្ថានភាពជាក់ស្តែងវាអាចផ្ទុយពីនេះទាំងស្រុង។

﴿ تَبَٰرَكَ ٱلَّذِى بِيَدِهِ ٱلْمُلْكُ وَهُوَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ۝١ ٱلَّذِى خَلَقَ ٱلْمَوْتَ وَٱلْحَيَوٰةَ لِيَبْلُوَكُمْ أَيُّكُمْ أَحْسَنُ عَمَلًا ۚ وَهُوَ ٱلْعَزِيزُ ٱلْغَفُورُ ۝٢ ٱلَّذِى خَلَقَ سَبْعَ سَمَٰوَٰتٍ طِبَاقًا ۖ مَّا تَرَىٰ فِى خَلْقِ ٱلرَّحْمَٰنِ مِن تَفَٰوُتٍ ۖ فَٱرْجِعِ ٱلْبَصَرَ هَلْ تَرَىٰ مِن فُطُورٍ ۝٣ ثُمَّ ٱرْجِعِ ٱلْبَصَرَ كَرَّتَيْنِ يَنقَلِبْ إِلَيْكَ ٱلْبَصَرُ خَاسِئًا وَهُوَ حَسِيرٌ ۝٤ ﴾ سورة الملك / الآية: ١ - ٤

មានន័យថា៖ «ពរជ័យសិរីសួស្តី និងក្តីមេត្តារបស់អល់ឡោះ អំណាចក្តោបក្តាប់ ការត្រួតត្រាលោកីយ៍ និងលោកខាងមុខនៅក្រោមព្រះហស្តរបស់ទ្រង់។ កិច្ចការ និងក្តីសម្រេចទាំងឡាយកំពុងប្រព្រឹត្តទៅតាមក្រឹត្យក្រមរបស់អល់ឡោះ ទ្រង់មានអានុភាពលើអ្វីគ្រប់យ៉ាង។ ទ្រង់បង្កើតសេចក្តីស្លាប់ និងជីវិត ដើម្បីសាកល្បងពួកអ្នកទាំងអស់គ្នាថា តើនរណាជាអ្នកប្រតិបត្តិអំពើល្អ និងមានសទ្ធាជ្រះថ្លាប្រសើរជាងគេ? ទ្រង់មហាខ្លាំងក្លា មហាអភ័យ។ ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ គ្មានឃើញការបង្កើតរបស់ទ្រង់មានភាពខ្វះចន្លោះឡើយ។ ចូរក្រឡេកមើលម្តងទៀតតើមានចន្លោះប្រហោងត្រង់ណាខ្លះ? ចូរក្រឡេកមើលចំនួនពីរដងទៀត ភ្នែករបស់ឯងនឹងព្រមចុះចាញ់ដោយទុរន់ភាព»។

គម្ពីរអាល់គួរអានបានពណ៌នាពីចរិតរបស់មនុស្សដែលឆាប់ភ្លេចពរជ័យដ៏ច្រើនសន្ធឹកសន្ធាប់ដែលព្រះជាម្ចាស់បានប្រទានមកជារៀងរាល់ថ្ងៃ។ ទ្រង់បានមានព្រះបន្ទូលក្នុងគម្ពីរអាល់គួរអានថា៖

﴿ وَإِذَا مَسَّ ٱلْإِنسَٰنَ ضُرٌّ دَعَا رَبَّهُۥ مُنِيبًا إِلَيْهِ ثُمَّ إِذَا خَوَّلَهُۥ نِعْمَةً مِّنْهُ نَسِىَ مَا كَانَ يَدْعُوٓا۟ إِلَيْهِ مِن قَبْلُ وَجَعَلَ لِلَّهِ أَندَادًا لِّيُضِلَّ عَن سَبِيلِهِۦ ۚ قُلْ تَمَتَّعْ بِكُفْرِكَ قَلِيلًا ۖ إِنَّكَ مِنْ أَصْحَٰبِ ٱلنَّارِ ﴿٨﴾ ﴾ سورة الزمر / الآية: ٨

មានន័យថា៖ «នៅពេលដែលមនុស្សទទួលរងគ្រោះអាសន្ន គេនឹកឃើញព្រះជាម្ចាស់ បួងសួងចំពោះទ្រង់។ បន្ទាប់មកបើសិនជាទ្រង់ប្រសិទ្ធពរជ័យដល់គេ គេបែរជាភ្លេចអ្វីដែលគេធ្លាប់បួងសួងចំពោះទ្រង់កាលពីមុន ហើយបង្កើតដៃគូសម្រាប់អល់ឡោះក្នុងការគោរពសក្ការៈដើម្បីនាំឱ្យអ្នកដទៃវង្វេងចេញពីផ្លូវរបស់ជាមួយគេដែរ។ មូហាំម៉ាត់ចូរព្រមានចំពោះពួកគេថា ចូររីករាយជាមួយនឹងភាពគ្មានជំនឿរបស់អ្នកបន្តិចចុះ ប្រាកដណាស់ ឯងឋិតក្នុងចំណោមពួកអ្នកចុះនរក»។

យើងភ្លេចថាខ្លួនឯងជាមនុស្ស ពាក្យមនុស្សអារ៉ាប់ហៅថា អ៊ិនសាន(إنسان) ក្លាយចេញពីពាក្យ និសយ៉ាន (نسيان)ប្រែថាភ្លេចភ្លាំង។ នេះគឺជាមួយចំណែកនៃការសាកល្បងចំពោះយើង។ តើយើងគ្រាន់តែប្រើការចងចាំឬស្មារតីជ្រើសរើសរបស់យើង ហើយមើលរំលងអំពីអ្វីដែលយើងត្រូវគោរពប្រណិប័តន៍ចំពោះព្រះជាម្ចាស់ ដែលបានបង្កើតយើងឬ? ឬក៏តើយើងនឹងក្លាយជាអ្នកដឹងគុណតែនៅក្នុងពេលដែលយើងមានគ្រោះថ្នាក់មានអាសន្នអន់ក្រ?

ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ فَأَمَّا ٱلْإِنسَٰنُ إِذَا مَا ٱبْتَلَىٰهُ رَبُّهُۥ فَأَكْرَمَهُۥ وَنَعَّمَهُۥ فَيَقُولُ رَبِّىٓ أَكْرَمَنِ ﴿١٥﴾ وَأَمَّآ إِذَا مَا ٱبْتَلَىٰهُ فَقَدَرَ عَلَيْهِ رِزْقَهُۥ فَيَقُولُ رَبِّىٓ أَهَٰنَنِ ﴿١٦﴾ ﴾ سورة الفجر: ١٥ - ١٦

មានន័យថា៖«រីឯមនុស្សនៅពេលដែលព្រះជាម្ចាស់របស់គេសាកល្បងគេដោយទ្រង់ប្រទានពរជ័យដល់គេ គេនិយាយថាព្រះជាម្ចាស់របស់ខ្ញុំទ្រង់មេត្តាករុណាចំពោះខ្ញុំ។ ក៏ប៉ុន្តែបើសិនជាទ្រង់សាកល្បងគេដោយដាក់កម្រិតលើជីវភាពរបស់គេ គេបែរជានិយាយថាព្រះជាម្ចាស់របស់ខ្ញុំទ្រង់ប្រមាថធ្វើឱ្យខ្ញុំរងភាពអាម៉ាស់»។

បន្ទាប់មក អល់ឡោះជាម្ចាស់បានបកស្រាយប្រាប់យើងពីមូលហេតុពិតនៅពីក្រោយរឿងទាំងនេះ។ ទ្រង់បានមានព្រះបន្ទូលថា៖

﴿ كَلَّاۖ بَل لَّا تُكْرِمُونَ ٱلْيَتِيمَ ﴿١٧﴾ وَلَا تَحَٰٓضُّونَ عَلَىٰ طَعَامِ ٱلْمِسْكِينِ ﴿١٨﴾ وَتَأْكُلُونَ ٱلتُّرَاثَ أَكْلًا لَّمًّا ﴿١٩﴾ وَتُحِبُّونَ ٱلْمَالَ حُبًّا جَمًّا ﴿٢٠﴾ ﴾
سورة الفجر / الآية: ١٧ - ٢٠

មានន័យថា៖ « ទេ តាមពិតពួកអ្នកទាំងអស់គ្នាមិនមេត្តាចំពោះកូនកំព្រា មិនចេះជំរុញគ្នាឱ្យជួយឧបត្ថម្ភដល់អ្នកទីទ័លក្រ កេងប្រវ័ញ្ចកេរមត៌កអ្នកដទៃដោយគ្មានការញញើត»។

អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតពួកយើង ទ្រង់បានប្រទានពរជ័យ និងលាភសក្ការៈជាច្រើនដល់ពួកយើង។ ជាមួយនោះ ពួកយើងបែរជានាំគ្នាប្រមាថចំពោះសិទ្ធិជាច្រើនរបស់ទ្រង់ ពួកយើងមិនគោរពសក្ការៈចំពោះទ្រង់តែមួយគត់ បដិសេធនឹងថ្ងៃជំនុំជម្រះ ដែលទ្រង់នឹង

សួរយើងពីពរជ័យនិងលាភសក្ការៈដែលទ្រង់បានប្រទានមកចំពោះយើង។

﴿ يَٰٓأَيُّهَا ٱلۡإِنسَٰنُ مَا غَرَّكَ بِرَبِّكَ ٱلۡكَرِيمِ ٦ ٱلَّذِي خَلَقَكَ فَسَوَّىٰكَ فَعَدَلَكَ ٧ فِيٓ أَيِّ صُورَةٖ مَّا شَآءَ رَكَّبَكَ ٨ كَلَّا بَلۡ تُكَذِّبُونَ بِٱلدِّينِ ٩ ﴾ سورة الانفطار / الآية: ٦ - ٩

ទ្រង់បានមានព្រះបន្ទូលថា៖ «ម្នាលមនុស្សលោកទាំងឡាយ តើមានអ្វីធ្វើឱ្យអ្នកក្រអឺតក្រទមចំពោះព្រះជាម្ចាស់របស់អ្នកដ៏មហាមេត្តា ទ្រង់បានបង្កើតអ្នក ទ្រង់សូន នឹងកែទម្រង់រូបរាងរបស់ពួកអ្នកក្នុងរូបភាពណាមួយដែលទ្រង់សព្វព្រះទ័យទ្រង់បង្កើត»។

តើយើងនឹងសង្កេតឃើញដូចម្តេចចំពោះស្ថានភាព និងបរិស្ថានជុំវិញខ្លួនយើង? តើយើងប្រាស្រ័យទាក់ទងជាមួយនឹងអ្នកដទៃយ៉ាងដូចម្តេច? តើយើងត្រៀមខ្លួនសម្រាប់ការអត់ឱន ឬការស្តីបន្ទោស?

ទាំងអស់នេះជាចំណែកមួយនៃការសាកល្បងចំពោះយើង ជាអ្វីដែលគេនឹងសួរយើងនៅថ្ងៃបរលោក។

តើទ្រង់ប្រាស្រ័យជាមួយពួកគេទាំងអស់ដោយយុត្តិធម៌ឬ?

ប្រាកដណាស់ អល់ឡោះជាម្ចាស់ទ្រង់តែងប្រាស្រ័យជាមួយសត្វលោកទាំងអស់ដោយយុត្តិធម៌ និងអព្យាក្រឹត។

ចូរអានព្រះបន្ទូលខាងក្រោមនេះដោយយកចិត្តទុកដាក់ ជាពិសេសស្តីអំពីពួកម្ចាស់គម្ពីរ (ជ្វីហ្វ និងគ្រិស្ត)៖

ទ្រង់បានមានព្រះបន្ទូលថា៖

﴿ تِلْكَ ءَايَٰتُ ٱللَّهِ نَتْلُوهَا عَلَيْكَ بِٱلْحَقِّ ۗ وَمَا ٱللَّهُ يُرِيدُ ظُلْمًا لِّلْعَٰلَمِينَ ﴿١٠٨﴾ وَلِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۚ وَإِلَى ٱللَّهِ تُرْجَعُ ٱلْأُمُورُ ﴿١٠٩﴾ كُنتُمْ خَيْرَ أُمَّةٍ أُخْرِجَتْ لِلنَّاسِ تَأْمُرُونَ بِٱلْمَعْرُوفِ وَتَنْهَوْنَ عَنِ ٱلْمُنكَرِ وَتُؤْمِنُونَ بِٱللَّهِ ۗ وَلَوْ ءَامَنَ أَهْلُ ٱلْكِتَٰبِ لَكَانَ خَيْرًا لَّهُم ۚ مِّنْهُمُ ٱلْمُؤْمِنُونَ وَأَكْثَرُهُمُ ٱلْفَٰسِقُونَ ﴿١١٠﴾ ﴾ سورة آل عمران / الآية: ١٠٨ - ١١٠

មានន័យថា៖ «ទាំងនោះគឺជានិមិត្តសញ្ញា និងជាភស្តុតាងរបស់អល់ឡោះ។ មូហាំម៉ាត់! យើងសូត្រឱ្យស្តាប់ដោយសេចក្តីពិត។ អល់ឡោះជាម្ចាស់ទ្រង់មិនប្រាថ្នាចង់រំលោភបំពានលើនរណាម្នាក់នៃសត្វលោករបស់ទ្រង់។ អ្វីៗដែលនៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើផែនដីជាកម្មសិទ្ធិរបស់ទ្រង់ វាសនានៃអ្វីគ្រប់យ៉ាងត្រូវវិលត្រឡប់ទៅរកអល់ឡោះជាម្ចាស់។ ពួកអ្នកបានក្លាយជាប្រជាជាតិមួយដ៏ប្រសើរបំផុតគេបង្កើតឡើងសម្រាប់មនុស្សទូទៅ ប្រើគេឱ្យធ្វើល្អ ហាមឃាត់គេពីអំពើអាក្រក់ ជឿចំពោះអល់ឡោះជាម្ចាស់។ បើសិនជាពួកម្ចាស់គម្ពីរមានជំនឿគឺប្រសើរសម្រាប់ពួកគេ ក្នុងចំណោមពួកគេអ្នកខ្លះមានជំនឿ ហើយភាគច្រើនខ្វាត់បង់ពីជំនឿ»។

នរណាមានជំនឿចំពោះអល់ឡោះជាម្ចាស់តែមួយទ្រង់គ្មានដៃគូ ប្រតិបត្តិអំពើកុសលធម៌តាមលទ្ធភាពដែលអាចធ្វើទៅបាន កាន់តាមអ្នកនាំសារចុងក្រោយដែលអល់ឡោះជាម្ចាស់បានបញ្ជូនមក អ្នកនោះនឹងក្លាយជាមូស្លីម (ព្រមគោរពតាមបំណងប្រាថ្នារបស់អល់ឡោះ)។

បន្ទាប់មក គេព្រមទទួលតាមលេខិតកំណត់ និងច្បាប់បញ្ញត្តិរបស់អល់ឡោះយ៉ាងពេញលេញ។ ម្យ៉ាងទៀត អល់ឡោះជាម្ចាស់ទ្រង់ជាអ្នកកាត់សេចក្ដីលើគ្រប់រឿងរ៉ាវទាំងអស់។

## តើអល់ឡោះទ្រង់ប្រាស្រ័យជាមួយពួកជ្វីហ្វ និងពួកគ្រិស្តដូចជាមួយពួកអ្នកមូស្លីមដែរឬទេ?

ជួនកាលមានអ្នកខ្លះសួរថា តើពួកម្ចាស់គម្ពីរ (ពួកជ្វីហ្វ និងពួកគ្រិស្ត)ដែលមានជីវិតរស់នៅក្នុងពេលបច្ចុប្បន្នអាចចាត់ពួកគេជាពួកអ្នកដែលត្រូវគេសង្គ្រោះដែរឬទេ?

តាមពិតពួកជ្វីហ្វ និងពួកគ្រិស្តដែលមានជំនឿចំពោះអល់ឡោះជាព្រះជាម្ចាស់តែមួយ។ ស្វះស្វែងក្នុងការគោរពប្រតិបត្តិចំពោះអល់ឡោះ ដើរតាមសារដែលទ្រង់បានបញ្ជូនមកជាមួយអ្នកនាំសាររបស់ទ្រង់(ដូចជា អ៊ីព្រហ៊ីម មូសា និងអ៊ីសា...) មានរំលឹកអំពីពួកគេច្រើនលើកច្រើនសាក្នុងគម្ពីរអាល់គួរអាន៖

﴿ لَيۡسُواْ سَوَآءٗۗ مِّنۡ أَهۡلِ ٱلۡكِتَٰبِ أُمَّةٞ قَآئِمَةٞ يَتۡلُونَ ءَايَٰتِ ٱللَّهِ ءَانَآءَ ٱلَّيۡلِ وَهُمۡ يَسۡجُدُونَ ١١٣ يُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ وَيَأۡمُرُونَ بِٱلۡمَعۡرُوفِ وَيَنۡهَوۡنَ عَنِ ٱلۡمُنكَرِ وَيُسَٰرِعُونَ فِي ٱلۡخَيۡرَٰتِۖ وَأُوْلَٰٓئِكَ مِنَ ٱلصَّٰلِحِينَ ١١٤ وَمَا يَفۡعَلُواْ مِنۡ خَيۡرٖ فَلَن يُكۡفَرُوهُۗ وَٱللَّهُ عَلِيمُۢ بِٱلۡمُتَّقِينَ ١١٥ ﴾

سورة آل عمران / الآية: ١١٣ - ١١٥

មានន័យថា៖ «ពុំស្មើគ្នានៃពួកម្ចាស់គម្ពីរ អ្នកខ្លះគោរពខ្ជាប់ខ្ជួនដើបថ្វាយបង្គំសូត្រព្រះបន្ទូលរបស់អល់ឡោះរៀងរាល់យប់ មានជំនឿចំពោះអល់ឡោះ ថ្ងៃបរលោក ប្រើគ្នាឱ្យធ្វើល្អ ហាមឃាត់គ្នាពីអំពើអាក្រក់ ប្រញាប់ប្រួសរវាន់ក្នុងការធ្វើអំពើកុសលធម៌ ពួកគេទាំងនោះជាពួកអ្នកដែលមានកុសលធម៌។ អំពើល្អតិចច្រើនដែលពួកគេបានធ្វើ អល់ឡោះជាម្ចាស់ទ្រង់ពុំបំបាត់អំពើល្អរបស់ពួកគេឡើយ អល់ឡោះទ្រង់មហាដឹងចំពោះពួកអ្នកដែលកោតខ្លាច»។

យើងនៅតែបន្តគិតឱ្យស៊ីជម្រៅក្នុងបន្ទូលរបស់ទ្រង់អំពីពួកគេថា៖

﴿ إِنَّ ٱلَّذِينَ كَفَرُواْ وَمَاتُواْ وَهُمۡ كُفَّارٞ فَلَن يُقۡبَلَ مِنۡ أَحَدِهِم مِّلۡءُ ٱلۡأَرۡضِ ذَهَبٗا وَلَوِ ٱفۡتَدَىٰ بِهِۦٓۗ أُوْلَٰٓئِكَ لَهُمۡ عَذَابٌ أَلِيمٞ وَمَا لَهُم مِّن نَّٰصِرِينَ ٩١ ﴾

سورة آل عمران / الآية: ٩١

មានន័យថា៖ «ពិតប្រាកដ ពួកអ្នកដែលបដិសេធនឹងជំនឿ ហើយស្លាប់ក្នុងភាពគ្មានជំនឿ គេមិនទទួលយកពីនរណាម្នាក់ក្នុងចំណោមពួកគេដែលមានមាសប៉ុនផែនដី បើទោះជាពួកគេយកមាសនោះមកលោះជាថ្នូរនឹងទារុណកម្មដ៏ឈឺចាប់ ក៏គេមិនទទួលយកដែរ ហើយពួកគេគ្មានអ្នកជួយគាំទ្រឡើយ»។

បានសេចក្តីថា នរណាស្លាប់ក្នុងផ្លូវគ្មានជំនឿ គេមិនទទួលយកអំពើល្អរបស់អ្នកនោះឡើយ បើទោះជាគេខំចំណាយមាសពេញមួយផែនដីថ្វាយជាការសក្ការៈបូជាក៏ដោយ។

عَنْ عَائِشَةَ قَالَتْ قُلْتُ يَا رَسُولَ اللَّهِ إِنَّ عَبْدَ اللَّهِ بْنَ جُدْعَانَ كَانَ فِي الْجَاهِلِيَّةِ يَقْرِي الضَّيْفَ وَيَفُكُّ الْعَانِيَ وَيَصِلُ الرَّحِمَ وَيُحْسِنُ الْجِوَارَ فَأَثْنَيْتُ عَلَيْهِ فَهَلْ يَنْفَعُهُ ذَلِكَ قَالَ

رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( لَا إِنَّهُ لَمْ يَقُلْ يَوْمًا قَطُّ اللَّهُمَّ اغْفِرْ لِي يَوْمَ الدِّينِ وَقَالَ عَفَّانُ مَرَّةً فَأَثْنَيْتُ عَلَيْهِ ) مسند أحمد

លោកស្រីអាអ៊ីស្ស៊ះបានសួរថា បពិត្រអ្នកនាំសាររបស់អល់ឡោះ ពិតប្រាក អាប់ឌុលឡោះ ពិន ចុតអាន គាត់បានទទួលអាសាភ្ញៀវ ជួយដោះទុក្ខអ្នកមានវិបត្តិ ផ្តល់ចំណីអាហារ ធ្វើល្អចំពោះញាតិជិតខាង ហើយខ្ញុំក៏បានសរសើរគាត់ តើអំពើទាំងនេះមានប្រយោជន៍ដល់រូបគាត់ទេ? អ្នកនាំសារតបវិញថា៖ «ទេ ព្រោះគេមិនដែលពោលពាក្យនៅថ្ងៃណាមួយក្នុងមួយជីវិតរបស់គេថា បពិត្រព្រះជាម្ចាស់សូមទ្រង់មេត្តាអភ័យទោសដល់រូបខ្ញុំនៅថ្ងៃបរលោក »។

អ្នកនាំសារលោកបានមានប្រសាសន៍ទៀតថា៖

عَنْ أَبِي هُرَيْرَةَ عَنْ رَسُولِ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ أَنَّهُ قَالَ: ( وَالَّذِي نَفْسُ مُحَمَّدٍ بِيَدِهِ لَا يَسْمَعُ بِي أَحَدٌ مِنْ هَذِهِ الْأُمَّةِ يَهُودِيٌّ وَلَا نَصْرَانِيٌّ ثُمَّ يَمُوتُ وَلَمْ يُؤْمِنْ بِالَّذِي أُرْسِلْتُ بِهِ إِلَّا كَانَ مِنْ أَصْحَابِ النَّارِ ) صحيح مسلم

មានន័យថា៖ «សូមស្បថចំពោះព្រះជាម្ចាស់ដែលជីវិតមូហាំម៉ាត់ឋិតក្នុងព្រះហស្តរបស់ទ្រង់ គ្មាននរណាម្នាក់លឺឈ្មោះខ្ញុំអំពីប្រជាជាតិនេះ មិនថា ពួកជិហ្វ ឬពួកគ្រិស្ត បន្ទាប់មកគេបានស្លាប់ ហើយខ្លួនគេពុំបានជឿនឹងអ្វីដែលគេបានបញ្ជូនមកឱ្យខ្ញុំទេគឺ អ្នកនោះឋិតក្នុងចំណោមពួកអ្នកចុះនរក»។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

﴿ خَيْرُ ٱلْحَٰكِمِينَ ﴿١٠٩﴾ ﴾ سورة يونس / الآية: ١٠٩

មានន័យថា៖ «ទ្រង់ជាអ្នកកាត់ក្តីដ៏ប្រសើរជាទីបំផុត»។ តាមពិតការកាត់សេចក្តីបុគ្គលម្នាក់ៗក្រោយបង្អស់ចុងគឺត្រឡប់ទៅរកទ្រង់។

## តើទ្រង់បានបង្កើតសភាវៈអាក្រក់ដែរមែនទេ?

តើអល់ឡោះជាម្ចាស់មេត្តាករុណាទ្រង់យុត្តិធម៌ដែរទេ?

បើសិនជាដូច្នោះពិតមែន តើសភាវៈអាក្រក់ អំពើអាក្រក់ និងភាពអយុត្តិធម៌មកពីណា? អល់ឡោះជាម្ចាស់បានប្រាប់ពួកយើងថា ទ្រង់ល្អប្រពៃ មហាអាណិតស្រលាញ់ មានគតិយុត្តិធម៌ចំពោះគ្រប់កិច្ចការទាំងអស់។ ទ្រង់មានព្រះបន្ទូលថាទ្រង់ជាអ្នកកាត់ក្តីដ៏ប្រសើរជាទីបំផុត។ ទ្រង់បានប្រាប់ទៀតថា ជីវិតលោកីយ៍ជាការសាកល្បង។ ពិតប្រាកដ ទ្រង់បានបង្កើតគ្រប់យ៉ាងដែលមានរួច។ ក៏ដូច្នោះដែរ គ្រប់អ្វីៗទាំងអស់ដែលនឹងកើតឡើង។ ដូចទ្រង់បានមានព្រះមានព្រះបន្ទូលប្រាប់ក្នុងគម្ពីរអាល់គួរអានថា ទ្រង់បង្កើតសភាវៈអាក្រក់ (តាមពិតវាពុំមែនអាក្រក់ទេ)។ ទ្រង់ប្រើប្រាស់ជាមធ្យោបាយសម្រាប់សាកល្បងចំពោះយើងទាំងអស់គ្នាតែប៉ុណ្ណោះ។

ពួកមនុស្សដែលបង្កការបំផ្លិចបំផ្លាញនៅលើផែនដី រស់នៅរហូតដល់ចាស់ដោយសេចក្តីថ្លៃថ្នូរមានសម្បត្តិស្តុកស្តម្ភតាមរយៈការរកស៊ីខុសច្បាប់ ហើយពួកគេស្លាប់ទៅដោយពុំទាន់បានដាក់ទោសពិន័យលើទង្វើសកម្មភាពរបស់ពួកគេ។ តើយុត្តិធម៌នៅឯណា? អល់ឡោះជាម្ចាស់បានផ្តល់ចម្លើយមកយើងទាំងអស់គ្នាយ៉ាងច្បាស់លាស់ក្នុងគម្ពីរ

អាល់គួរអានទាក់ទងនឹងពួកអ្នកប្រព្រឹត្តអំពើអាក្រក់នឹងបានទទួលផលកម្ម។ ទ្រង់បានមានព្រះបន្ទូលថា៖

﴿ مَتَٰعٌ فِي ٱلدُّنۡيَا ثُمَّ إِلَيۡنَا مَرۡجِعُهُمۡ ثُمَّ نُذِيقُهُمُ ٱلۡعَذَابَ ٱلشَّدِيدَ بِمَا كَانُواْ يَكۡفُرُونَ ٧٠ ﴾ يونس: ٧٠

មានន័យថា៖ «នោះគ្រាន់តែជាការសោយសុខក្នុងលោកីយ៍ប៉ុណ្ណោះ បន្ទាប់មកយើងជាទីវិលត្រឡប់របស់ពួកគេ ហើយយើងនឹងឱ្យពួកគេភ្លក់នូវរសជាតិទារុណកម្មយ៉ាងខ្លាំងក្លាជាទីបំផុតតាមផលកម្មដែលពួកគេបានប្រឆាំងជំទាស់នឹងជំនឿ»។

﴿ يَوۡمَئِذٖ يَصۡدُرُ ٱلنَّاسُ أَشۡتَاتٗا لِّيُرَوۡاْ أَعۡمَٰلَهُمۡ ٦ فَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٍ خَيۡرٗا يَرَهُۥ ٧ وَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٖ شَرّٗا يَرَهُۥ ٨ ﴾

سورة الزلزلة / الآية: ٦ – ٨

មានន័យថា៖ «នៅថ្ងៃនោះ មនុស្សនឹងផុសចេញរៀងៗខ្លួន ដើម្បីបង្ហាញឱ្យពួកគេមើលឃើញនូវអំពើរបស់ពួកគេ ជនណាបានសាងអំពើល្អប៉ុនសត្វស្រមោច អ្នកនោះនឹងឃើញវា ហើយជនណាសាងអំពើបាបប៉ុនសត្វស្រមោច អ្នកនោះនឹងឃើញវា»។

﴿ أَحَسِبَ ٱلنَّاسُ أَن يُتۡرَكُوٓاْ أَن يَقُولُوٓاْ ءَامَنَّا وَهُمۡ لَا يُفۡتَنُونَ ٢ وَلَقَدۡ فَتَنَّا ٱلَّذِينَ مِن قَبۡلِهِمۡۖ فَلَيَعۡلَمَنَّ ٱللَّهُ ٱلَّذِينَ صَدَقُواْ وَلَيَعۡلَمَنَّ ٱلۡكَٰذِبِينَ ٣ أَمۡ حَسِبَ ٱلَّذِينَ يَعۡمَلُونَ ٱلسَّيِّـَٔاتِ أَن يَسۡبِقُونَاۚ سَآءَ مَا يَحۡكُمُونَ ٤ مَن كَانَ يَرۡجُواْ لِقَآءَ ٱللَّهِ فَإِنَّ أَجَلَ ٱللَّهِ لَأٓتٖۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ٥ وَمَن جَٰهَدَ فَإِنَّمَا يُجَٰهِدُ لِنَفۡسِهِۦٓۚ إِنَّ ٱللَّهَ

لَغَنِيٌّ عَنِ ٱلْعَٰلَمِينَ ﴿٦﴾ وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ لَنُكَفِّرَنَّ عَنْهُمْ سَيِّـَٔاتِهِمْ
وَلَنَجْزِيَنَّهُمْ أَحْسَنَ ٱلَّذِى كَانُوا۟ يَعْمَلُونَ ﴿٧﴾ وَوَصَّيْنَا ٱلْإِنسَٰنَ بِوَٰلِدَيْهِ حُسْنًا ۖ وَإِن
جَٰهَدَاكَ لِتُشْرِكَ بِى مَا لَيْسَ لَكَ بِهِۦ عِلْمٌ فَلَا تُطِعْهُمَآ ۚ إِلَىَّ مَرْجِعُكُمْ فَأُنَبِّئُكُم بِمَا
كُنتُمْ تَعْمَلُونَ ﴿٨﴾ وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ لَنُدْخِلَنَّهُمْ فِى ٱلصَّٰلِحِينَ ﴿٩﴾
وَمِنَ ٱلنَّاسِ مَن يَقُولُ ءَامَنَّا بِٱللَّهِ فَإِذَآ أُوذِىَ فِى ٱللَّهِ جَعَلَ فِتْنَةَ ٱلنَّاسِ كَعَذَابِ ٱللَّهِ
وَلَئِن جَآءَ نَصْرٌ مِّن رَّبِّكَ لَيَقُولُنَّ إِنَّا كُنَّا مَعَكُمْ ۚ أَوَلَيْسَ ٱللَّهُ بِأَعْلَمَ بِمَا فِى صُدُورِ
ٱلْعَٰلَمِينَ ﴿١٠﴾ وَلَيَعْلَمَنَّ ٱللَّهُ ٱلَّذِينَ ءَامَنُوا۟ وَلَيَعْلَمَنَّ ٱلْمُنَٰفِقِينَ ﴿١١﴾

سورة العنكبوت / الآية: ٢ - ١١

មានន័យថា៖ « តើមនុស្សគិតស្មានថា គ្រាន់តែពួកគេនិយាយថា ពួកយើងបានជឿគឺត្រូវគេទុកចោល ពុំត្រូវបានគេសាកល្បងមែនទេ? ពិតប្រាកដណាស់ យើងបានសាកល្បងមនុស្សជំនាន់មុនពួកគេ អល់ឡោះជាម្ចាស់ទ្រង់ដឹងច្បាស់អ្នកដែលស្មោះត្រង់ និងពួកអ្នកដែលបោកប្រាស់ឬក៏ពួកអ្នកប្រព្រឹត្តអំពើអាក្រក់នោះស្មានថាអាចឈ្នះយើងឧកបំណងហើយអ្វីដែលពួកគេបានសម្រេច។ នរណាសង្ឃឹមចំពោះការជួបអល់ឡោះ ពិតណាស់ពេលកំណត់របស់អល់ឡោះនឹងមកដល់ហើយទ្រង់មហាឮ មហាដឹង។ នរណាតស៊ូគឺគេតស៊ូដើម្បីខ្លួនឯង ពិតប្រាកដ អល់ឡោះទ្រង់មិនត្រូវការសត្វលោកជាដាច់ខាត។ ពួកអ្នកដែលមានជំនឿ និងប្រតិបត្តិអំពើកុសលធម៌ យើងនឹងជម្រះអំពើបាបពីពួកគេ យើងនឹងតបស្នងតាមការប្រតិបត្តិរបស់ពួកគេដ៏ល្អប្រសើរជាទី

បំផុត។ យើងបានបង្គាប់មនុស្សឱ្យកតញ្ញូចំពោះឪពុកម្ដាយបើសិនជាគេទាំងពីរបង្ខំឱ្យអ្នកគោរពពហុទេពចំពោះយើងនូវអ្វីដែលឯងមិនដឹងនោះ ចូរកុំគោរពតាមពួកគេទាំងពីរ។ យើងជាទីវិលត្រឡប់របស់ពួកអ្នកទាំងអស់គ្នា ហើយនឹងប្រាប់ពីអ្វីដែលពួកអ្នកបានធ្វើ។ ពួកអ្នកដែលមានជំនឿ និងប្រតិបត្តិអំពើល្អ យើងនឹងរាប់បញ្ចូលពួកគេក្នុងចំណោមពួកអ្នកដែលមានកុសលធម៌។ មានមនុស្សមួយចំនួននិយាយថា ពួកយើងមានជំនឿចំពោះអល់ឡោះ នៅពេលណាត្រូវគេធ្វើបាបក្នុងផ្លូវអល់ឡោះ ពួកគេយកវិបត្តិរបស់មនុស្សធ្វើជាទារុណកម្មរបស់អល់ឡោះ។ បើសិនជាមានជ័យជម្នះពីអល់ឡោះមកដល់អ្នក ពួកគេនិយាយថា ពួកយើងនៅជាមួយពួកអ្នក។ តើមិនមែនទេឬអល់ឡោះទ្រង់ដឹងនូវអ្វីដែលនៅក្នុងចិត្តរបស់សត្វលោក? អល់ឡោះជាម្ចាស់ទ្រង់ដឹងច្បាស់រវាងពួកអ្នកមានជំនឿ និងពួកអ្នកដែលមានពុតត្បុត»។

បុណ្យនិងបាបជាចំណែកបេះមិនដាច់នៃជីវិតបរលោក។ ពួកអ្នកដែលរងទុក្ខវេទនាក្នុងជីវិតនេះ ខំសាងនូវអំពើល្អ លះបង់ ហ៊ានពលី និងរក្សាជំនឿរបស់ពួកគេ ផលបុណ្យរបស់ពួកគេដ៏ធំធេងផងដែរនៅថ្ងៃបរលោក ពុំមែនបណ្ដោះអាសន្នទេ តែជាផលបុណ្យអមតៈ។ រីឯពួកអ្នកដែលបង្កការបំផ្លិចបំផ្លាញនៅលើភពផែនដី រំលោភបំពានសិទ្ធិ និងបង្កផលប៉ះពាល់ដល់អ្នកដទៃ ប្រព្រឹត្តអំពើអាក្រក់ និងបង្កវិនាសកម្ម ហើយមើលទៅឃើញថា ពួកគេបានរួចផុតពីទោសទណ្ឌនៅក្នុងលោកីយ៍នេះ តែពួកគេនឹងឃើញផលកម្មនៃអំពើបាបរបស់គេនៅជីវិតបរលោក ពួកគេនឹងត្រូវគេដាក់ទារុណកម្មតាមទង្វើរបស់ពួកគេ។

ជាពិសេសអំពើអយុត្តិធម៌ ពិតប្រាកដ អល់ឡោះជាម្ចាស់បានហាមអំពើអយុត្តិធម៌នេះចំពោះព្រះអង្គផ្ទាល់ ហើយទ្រង់ស្អប់ខ្ពើមខ្លាំងបំផុតចំពោះការប្រព្រឹត្តអំពើអយុត្តិធម៌របស់បុគ្គលម្នាក់ចំពោះបងប្អូនរបស់ខ្លួន។ អល់ឡោះជាម្ចាស់ទ្រង់មានអានុភាពដាច់ខាតលើអ្វីគ្រប់យ៉ាង។ ទ្រង់បង្កើតជំងឺ ភាពអសមត្ថភាព សេចក្តីស្លាប់ ហើយទ្រង់បង្កើតភាពអយុត្តិធម៌ ដើម្បីសាកល្បងមនុស្សគ្រប់រូបក្នុងការប្រព្រឹត្តរបស់ពួកគេ។

ជំនឿចំពោះអល់ឡោះតែមួយ អត្ថន័យនិងប្រភេទរបស់វា

ជំនឿអល់ឡោះតែមួយ (១[1])

អត្ថន័យនិងប្រភេទរបស់វា

អល់ឡោះជាម្ចាស់តែមួយក្នុងព្រះកាយរបស់ទ្រង់ ទ្រង់គ្មានគូប្រៀប គ្មានអ្នកដូច ទ្រង់គ្មានប្រពន្ធ កូន។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ قُلۡ هُوَ ٱللَّهُ أَحَدٌ ١ ٱللَّهُ ٱلصَّمَدُ ٢ لَمۡ يَلِدۡ وَلَمۡ يُولَدۡ ٣ وَلَمۡ يَكُن لَّهُۥ كُفُوًا أَحَدُۢ ٤ ﴾ سورة الإخلاص / الآية: ١ - ٤

១- ជំនឿពិតលើទ្រង់តែមួយ គឺជឿថាអល់ឡោះជាម្ចាស់តែមួយទាំងព្រះកាយ និងព្រះលក្ខណៈរបស់ទ្រង់ បន្ទាប់មកគោរពសក្ការៈចំពោះទ្រង់តែមួយគត់មិនយកអ្វីមួយជាដៃគូរបស់ទ្រង់។ មានគេក្លែងបន្លំអត្ថន័យនេះដោយអះអាងថា ជំនឿលើព្រះតែមួយគឺបដិសេធចំពោះព្រះលក្ខណៈរបស់អល់ឡោះ។ ពីព្រោះតាមការអះអាងរបស់ពួកគេជំនឿនេះមានកាតព្វកិច្ចច្រើនណាស់។ ថ្វីបើពួកតាស័ហ្វខ្លះអះអាងថា ជំនឿដែលពន្យល់ខាងលើជាជំនឿទូទៅ។ រីឯជំនឿពិសេសដោយឡែកវិញគឺមានបញ្ជាក់ដោយសច្ចភាព ពួកគេអះអាងទៀតថា ជំនឿមានជំនឿពិសេសលើពិសេស ហើយទាំងនេះគឺសុទ្ធជាក្តីវង្វេង។

មានន័យថា៖ «មូហាំម៉ាត់ចូរប្រសាសន៍ចុះថា អល់ឡោះជាម្ចាស់តែមួយ ទ្រង់គង់ជាអមតៈ ទ្រង់គ្មានកូន ទ្រង់គ្មានអ្នកបង្កើត ហើយគ្មាននរណាម្នាក់ប្រៀបស្មើនឹងទ្រង់»។ ទ្រង់មានព្រះលក្ខណៈសុក្រឹតពេញលេញគ្មានអ្វីនៃសត្វលោក មានលក្ខណៈដូចលក្ខណសម្បត្តិរបស់ទ្រង់។ ដូចទ្រង់បានព្រះបន្ទូលថា៖

﴿لَيۡسَ كَمِثۡلِهِۦ شَيۡءٞۖ وَهُوَ ٱلسَّمِيعُ ٱلۡبَصِيرُ ١١﴾ سورة الشورى / الآية: ١١

មានន័យថា៖ «គ្មានអ្វីដូចទ្រង់ ហើយទ្រង់មហាលឺមហាឃើញ»។ ទ្រង់តែមួយគត់ជាអ្នកបង្កើត ជាអ្នកផ្តល់ជីវិត ជាអ្នកដកយកជីវិត ទ្រង់ជាអ្នករក្សាមេឃ និងផែនដី។ គេមិនទាន់ចាត់ទុកជាមូស្លីមទេ ចំពោះអ្នកដែលមានជំនឿថា ទ្រង់តែមួយគត់ជាអ្នកបង្កើត ជាអ្នកផ្តល់ជីវិត ជាអ្នកដកយកជីវិតទ្រង់ជាអ្នកថែរក្សាមេឃនឹងផែនដី។គេមិនទាន់ចាត់ទុកជាអ្នកមូស្លីមទេចំពោះអ្នកដែលមិនទាន់ដឹងច្បាស់ថា អល់ឡោះជាម្ចាស់តែមួយគត់ទាក់ទងរឿងទាំងអស់នោះ។

គ្រាន់តែដឹងពីជំនឿពុំទាន់គ្រប់គ្រាន់ទេគឺចាំបាច់ត្រូវអនុវត្ត៖

បញ្ហាផ្ទុយរបស់ពួកអ្នកដែលមិនគោរពសក្ការៈចំពោះអល់ឡោះតែមួយ៖

ពួកអ្នកគ្មានជំនឿដែលគោរពពហុទេពនៃជនជាតិអារ៉ាប់ និងពួកអ្នកផ្សេងទៀត មានជំនឿថា អល់ឡោះជាម្ចាស់តែមួយក្នុងការបង្កើត ទ្រង់តែមួយគត់ដែលបានផ្តល់ជីវភាពលាភសក្ការៈ ផ្តល់ជីវិត ដកយកជីវិត និងមានអំណាចគ្រប់គ្រង។ ក៏ប៉ុន្តែពួកគេបដិសេធចំពោះការគោរពសក្ការៈ និងកាប្រាថ្នាចំពោះទ្រង់តែមួយគត់។ នេះជាភាពផ្ទុយគ្នា

ដ៏អាក្រក់ជាទីបំផុត។ ទ្រង់តែមួយគត់ជាអ្នកបង្កើត គឺសក្តិសមនឹងទទួលការគោរពសក្ការៈ ការឧិនលំទោន និងលើកតម្កើង។ គម្ពីរអាល់គួរអានបានចែងយ៉ាងច្រើនអំពីការជជែកជំទាស់របស់ពួកអ្នកគោរពពហុទេព និងបកស្រាយពីភាពផ្ទុយរបស់ពួកគេក្នុងរឿងនេះ ហើយទ្រង់ក៏បញ្ជាក់ប្រាប់ពួកគេថា នរណាទទួលស្គាល់ថាទ្រង់តែមួយគត់ជាអ្នកបង្កើត ជាអ្នកផ្តល់លាភសក្ការៈ...។ល។ អ្នកនោះត្រូវតែថ្វាយសេចក្តីគោរពសក្ការៈចំពោះទ្រង់តែមួយគត់ដោយសទ្ធាជ្រះថ្លា។ បើពុំនោះទេ ជំនឿផ្នែកទ្រឹស្តីពុំទាន់គ្រប់គ្រាន់ដើម្បីក្លាយខ្លួនជាមូស្លីមនោះទេ។ តែចាំបាច់ត្រូវយកទ្រង់តែមួយជាព្រះជាទីគោរពសក្ការៈ និងតម្រង់ការធ្វើសក្ការៈចំពោះទ្រង់តែមួយគត់។

ពីព្រោះព្រះដែលជាអ្នកបង្កើត ជាអ្នកផ្តល់លាភសក្ការៈ ជាអ្នកផ្តល់ពរជ័យ ជាអ្នកផ្តល់ជីវិត ជាអ្នកដកយកជីវិត ទ្រង់មានព្រះលក្ខណៈសុក្រឹតឥតខ្ចោះជ្រះស្អាតពីលក្ខណៈខ្វះខាត ទ្រង់តែមួយគត់សក្តិសមនឹងគេគោរពសក្ការៈ អ្នកផ្សេងក្រៅពីទ្រង់សុទ្ធតែជាខ្ញុំបម្រើគ្មានអំណាចការពារខ្លួនពីគ្រោះថ្នាក់ និងផ្តល់ប្រយោជន៍ចំពោះខ្លួន តើរឿងអ្វីដែលគេយកអ្នកនោះ ឬយកអ្វីនោះមកធ្វើជាព្រះគោរពសក្ការៈផ្សេងក្រៅពីអល់ឡោះ ?

## ពាក្យជំនឿលើព្រះតែមួយ អត្ថន័យ តម្លៃ និងលក្ខខណ្ឌរបស់វា

ពាក្យ (لا إله إلا الله) មានន័យថា «គ្មានម្ចាស់ដែលត្រូវគេគោរពសក្ការៈលើកលែងតែអល់ឡោះ» គឺជាពាក្យជំនឿលើព្រះតែមួយគត់ ក្តោបលើពាក្យជំនឿ និងខ្លឹមសារនៃជំនឿ ពាក្យនេះជាអត្តសញ្ញាណ និងជាមូលដ្ឋានគ្រឹះនៃឥស្លាម។ បានសេចក្តីថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងសក្តិសមបំផុតលើកលែងតែអល់ឡោះ។ អ្នកដែលបកស្រាយថា គ្មានវត្តមាន លើកលែងតែអល់ឡោះគឺខុស ព្រោះអត្ថន័យនៃព្រះ គឺអ្នកដែលត្រូវគេគោរពសក្ការៈ។ តាមន័យរបស់ពួកគេ គឺ គ្មានព្រះដែលមានវត្តមានលើកលែងតែអល់ឡោះ បំណកស្រាយនេះពុំត្រឹមត្រូវទេ ព្រោះបើកាលណានិយាយថា រាល់ព្រះដែលគេគោរពសក្ការៈដោយសច្ចៈ ឬដោយអសច្ចៈគឺជាអល់ឡោះ។ ដូច្នេះ អ្វីដែលពួកអ្នកគោរពពហុទេពនៅគោរពបូជាមានដូចជា ព្រះអាទិត្យ ព្រះចន្ទ ភពផ្កាយ...។ល។គឺជាអល់ឡោះ។ ដូចជាគេនិយាយថា គេមិនគោរពសក្ការៈក្នុងន័យនេះលើកលែងតែជាអល់ឡោះ ហើយនេះគឺជាការយល់ខុសដ៏ធ្ងន់ធ្ងរជាទីបំផុត។

អត្ថន័យដែលត្រឹមត្រូវច្បាស់លាស់គឺដូចអ្វីដែលយើងបានលើកឡើងពីដំបូងថា គ្មានព្រះដែលគេគោរពសក្ការៈយ៉ាងសក្តិសមបំផុតនោះលើកលែងតែអល់ឡោះជាម្ចាស់តែមួយគត់។ មានមាត្រាជាច្រើនដែលបញ្ជាក់ពីតម្លៃនៃពាក្យ (لا إله إلا الله) និងផលប្រយោជន៍ដ៏ឧត្តមនៃពាក្យនេះ។ មានមាត្រាជាច្រើនបញ្ជាក់ថា «នរណាពោលពាក្យ (لا إله إلا الله)ដោយសទ្ធាជ្រះថ្លាចេញពីចិត្តនឹងបានចូលឋានសួគ៌»។

ដោយសារពាក្យមួយម៉ាត់នេះ នឹងត្រូវបានរួចជីវិត រក្សាទ្រព្យសម្បត្តិពីការដេកហូត ហើយក្លាយជាមូស្លីម។

ក៏ប៉ុន្តែពុំមែនមានន័យថា គ្រាន់តែពោលពាក្យឱ្យឮសូរតែប៉ុណ្ណោះទេ។ ពាក្យនេះពុំមានប្រយោជន៍សម្រាប់អ្នកពោលនៅចំពោះព្រះជាម្ចាស់លើកលែងតែមានប្រាំពីរលក្ខខណ្ឌ៖

១- យល់ពីអត្ថន័យរបស់វា: អល់ឡោះជាម្ចាស់មានព្រះបន្ទូលថា៖

﴿ فَٱعۡلَمۡ أَنَّهُۥ لَآ إِلَٰهَ إِلَّا ٱللَّهُ ﴾ سورة محمد / الآية: ١٩

មានន័យថា៖ «ចូរដឹងចុះថា គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ »។ ទ្រង់មានព្រះបន្ទូលទៀតថា៖

﴿ إِلَّا مَن شَهِدَ بِٱلۡحَقِّ وَهُمۡ يَعۡلَمُونَ ٨٦ ﴾ سورة الزخرف / الآية: ٨٦

មានន័យថា៖ « លើកលែងតែអ្នកដែលធ្វើសាក្សីដោយសច្ចៈ ហើយពួកគេដឹង»។

ក្នុងប្រសាសន៍ដ៏ត្រឹមត្រូវមួយអំពី អូស្មាន ពិន អ័ហ្វហ្វានបាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عَنْ عُثْمَانَ قَالَ قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ: ( مَنْ مَاتَ وَهُوَ يَعْلَمُ أَنَّهُ لَا إِلَهَ إِلَّا اللَّهُ دَخَلَ الْجَنَّةَ ) صحيح مسلم

មានន័យថា៖ «នរណាស្លាប់ហើយដឹងថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ អ្នកនោះបានចូលឋានសួគ៌»។

២- ភាពជឿជាក់: អ្នកដែលពោលពាក្យនេះត្រូវមានជំនឿជាក់ចំពោះអត្ថន័យខ្លឹមសារនៃពាក្យនេះយ៉ាងមុតមាំជាទីបំផុត។ ពិតប្រាកដជំនឿមិនអាចខ្វះភាពជឿជាក់ គ្មានភាពមន្ទិលសង្ស័យអល់ឡោះជាម្ចាស់បានព្រះបន្ទូលថា៖

﴿ إِنَّمَا ٱلۡمُؤۡمِنُونَ ٱلَّذِينَ ءَامَنُواْ بِٱللَّهِ وَرَسُولِهِۦ ثُمَّ لَمۡ يَرۡتَابُواْ ﴾

سورة الحجرات / الآية: ١٥

មានន័យថា៖ «ពិតប្រាកដ ពួកអ្នកមានជំនឿគឺ ពួកអ្នកដែលជឿចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយពួកគេគ្មានភាពមន្ទិលសង្ស័យ»។

លក្ខខណ្ឌនៃភាពស្មោះត្រង់នៃជំនឿរបស់ពួកគេគឺពួកគេគ្មានភាពមន្ទិល ពួកគេមិនសង្ស័យ។ ក្នុងប្រសាសន៍ដ៏ត្រឹមត្រូវ អំពីអាពូហ៊ូរ៉យរ៉ោះបាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

قال رسول الله صلى الله عليه وسلم: ( أَشْهَدُ أَنْ لَا إِلَهَ إِلَّا اللَّهُ وَأَنِّي رَسُولُ اللَّهِ لَا يَلْقَى اللَّهَ بِهِمَا عَبْدٌ غَيْرَ شَاكٍّ فِيهِمَا إِلَّا دَخَلَ الْجَنَّةَ ) صحيح مسلم

មានន័យថា៖ «ខ្ញុំសូមសច្ចាថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ ហើយខ្ញុំជាអ្នកនាំសាររបស់អល់ឡោះ គ្មានខ្ញុំបម្រើណាម្នាក់ទៅជួបអល់ឡោះជាម្ចាស់ដោយមានពាក្យទាំងពីរនេះគឺគ្មានភាពមន្ទិលសង្ស័យនោះ គឺនឹងបានឋានសួគ៌»។ ក្នុងប្រសាសន៍ដ៏ត្រឹមត្រូវមួយទៀតបានឱ្យដឹងថា៖

មានន័យថា៖ អ្នកនាំសារបានបញ្ជូនអាពូហ៊ូរ៉យរ៉ោះដោយពាក់ស្បែកទាំងពីររបស់លោកហើយពោលថា «បើអ្នកបានជួបនរណាម្នាក់

នៅពីក្រោយរបង ហើយគេសច្ចាថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះដោយភាពជឿជាក់ចេញពីចិត្តរបស់គេនោះចូរប្រាប់ដំណឹងល្អដល់គេពីឋានសួគ៌»។ លក្ខខណ្ឌអ្នកដែលពោលពាក្យនេះបានចូលឋានសួគ៌លុះត្រាមានភាពជឿជាក់ចេញពីចិត្តគ្មានភាពមន្ទិលសង្ស័យ បើសិនជាគ្មានលក្ខខណ្ឌនេះ ជំនឿគេក៏មិនបានការដែរ។

៣-ព្រមទទួលនូវអ្វីដែលពាក្យនេះទាមទារចង់បានទាំងកាយវាចារបស់គេ។ ពិតប្រាកដ គម្ពីរអាល់គួរអានបានចែងប្រាប់យើងថាអល់ឡោះទ្រង់ដាក់ទារុណកម្មចំពោះពួកអ្នកបដិសេធនៃមនុស្សជំនាន់មុនដែលបដិសេធនឹងពាក្យនេះ ហើយពួកគេធ្វើឫកពារក្រអឺតក្រទមទ្រង់មានព្រះបន្ទូលថា៖

﴿ إِنَّهُمۡ كَانُوٓاْ إِذَا قِيلَ لَهُمۡ لَآ إِلَٰهَ إِلَّا ٱللَّهُ يَسۡتَكۡبِرُونَ ﴿٣٥﴾ وَيَقُولُونَ أَئِنَّا لَتَارِكُوٓاْ ءَالِهَتِنَا لِشَاعِرٖ مَّجۡنُونِۭ ﴿٣٦﴾ ﴾ سورة الصافات / الآية: ٣٥ – ٣٦

មានន័យថា៖ «ពិតណាស់ នៅពេលគេនិយាយទៅកាន់ពួកគេថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ ពួកគេក្រអឺតក្រទម ពួកគេនិយាយថា តើយើងពិតជាត្រូវបោះបង់ចោលព្រះៗរបស់យើងមែនទេ? គេពិតជាកវីឆ្កួតមែនទែនហើយ»។ អល់ឡោះជាម្ចាស់បានយកលេសដើម្បីដាក់ទារុណកម្មពួកគេ ហើយមូលហេតុរបស់វាគឺដោយសារភាពក្រអឺតក្រទមរបស់ពួកគេមិនទទួលស្គាល់ពាក្យថា គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ ហើយថែមទាំងបដិសេធចំពោះអ្នកដែលបាននាំពាក្យនេះមក។

៤-ប្រណិប័តន៍តាមអំណះអំណាងដែលគេបញ្ជាក់លើពាក្យនេះ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ وَأَنِيبُوٓاْ إِلَىٰ رَبِّكُمۡ وَأَسۡلِمُواْ لَهُۥ ﴾ سورة الزمر / الآية: ٥٤

មានន័យថា៖ «ចូរវិលត្រឡប់ទៅព្រះជាម្ចាស់របស់ពួកអ្នក ហើយប្រគល់ខ្លួនប្រណិប័តន៍ចំពោះទ្រង់»។

ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَمَن يُسۡلِمۡ وَجۡهَهُۥٓ إِلَى ٱللَّهِ وَهُوَ مُحۡسِنٞ فَقَدِ ٱسۡتَمۡسَكَ بِٱلۡعُرۡوَةِ ٱلۡوُثۡقَىٰ ﴾

سورة لقمان / الآية: ٢٢

មានន័យថា៖ «នរណាប្រគល់ខ្លួនចំពោះទ្រង់ ហើយជាអ្នកប្រតិបត្តិនូវកុសលធម៌ ប្រាកដណាស់ គេបានប្រកាន់នូវចំណងដ៏រឹងមាំ»។

ការប្រគល់ខ្លួន មានន័យថាការប្រណិប័តន៍ ជាអ្នកប្រតិបត្តិនូវកុសលធម៌មានន័យថាអ្នកប្រកាន់ជំនឿគោរពព្រះ តែមួយ ហើយពាក្យចំណងដ៏រឹងមាំ គឺបំណកស្រាយន័យនៃពាក្យ (គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ)។

៥- ភាពស្មោះត្រង់ ត្រូវពោលពាក្យនេះដោយស្មោះត្រង់ចេញពីចិត្ត វាចានិងចិត្តឯកភាពគ្នា អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ وَمِنَ ٱلنَّاسِ مَن يَقُولُ ءَامَنَّا بِٱللَّهِ وَبِٱلْيَوْمِ ٱلْءَاخِرِ وَمَا هُم بِمُؤْمِنِينَ ﴿٨﴾ يُخَٰدِعُونَ ٱللَّهَ وَٱلَّذِينَ ءَامَنُوا۟ وَمَا يَخْدَعُونَ إِلَّآ أَنفُسَهُمْ وَمَا يَشْعُرُونَ ﴿٩﴾ ﴾

سورة البقرة / الآية: ٨ – ٩

មានន័យថា៖ «មនុស្សមួយចំនួនពោលថាពួកយើងមានជំនឿចំពោះអល់ឡោះ និងថ្ងៃបរលោក តាមពិតពួកគេពុំមែនជាអ្នកមានជំនឿទេ ពួកគេបោកប្រាស់អល់ឡោះ និងពួកអ្នកដែលមានជំនឿ ពួកគេគ្មានបោកប្រាស់នរណាក្រៅពីខ្លួនឯង ក៏ប៉ុន្តែពួកគេមិនដឹងខ្លួន»។ ពួកគេនិយាយកុហក ក្នុងចិត្តគិតផ្សេងសម្ដីថាផ្សេង។ ក្នុងសៀវភៅសហីហែន អំពីអាណើស ពិន ម៉ាលិកបាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عَنْ قَتَادَةَ قَالَ حَدَّثَنَا أَنَسُ بْنُ مَالِكٍ أَنَّ النَّبِيَّ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ وَمُعاذٌ رَدِيفُهُ عَلَى الرَّحْلِ قَالَ: ( يَا مُعَاذَ بْنَ جَبَلٍ قَالَ لَبَّيْكَ يَا رَسُولَ اللَّهِ وَسَعْدَيْكَ قَالَ يَا مُعَاذُ قَالَ لَبَّيْكَ يَا رَسُولَ اللَّهِ وَسَعْدَيْكَ ثَلَاثًا قَالَ مَا مِنْ أَحَدٍ يَشْهَدُ أَنْ لَا إِلَهَ إِلَّا اللَّهُ وَأَنَّ مُحَمَّدًا رَسُولُ اللَّهِ صِدْقًا مِنْ قَلْبِهِ إِلَّا حَرَّمَهُ اللَّهُ عَلَى النَّارِ ) صحيح البخاري

មានន័យថា៖ «នែម៉ាអើហ្ស! គាត់តបថា បពិត្រអ្នកនាំសាររបស់អល់ឡោះ។ គាត់បានហៅទៀតថា នែម៉ាអើហ្ស! គាត់តបវិញថា បពិត្រអ្នកនាំសាររបស់អល់ឡោះ គាត់ហៅចំនួនបីដង រួចគាត់បានមានប្រសាសន៍ថាគ្មាននរណាម្នាក់សច្ចាថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ និងមូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះដោយភាព

ស្មោះត្រង់ចេញពីចិត្តគឺអល់ឡោះហាមភ្លើងឆេះលើរូបគេ»។ លក្ខខណ្ឌនៃការជៀសផុតពីភ្លើងនរកគឺត្រូវពោលដោយស្មោះត្រង់ចេញពីចិត្ត។

៦-ចិត្តសទ្ធាជ្រះថ្លា៖ គឺសម្រិតសម្រាំងការប្រតិបត្តិរបស់យើងដោយប្រាថ្នាល្អជ្រះស្អាតពីគ្រប់កម្អែលនៃអំពើពហុទេពទាំងឡាយ។ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ أَلَا لِلَّهِ ٱلدِّينُ ٱلْخَالِصُ ﴾ سورة الزمر / الآية : ٣

មានន័យថា៖ «តើមិនមែនទេឬសម្រាប់អល់ឡោះគឺសាសនាដ៏ជ្រះថ្លា»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَمَآ أُمِرُوٓاْ إِلَّا لِيَعْبُدُواْ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ حُنَفَآءَ وَيُقِيمُواْ ٱلصَّلَوٰةَ وَيُؤْتُواْ ٱلزَّكَوٰةَ وَذَٰلِكَ دِينُ ٱلْقَيِّمَةِ ٥ ﴾ سورة البينة: ٥

មានន័យថា៖ «គេគ្មានបង្គាប់ប្រើពួកគេលើកលែងតែឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះដោយសទ្ធាជ្រះថ្លា សម្រាប់ទ្រង់គឺសាសនាមិនលម្អៀង»។ ក្នុងសៀភៅសហេស អំពីអាពូហ៊ូរ៉យរ៉ោះបាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عَنْ أَبِي هُرَيْرَةَ رضي الله عنه أن النبي صلى الله عليه وسلم قال: ( أَسْعَدُ النَّاسِ بِشَفَاعَتِي يَوْمَ الْقِيَامَةِ مَنْ قَالَ لَا إِلَهَ إِلَّا اللَّهُ خَالِصًا مِنْ قَلْبِهِ أَوْ نَفْسِهِ ) صحيح البخاري

មានន័យថា៖ «មនុស្សដែលមានវាសនាល្អជាងគេដោយការអន្តរាគមន៍របស់ខ្ញុំគឺជាអ្នកដែលពោលថា គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះដោយសទ្ធាជ្រះថ្លាចេញពីចិត្ត និងខ្លួនប្រាណរបស់គេ»។

ក្នុងសៀវភៅសហេស អំពី អ៊ិតហ្ពាន ពិន ម៉ាលិក បាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عن عِتْبَانَ بْنَ مَالِكٍ الْأَنْصارِيَّ رَضِيَ اللَّهُ عَنْهُ قال قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( فَإِنَّ اللَّهَ قَدْ حَرَّمَ عَلَى النَّارِ مَنْ قَالَ لَا إِلَهَ إِلَّا اللَّهُ يَبْتَغِي بِذَلِكَ وَجْهَ اللَّهِ )

صحيح البخاري

មានន័យថា៖ «ពិតប្រាកដ អល់ឡោះជាម្ចាស់ទ្រង់ហាមភ្លើងនរកចំពោះអ្នកដែលពោលថា គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ ដោយប្រាថ្នាចង់បានផលបុណ្យពីអល់ឡោះជាម្ចាស់»។

៧-សេចក្តីស្រលាញ់៖ ត្រូវមានចិត្តស្រលាញ់ពេញលេញចំពោះពាក្យនេះ កត្តាចាំបាច់ និងអំណះអំណាងរបស់វា ព្រមទាំងស្រលាញ់ពេញចិត្តចំពោះពួកអ្នកដែលអនុវត្តតាមពាក្យនេះ ធ្វើតាមលក្ខខណ្ឌរបស់វា ហើយស្អប់ខ្ពើមចំពោះអ្វីដែលផ្ទុយពីនេះ។ អល់ឡោះជាម្ចាស់បានមានបន្ទូលថា៖

﴿ وَمِنَ ٱلنَّاسِ مَن يَتَّخِذُ مِن دُونِ ٱللَّهِ أَندَادًا يُحِبُّونَهُمْ كَحُبِّ ٱللَّهِ ۖ وَٱلَّذِينَ ءَامَنُوٓا۟ أَشَدُّ حُبًّا لِّلَّهِ ﴾ سورة البقرة / الآية: ١٦٥

មានន័យថា៖ «មនុស្សខ្លះយករូបសំណាកធ្វើជាព្រះផ្សេងក្រៅពីអល់ឡោះ។ ពួកគេស្រលាញ់រូបសំណាកទាំងនោះដូចជាស្រលាញ់អល់ឡោះ តែពួកអ្នកដែលមានជំនឿស្រលាញ់ចំពោះអល់ឡោះខ្លាំងជាងអ្វីទាំងអស់»។ ទ្រង់បានមានបន្ទូលប្រាប់ថា ខ្ញុំបម្រើរបស់ទ្រង់ដែលមានជំនឿស្រលាញ់ទ្រង់ខ្លាំងបំផុត ដោយសារពួកគេ មិនមានអ្វី

ផ្សេងធ្វើជាព្រះក្រៅពីទ្រង់។ សញ្ញាសម្គាល់នៃការស្រលាញ់របស់បុគ្គលម្នាក់ចំពោះព្រះជាម្ចាស់ គឺគេយកការស្រលាញ់ជាត្រីមុខ បើទោះជាផ្ទុយនឹងទំនើងចិត្តរបស់គេ ហើយគេស្អប់ចំពោះអ្វីដែលទ្រង់ស្អប់ បើទោះជាទំនើងចិត្តរបស់គេមានទំនោរទៅរកប្រការនោះ។ ស្រលាញ់សេពគប់អ្នកដែលស្រលាញ់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់។ ចងសត្រូវចំពោះអ្នកដែលចងសត្រូវជាមួយអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ ប្រតិបត្តិតាមអ្នកនាំសាររបស់អល់ឡោះគ្រាប់តាមកេរដំណែល និងទទួលយកការចង្អុលបង្ហាញរបស់លោក។

**សេចក្តីណែនាំរបស់បុព្វបុរសឥស្លាមចំពោះលក្ខខណ្ឌខាងលើ**

លោក អាល់ហាសាន់ អាល់បាសរីយ៍បាននិយាយទៅកាន់អាល់ហ្វើរហ្សាហ្វាក់ ជាកវីដ៏ល្បីម្នាក់ខណៈដែលគេកប់ប្រពន្ធរបស់គេថា តើអ្វីដែលឯងបានត្រៀមសម្រាប់ថ្ងៃនេះ? កវីនោះឆ្លើយថា គឺពាក្យសច្ចាថាគ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះតាំងពីចិតសិបឆ្នាំមកម្ល៉េះ។ អាល់ ហាសាន់បានតបវិញថា៖ បាទត្រៀមខ្លួនត្រូវហើយ តែសម្រាប់ពាក្យ គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះវាមានលក្ខខណ្ឌរបស់វា ចូរប្រុងប្រយ័ត្នចំពោះការចោទប្រកាន់ចំពោះស្ត្រីដែលស្អាតស្អំ។

មានគេនិយាយប្រាប់ អាល់ហាសាន់ អាល់បាសរីយ៍ថា មានមនុស្សមួយក្រុមនិយាយថា នរណាថា គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ នឹងបានចូលឋានសួគ៌។ លោកបានតបវិញថា នរណាថា

គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះ ហើយបានបំពេញកាតព្វកិច្ចរបស់វាគឺបានចូលឋានសួគ៌។

លោក វ៉ាហាប់ ពិន មូណាប់ពិះបានតបទៅនឹងអ្នកដែលសួរថា តើមិនមែនទេឬពាក្យ គ្មានព្រះជាម្ចាស់លើកលែងតែអល់ឡោះជាកូនសោឋានសួគ៌? លោកតបវិញថា ត្រូវហើយ ក៏ប៉ុន្តែកូនសោនីមួយៗសុទ្ធតែមានធ្មេញរបស់វា បើសិនជាអ្នកយកកូនសោដែលមានធ្មេញមកចាក់ អ្នកអាចបើកបាន ប៉ុន្តែបើគ្មានទេ អ្នកមិនអាចបើកបានជាដាច់ខាត។

## ការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់

### អត្ថន័យនៃការគោរពសក្ការៈ

ជំនឿចំពោះព្រះតែមួយពុំទាន់បានសម្រេចទេ លុះត្រាមានពីរប្រការ៖

ទី១ ការសច្ចាទទួលស្គាល់ថា អល់ឡោះជាម្ចាស់តែមួយទាំងរូបកាយ និងព្រះលក្ខណៈរបស់ទ្រង់។

ទី២ បំណងប្រាថ្នាទាំងឡាយថ្វាយជូនទ្រង់តែមួយគត់ គ្មានអ្នកផ្សេងក្រៅពីទ្រង់ចំពោះគ្រប់ការគោរពសក្ការៈទាំងឡាយ។

ការគោរពសក្ការៈជានាមទូទៅសម្រាប់រាល់ប្រការទាំងឡាយដែលអល់ឡោះទ្រង់ស្រលាញ់សព្វព្រះទ័យទាំងពាក្យសម្ដី ការប្រតិបត្តិក្នុង និងក្រៅ។ ការប្រតិបត្តិខាងក្រៅដូចជា ការសូត្របន្លឺសំឡេងពាក្យសច្ចាទាំងពីរ ការថ្វាយបង្គំ ការបួស។ ការប្រតិបត្តិខាងក្នុងគឺមានជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ ការកោតខ្លាច និងសេចក្ដីសង្ឃឹម...។

### គោរពសក្ការៈគឺក្រឡាប់ចុះឡើងរវាងភាពកោតខ្លាចនិងសេចក្ដីសង្ឃឹម

ការគោរពសក្ការៈពិតគឺអ្នកគោរពក្រឡាប់ចុះឡើងរវាងការស្រលាញ់ និងការកោតខ្លាចចំពោះអល់ឡោះ បន្ទាបខ្លួនចំពោះទ្រង់ សង្ឃឹម និងប្រាថ្នាចង់បានក្ដីមេត្តារបស់ទ្រង់។

អ្នកគោរពសក្ការៈដែលគ្មានក្ដីស្រលាញ់ គ្មានភាពកោតខ្លាច គ្មានក្ដីសង្ឃឹម គឺបានសេចក្ដីថាគេបានគ្រាន់តែ ធ្វើចលនាដ៏សោះកក្រោះ គ្មានអត្ថន័យខ្លឹមសារអ្វីសោះសម្រាប់ការសក្ការៈនេះ។

អ្នកគោរពសក្ការៈដែលស្រលាញ់តែគ្មានភាពឱនលំទោន គ្មានភាពកោតខ្លាច គ្មានសេចក្តីសង្ឃឹម ភាគច្រើន ធ្លាក់ខ្លួនប្រព្រឹត្តអំពើបាប អំពើបទល្មើស។ អះអាងថាខ្លួនខ្លាចអល់ឡោះ តែគេបោះបង់ចោលការប្រតិបត្តិ ហ៊ានប្រព្រឹត្តអំពើបាប។ កាលសម័យដើមមានមនុស្សមួយក្រុមអះអាងថាស្រលាញ់អល់ឡោះដោយគ្មានប្រតិបត្តិចំពោះអល់ឡោះទ្រង់បានសាកល្បងពួកគេដោយព្រះបន្ទូលរបស់ទ្រង់ថា៖

﴿ قُلۡ إِن كُنتُمۡ تُحِبُّونَ ٱللَّهَ فَٱتَّبِعُونِي يُحۡبِبۡكُمُ ٱللَّهُ ﴾ سورة ال عمران / الآية: ٣١

មានន័យថា៖ «មូហាំម៉ាត់ចូរមានប្រសាសន៍ចុះថា បើពួកអ្នកស្រលាញ់អល់ឡោះ ចូរប្រតិបត្តិតាមខ្ញុំនោះ អល់ឡោះទ្រង់នឹងស្រលាញ់ពួកអ្នក»។ នរណាដែលអះអាងថា ខ្លួនស្រលាញ់អល់ឡោះ តែគេមិនប្រតិបត្តិតាមអ្នកនាំសាររបស់ទ្រង់ទេនោះ គេជាមនុស្សបោកប្រាស់។

លោក អ៊ីមុាំ ស្យាហ្វីអីយ៍បានពោលថា៖ «បើសិនជាពួកអ្នកឃើញបុរសម្នាក់ដើរលើទឹក ហោះលើអាកាស ពួកអ្នកកុំទាន់អាលជឿគេលុះត្រាតែពួកអ្នកស្គាល់គេសិនថា តើគេប្រតិបត្តិតាមអ្នកនាំសាររបស់អល់ឡោះហើយឬនៅ?»។

ក៏ដូចគ្នាដែរ សេចក្តីសង្ឃឹមតែមួយមុខ បើសិនជាគ្មានភ្ជាប់នូវភាពកោតខ្លាចចំពោះអល់ឡោះទេនោះ ធ្វើឱ្យសាមីខ្លួនហ៊ានប្រព្រឹត្តល្មើសនឹងអល់ឡោះ ហើយមានអារម្មណ៍ថាខ្លួនរួចផុតភ័យពីឧបាយរបស់ទ្រង់ ទ្រង់មានព្រះបន្ទូលថា៖

﴿ قُلۡ إِن كُنتُمۡ تُحِبُّونَ ٱللَّهَ فَٱتَّبِعُونِي يُحۡبِبۡكُمُ ٱللَّهُ ﴾ سورة آل عمران / الآية: ٣١

មានន័យថា៖ «គ្មាននរណារួចផុតពីកលឧបាយរបស់អល់ឡោះ លើកលែងតែពួកអ្នកដែលខាតបង់»។

ក៏ដូចគ្នាដែរ ការកោតខ្លាចតែមួយមុខ ដោយគ្មានសេចក្ដីសង្ឃឹម គឺអ្នកសក្ការៈអាចគិតខុសចំពោះអល់ឡោះ អស់សង្ឃឹមពីក្ដីមេត្តារបស់ទ្រង់ ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ إِنَّهُۥ لَا يَاْيۡـَٔسُ مِن رَّوۡحِ ٱللَّهِ إِلَّا ٱلۡقَوۡمُ ٱلۡكَٰفِرُونَ ٨٧ ﴾ سورة يوسف / الآية: ٨٧

មានន័យថា៖ «ពិតប្រាកដ គ្មាននរណាម្នាក់អស់សង្ឃឹមពីក្ដីមេត្តារបស់អល់ឡោះ លើកលែងតែពួកអ្នកដែលគ្មានជំនឿ»។

ការគោរពសក្ការៈដ៏ពិតប្រាកដ គឺអ្នកគោរពឋិតនៅចន្លោះរវាងភាពកោតខ្លាច និងសេចក្ដីសង្ឃឹម ដូចទ្រង់បានមានព្រះបន្ទូលថា៖

﴿ إِنَّهُۥ لَا يَاْيۡـَٔسُ مِن رَّوۡحِ ٱللَّهِ إِلَّا ٱلۡقَوۡمُ ٱلۡكَٰفِرُونَ ٨٧ ﴾ سورة يوسف / الآية: ٨٧

មានន័យថា៖ «ពួកគេសង្ឃឹមចំពោះក្ដីមេត្តារបស់ទ្រង់ ហើយកោតខ្លាចចំពោះទារុណកម្មរបស់ទ្រង់»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ أَمَّنۡ هُوَ قَٰنِتٌ ءَانَآءَ ٱلَّيۡلِ سَاجِدٗا وَقَآئِمٗا يَحۡذَرُ ٱلۡأٓخِرَةَ وَيَرۡجُواْ رَحۡمَةَ رَبِّهِۦ ﴾

سورة الزمر / الآية: ٩

មានន័យថា៖ «ឬក៏អ្នកដែលគោរពប្រតិបត្តិចំពោះអល់ឡោះពេញមួយយប់ដោយការឱនក្រាប និងឈរថ្វាយបង្គំ ខ្លាចថ្ងៃបរលោក និងសង្ឃឹមចំពោះក្ដីមេត្តាព្រះជាម្ចាស់របស់គេ»។ ដូចជានៅចន្លោះនៃ

សេចក្តីពេញចិត្ត និងសេចក្តីកោតខ្លាច ដូចអល់ឡោះជាម្ចាស់មានព្រះបន្ទូលប្រាប់ពីក្រុមគ្រួសាររបស់ណាពីហ្សាការីយ៉ាថា៖

﴿ إِنَّهُمۡ كَانُواْ يُسَٰرِعُونَ فِي ٱلۡخَيۡرَٰتِ وَيَدۡعُونَنَا رَغَبٗا وَرَهَبٗاۖ وَكَانُواْ لَنَا خَٰشِعِينَ ٩٠ ﴾ الأنبياء: ٩٠

មានន័យថា៖ «ពិតប្រាកដ ពួកគេប្រញាប់ប្រញាល់ក្នុងការប្រតិបត្តិអំពើល្អ ហើយពួកគេបួងសួងចំពោះយើងដោយការពេញចិត្ត និងសេចក្តីកោតខ្លាច ហើយពួកគេបន្ទាបខ្លួនឱនលំទោនមកចំពោះយើង»។

ខ្ញុំបម្រើប្រកបដោយកុសលធម៌គឺ ជួនកាលជ្រុលខ្លួនក្នុងសេចក្តីសង្ឃឹមនិងសេចក្តីពេញចិត្តធ្វើឱ្យគេនឹករលឹកចំពោះអល់ឡោះស្ទើរតែហោះទាំងខ្លួនប្រាណ។ ជួនកាលខ្លះសេចក្តីកោតខ្លាច និងភាពភ័យខ្លាចបានឱបក្រសោបខ្លួនប្រាណរបស់គេជាប់ គេស្ទើរតែរលាយទាំងរូបកាយព្រោះខ្លាចចំពោះអល់ឡោះ។ ខ្លួនគេមោះមុតក្នុងការបួងសួងសុំការសព្វព្រះទ័យពីព្រះជាម្ចាស់របស់គេ តម្រង់ឆ្ពោះទៅរកទ្រង់ ខ្លាចទារុណកម្មរបស់ទ្រង់ សុំជ្រកកោណជាមួយទ្រង់ សុំឱ្យទ្រង់គាំពារពេញចិត្តនឹងអ្វីដែលទ្រង់មាន។

គោលការណ៍នៃការគោរពសក្ការៈ

សម្រាប់ការគោរពសក្ការៈមានបីគោលការណ៍៖

គោលទី១ សទ្ធាជ្រះថ្លា៖ អ្នកគោរពត្រូវប្រាថ្នាដើម្បីព្រះជាម្ចាស់និងថ្ងៃបរលោក។ អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عن عمَرَ بْن الْخَطَّابِ رَضِيَ اللَّهُ عَنْهُ عَلَى الْمِنْبَرِ قَالَ سَمِعْتُ رَسُولَ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( يَقُولُ إِنَّمَا الْأَعْمَالُ بِالنِّيَّةِ وَإِنَّمَا لِامْرِئٍ مَا نَوَى فَمَنْ كَانَتْ هِجْرَتُهُ إِلَى اللَّهِ وَرَسُولِهِ فَهِجْرَتُهُ إِلَى اللَّهِ وَرَسُولِهِ وَمَنْ كَانَتْ هِجْرَتُهُ لِدُنْيَا يُصِيبُهَا أَوْ امْرَأَةٍ يَتَزَوَّجُهَا فَهِجْرَتُهُ إِلَى مَا هَاجَرَ إِلَيْهِ ) صحيح مسلم

មានន័យថា៖ «ពិតប្រាកដរាល់ការប្រតិបត្តិទាំងឡាយអាស្រ័យលើចិត្តប្រាថ្នា ហើយបុគ្គលម្នាក់ៗទទួលបានតាមចិត្តប្រាថ្នារបស់ខ្លួន។ នរណាភៀសខ្លួនដើម្បីអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់គឺ ការភៀសខ្លួនរបស់គេគឺដើម្បីអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ នរណាភៀសខ្លួនដើម្បីចង់បានប្រយោជន៍លោកីយ៍ ឬចង់បានស្ត្រីម្នាក់យកមកធ្វើជាប្រពន្ធគឺ ការភៀសខ្លួននោះបានតាមសេចក្តីប្រាថ្នារបស់គេ»។ ការបោះបង់ចិត្តសទ្ធាជ្រះថ្លានាំឱ្យការប្រតិបត្តិក្លាយជាអសារបង់។

គោលទី២ ភាពស្មោះត្រង់៖ សំដៅលើការប្តេជ្ញាចិត្តដ៏ស្មោះភក្តីគឺលះបង់កម្លាំងកាយចិត្ត ដើម្បីអនុវត្តតាមការបង្គាប់ប្រើរបស់អល់ឡោះ ជៀសវាងពីការហាមប្រាមរបស់ទ្រង់ ត្រៀមខ្លួនដើម្បីទៅជួបទ្រង់ បោះបង់នូវគំនិតអវិជ្ជមាន បោះបង់ភាពខ្ជិលច្រអូសក្នុងការគោរពសក្ការៈចំពោះអល់ឡោះ។

គោលទី៣ ប្រតិបត្តិតាមអ្នកនាំសាររបស់អល់ឡោះ គេមិនត្រូវគោរពសក្ការៈចំពោះអល់ឡោះលើកលែងតែតាមអ្វីដែលអល់ឡោះជាម្ចាស់បានបញ្ញត្តិជាច្បាប់ និងអ្វីដែលអ្នកនាំសារបស់ទ្រង់បាននាំមក។ រីឯមនុស្សដែលគោរពសក្ការៈចំពោះព្រះជាម្ចាស់របស់ពួកគេដោយគ្មានចំណេះដឹងនោះ គឺជាអំពើប្រឌិតថ្មីដែលអ្នកនាំសារលោកបានដាស់

តឿនឱ្យប្រុងប្រយ័ត្ន និងបានស្ដីបន្ទោសចំពោះអ្នកដែលប្រព្រឹត្តវា។ លោកបានប្រាប់ថា ការប្រតិបត្តិរបស់គេជាក្ដីវង្វេង ដូចលោកបានមានប្រសាសន៍ថា៖

عَنْ جَابِرِ بْنِ عَبْدِ اللَّهِ رضي الله عنه قَالَ كَانَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ يَقُولُ : ( وَكُلُّ مُحْدَثَةٍ بِدْعَةٌ وَكُلُّ بِدْعَةٍ ضَلَالَةٌ وَكُلُّ ضَلَالَةٍ فِي النَّارِ ) سنن النسائي

មានន័យថា៖ «រាល់អំពើប្រឌិតថ្មីគឺជាពិតអះ(អំពើអញ្ញមតិ) ហើយរាល់អំពើពិតអះជាសេចក្ដីវង្វេង។ រាល់សេចក្ដីវង្វេងទាំងឡាយគឺចុះនរក»។ ការប្រតិបត្តិរបស់អ្នកប្រព្រឹត្តអំពើពិតអះគឺគេច្រានចោល គេមិនទទួលយក។ ក្នុងសៀវភៅសហីហែន អាអ៊ីស្សះ បាននិយាយថា អ្នកនាំសារលោកបានមានប្រសាសន៍ថា៖

عَنْ عَائِشَةَ رَضِيَ اللَّهُ عَنْهَا قَالَتْ قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( مَنْ أَحْدَثَ فِي أَمْرِنَا هَذَا مَا لَيْسَ فِيهِ فَهُوَ رَدٌّ )

صحيح البخاري

មានន័យថា៖ «នរណាប្រឌិតថ្មីក្នុងកិច្ចការរបស់យើង ដែលពុំមែនចេញមកពីសាសនានោះគឺត្រូវគេច្រានចោល»។ ក្នុងតំណាលមូស្លីមបានឱ្យដឹងថា៖ «នរណាប្រតិបត្តិអំពើអ្វីមួយពុំមែនជាកិច្ចការរបស់យើងនោះ គឺត្រូវគេច្រានចោល»។

គ្មានការគោរពសក្ការៈ លើកលែងតែប្រកបដោយគោលការណ៍ទាំងនេះ៖

ការប្រតិបត្តិដែលគ្មានការប្ដេជ្ញាចិត្តស្មោះត្រង់ពុំមែនជាការគោរពសក្ការៈ បើដូច្នេះ ការគោរពសក្ការៈក្លាយជាការគិតស្រមើស្រមៃ ស្មើរតែ

លែងចង់អនុវត្តវា រហូតឈានទៅដល់ការអស់ចិត្តអស់អារម្មណ៍ចង់អនុវត្ត។ ការប្រតិបត្តិដែលគ្មានចិត្តសទ្ធាជ្រះថ្លា និងការប្រតិបត្តិតាមអ្នកនាំសារ។ ដូច្នេះការគោរពសក្ការៈនោះអល់ឡោះជាម្ចាស់ទ្រង់មិនទទួលយកជាដាច់ខាត។

**ប្រភេទនៃការគោរពសក្ការៈដែលមិនអនុញ្ញាតឱ្យប្រារព្ធធ្វើជូននរណាផ្សេងក្រៅពីអល់ឡោះ**

ការគោរពសក្ការៈដែលមិនអនុញ្ញាតឱ្យប្រារព្ធថ្វាយជូននរណាក្រៅពីអល់ឡោះជាម្ចាស់មានច្រើនប្រភេទ៖

ទី១ ការគោរពសក្ការៈផ្នែកជំនឿ៖

ការគោរពសក្ការៈផ្នែកជំនឿជាមូលដ្ឋានគ្រឹះនៃការគោរពសក្ការៈទាំងឡាយ គឺតម្រូវឱ្យជឿជាក់ថាអល់ឡោះជាព្រះជាម្ចាស់តែមួយអង្គគត់ទ្រង់មានសិទ្ធិបង្កើតនិងបង្គាប់ប្រើ ទ្រង់មានអំណាចផ្តល់ជាប្រយោជន៍ ឬគ្រោះថ្នាក់ ទ្រង់គ្មានដៃគូ គ្មាននរណាម្នាក់មានសិទ្ធិធ្វើអន្តរាគមន៍នៅចំពោះទ្រង់ លើកលែងតែមានការអនុញ្ញាតពីតទ្រង់ ហើយគ្មានព្រះដែលគេត្រូវគោរពសក្ការៈយ៉ាងពិតប្រាកដ លើកលែងតែទ្រង់។

ទី២ ការគោរពសក្ការៈផ្លូវចិត្ត៖

ការគោរពសក្ការៈផ្លូវចិត្តដែលគេមិនអនុញ្ញាតឱ្យប្រារព្ធថ្វាយលើកលែងតែចំពោះអល់ឡោះតែមួយគត់។ ការថ្វាយជូនអ្នកផ្សេងជាអំពើពហុទេពកម្រិតធ្ងន់ ដូចជា ការកោតខ្លាច ការសង្ឃឹម ការពេញចិត្ត

ការភ័យខ្លាច ការបន្ទាបខ្លួនឱនលំទោន ការស្រលាញ់ ការសារភាពទោសកំហុស ការរំពឹងជឿទុកចិត្ត ការចុះញ៉ម។

ទី៣ ការគោរពសក្ការៈផ្លូវវាចា៖

ដូចជា ការពោលពាក្យសច្ចាទាំងពីរ គ្រាន់តែមានជំនឿលើខ្លឹមសាររបស់វាពុំទាន់គ្រប់ទេ ចាំបាច់ត្រូវតែពោលនឹងអណ្តាត ការបួងសួងសុំឱ្យអល់ឡោះទ្រង់គាំពារ សុំជំនួយ សុំសង្គ្រោះ ការបួងសួងចំពោះការសូត្រហ្ស៊ីកៀរ (ធម៌សូត្ររំលឹកដល់ព្រះជាម្ចាស់)និងការសូត្រគម្ពីរអាល់គួរអាន។

ទី៤ ការគោរពសក្ការៈផ្លូវកាយ៖

ការថ្វាយបង្គំ ការបួស ការធ្វើធម្មយាត្រា ការសំឡេះសត្វ ការលាបំណន់ ។ល។

ទី៥ ការគោរពសក្ការៈផ្នែកទ្រព្យសម្បត្តិ៖

ដូចជា ការបង់ហ្សាកាត់ ប្រភេទផ្សេងៗនៃការដាក់ទាន ការបង់ផាកពិន័យ ការធ្វើពិឃាតសត្វបូជា ការចំណាយផ្សេងៗ។

ប្រការដែលផ្ទុយនឹងជំនឿតាវហេត (ជំនឿលើឯកទេវៈ)

ប្រការដែលផ្ទុយ

ហើយបដិសេធនឹងជំនឿតាវហេតគឺការគោរពពហុទេព ការចូលហ៊ុន។ គេពន្យល់ថា អ្នកបានចូលហ៊ុនជាមួយគេក្នុងការងារអ្វីមួយ។ ដូច្នេះ អ្នកបានក្លាយជាដៃគូរបស់គេ។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

﴿ وَأَشْرِكْهُ فِيٓ أَمْرِي ۝٣٢ ﴾ طه: ٣٢

មានន័យថាៈ «សូមទ្រង់មេត្តាអនុញ្ញាតឱ្យគេចូលរួមចំណែកក្នុងកិច្ចការរបស់ខ្ញុំ»។ បានសេចក្តីថា យកគេធ្វើជាដៃគូក្នុងកិច្ចការនោះ។

**អំពើពហុទេពមានពីរប្រភេទ តាមបច្ចេកសព្ទបញ្ញត្តិច្បាប់ឥស្លាម អំពើពហុទេពមានពីរប្រភេទៈ**

**ទី១ អំពើពហុទេពកម្រិតធ្ងន់ៈ**

គេចាត់ទុកជាអំពើពហុទេពកម្រិតធ្ងន់ លុះត្រាណាបុគ្គលម្នាក់បានយកអ្វីផ្សេងធ្វើជាព្រះរួមជាមួយនឹងអល់ឡោះជាម្ចាស់ ដូចអំពើពហុទេពរបស់ពួកគ្រិស្តសាសនិក ដែលបានយកទ្រង់ធ្វើជាព្រះទីបីនៃព្រះទាំងបីរបស់ពួកគេ។ អំពើពហុទេពរបស់ពួកគោរពព្រះអគ្គីដែលនិយាយថា រាល់គ្រោះល្អទាំងឡាយកើតចេញពីពន្លឺ រីឯគ្រោះអាក្រក់ទាំងឡាយចេញពីភាពងងឹត។ អំពើពហុទេពរបស់ពួកគោរពផ្កាយដែលពួកគេនិយាយថា ផ្កាយនៅឋានលើជាអ្នកចាត់ចែងការងារក្នុងលោកទាំងមូល។ ពួកអ្នកដែលមានជំនឿលើការលើកឡើងខាងលើមានច្រើនដូចជាពួកគោរពបូជាផ្នូរ ពួកគេអះអាងថាព្រលឹងវិញ្ញាណពួកបុគ្គលមានកុសលធម៌ទាំងឡាយ អាចចាត់ចែងការងារក្នុងលោកបន្ទាប់ពីស្លាប់។ ពួកគេអាចបំពេញបំណងប្រាថ្នាអ្នកនៅរស់ អាចជួយដោះទុក្ខលំបាក អាចជួយតាមរយៈការបួងសួងរបស់ពួកគេ អាចរក្សាពួកអ្នកដែលសុំការជ្រកកោន ទទួលបានការគាំពារជាប្រចាំពីពួកគេ។ អំពើពហុទេពកម្រិតធ្ងន់ គឺយកនរណាម្នាក់ ឬអ្វីមួយធ្វើជាព្រះផ្សេងរួមជាមួយនឹងអល់ឡោះ។ ទាំងពួកទេវតា ពួកអ្នកនាំសារ ពួកបុគ្គលដែលមានកុសលធម៌ ព្រះអាទិត្យ ព្រះចន្ទ្រ ដុំថ្ម មនុស្សដូចគ្នា យកមក

គោរពសក្ការៈដូចគោរពអល់ឡោះ ដោយការបួងសួង ការសុំជំនួយ ការថ្វាយគ្រឿងតង្វាយផ្សេងៗ ការលាបំណន់ ហើយនិងប្រភេទនៃការគោរពសក្ការៈផ្សេងៗទៀត។

ពុំចាំបាច់មានលក្ខខណ្ឌស្មើនឹងអល់ឡោះ ទើបជាអំពើពហុទេពនោះឡើយ។

ពុំចាំបាច់មានលក្ខខណ្ឌ ទាល់តែអ្នកប្រព្រឹត្តអំពើពហុទេពលើកអ្នកផ្សេងឱ្យស្មើនឹងអល់ឡោះគ្រប់ផ្នែកទាំងអស់ទើបហៅអំពើពហុទេពនោះទេ។ តាមបញ្ញត្តិច្បាប់ឥស្លាមហៅថាអ្នកគោរពពហុទេពគឺដោយការទទួលស្គាល់ថាមានដៃគូសម្រាប់អល់ឡោះ បើទោះជាគេទុកអ្នកនោះមានអានុភាព និងពុទ្ធិក្រោមអល់ឡោះក៏ដោយ។ រីឯការនិទានរបស់ទ្រង់ពីពួកអ្នកគោរពពហុទេពវិញសម្ដីរបស់ពួគេនិយាយថា៖

﴿ تَٱللَّهِ إِن كُنَّا لَفِي ضَلَٰلٖ مُّبِينٍ ﴿٩٧﴾ إِذۡ نُسَوِّيكُم بِرَبِّ ٱلۡعَٰلَمِينَ ﴿٩٨﴾ ﴾

لشعراء: ٩٧ - ٩٨

មានន័យថា៖ «សូមស្បថចំពោះអល់ឡោះ ពិតប្រាកដពួកយើងបានឋិតក្នុងភាពវង្វេងយ៉ាងជាក់ច្បាស់ នៅពេលដែលយើងបានលើកពួកអ្នកស្មើនឹងព្រះជាម្ចាស់នៃសកលលោក»។

ក្នុងបន្ទូលនេះគឺការលើកឱ្យមានឋានៈស្មើទ្រង់ក្នុងការស្រលាញ់ ការកោតខ្លាច សេចក្ដីសង្ឃឹម ការគោរពប្រតិបត្តិ ការស្ដាប់បង្គាប់ ពុំមែនមានឋានៈស្មើទ្រង់ក្នុងអានុភាពនៃការបង្កើតនោះទេ។ ព្រោះពួកគេទទួលស្គាល់អល់ឡោះជាម្ចាស់មានតែមួយក្នុងការបង្កើត។

## ភាពគ្រោះថ្នាក់នៃអំពើពហុទេពះ

អំពើពហុទេពកម្រិតធ្ងន់មានគ្រោះថ្នាក់ខ្លាំងណាស់ ព្រោះអំពើល្អដែលបានសាងត្រូវរលាយសាបសូន្យ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថាៈ

﴿ وَلَوْ أَشْرَكُوا۟ لَحَبِطَ عَنْهُم مَّا كَانُوا۟ يَعْمَلُونَ ﴿٨٨﴾ ﴾ سورة الأنعام / الآية: ٨٨

មានន័យថាៈ «បើសិនជាពួកគេគោរពពហុទេព នោះគេនឹងរលាយសាបសូន្យអស់ពីខ្លួននូវអ្វីដែលពួកគេបានធ្វើ»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៅកាន់អ្នកនាំសាររបស់ទ្រង់ថាៈ

﴿ وَلَقَدْ أُوحِىَ إِلَيْكَ وَإِلَى ٱلَّذِينَ مِن قَبْلِكَ لَئِنْ أَشْرَكْتَ لَيَحْبَطَنَّ عَمَلُكَ وَلَتَكُونَنَّ مِنَ ٱلْخَـٰسِرِينَ ﴿٦٥﴾ ﴾ سورة الزمر / الآية: ٦٥

មានន័យថាៈ «ពិតប្រាកដ គេបានត្រាស់បន្ទូលទៅឯង និងពួកអ្នកជំនាន់មុនឯងថាបើសិនជាអ្នកហ៊ានគោរពពហុទេពនោះ អំពើល្អរបស់ឯងនឹងត្រូវរលាយសាបសូន្យ ហើយនឹងក្លាយជាពួកអ្នកដែលខាតបង់»។ អ្នកប្រព្រឹត្តត្រូវចុះនរកជារៀងរហូត ទ្រង់មិនអភ័យទោសឱ្យជាដាច់ខាត ហើយមិនអាចចូលឋានសួគ៌ជាដាច់។ ទ្រង់បានមានព្រះបន្ទូលថាៈ

﴿ وَلَقَدْ أُوحِىَ إِلَيْكَ وَإِلَى ٱلَّذِينَ مِن قَبْلِكَ لَئِنْ أَشْرَكْتَ لَيَحْبَطَنَّ عَمَلُكَ وَلَتَكُونَنَّ مِنَ ٱلْخَـٰسِرِينَ ﴿٦٥﴾ ﴾ سورة الزمر / الآية: ٦٥

មានន័យថាៈ «ពិតប្រាកដ អល់ឡោះជាម្ចាស់ទ្រង់មិនអត់ឱនឱ្យគេគោរពពហុទេពរួមជាមួយទ្រង់ឡើយ។ តែទ្រង់អត់ឱនចំពោះអ្វីផ្សេងក្រៅពីនោះសម្រាប់នរណាដែលទ្រង់សព្វព្រះទ័យ»។

ទ្រង់បានមានព្រះបន្ទូលទៀតថាៈ

﴿ لَقَدْ كَفَرَ ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ هُوَ ٱلْمَسِيحُ ٱبْنُ مَرْيَمَ ۖ وَقَالَ ٱلْمَسِيحُ يَٰبَنِىٓ إِسْرَٰٓءِيلَ ٱعْبُدُواْ ٱللَّهَ رَبِّى وَرَبَّكُمْ ۖ إِنَّهُۥ مَن يُشْرِكْ بِٱللَّهِ فَقَدْ حَرَّمَ ٱللَّهُ عَلَيْهِ ٱلْجَنَّةَ وَمَأْوَىٰهُ ٱلنَّارُ ۖ وَمَا لِلظَّٰلِمِينَ مِنْ أَنصَارٍ ﴿٧٢﴾ ﴾

سورة المائدة / الآية: ٧٢

មានន័យថាៈ «ពិតប្រាកដ ពួកអ្នកដែលនិយាយថា អល់ឡោះគឺជាព្រះមេស៊ី កូននាងម៉ារីនោះ បានក្លាយជាពួកអ្នកគ្មានជំនឿ ហើយមេស៊ីបាននិយាយថា នៃកូនចៅអ៊ីស្រាអែលទាំងឡាយ! ចូរគោរពសក្ការៈចុះចំពោះអល់ឡោះជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក។ ពិតប្រាកដ អ្នកគោរពពហុទេពដែលចូលរួមជាមួយនឹងអល់ឡោះនោះ ទ្រង់នឹងហាមគេមិនឱ្យចូលឋានសួគ៌ ទីជម្រករបស់គេគឺឋាននរក ហើយពួកអ្នកអគតិនោះគ្មានអ្នកគាំទ្រជាដាច់ខាត»។

## អំពើពហុទេពជាឧក្រិដ្ឋកម្ម និងជាអំពើអយុត្តិធម៌ដ៏ធ្ងន់ធ្ងរបំផុត៖

عَنْ عَمْرِو بْنِ شُرَحْبِيلَ قَالَ قَالَ عَبْدُ اللَّهِ قَالَ رَجُلٌ يَا رَسُولَ اللَّهِ أَيُّ الذَّنْبِ أَكْبَرُ عِنْدَ اللَّهِ قَالَ : ( أَنْ تَدْعُوَ لِلَّهِ نِدًّا وَهُوَ خَلَقَكَ ) متفق عليه

អាប់ឌុលឡោះ ពិន ម៉ាស្អូតបាននិយាយថា មានបុរសម្នាក់បានសួរអ្នកនាំសារថា តើអំពើបាបណាដែលធ្ងន់ជាងគេចំពោះអល់ឡោះជាម្ចាស់? លោកឆ្លើយថា៖ «គឺអ្នកបួងសួងសុំអ្នកផ្សេងរួមជាមួយនឹងអល់ឡោះ ហើយទ្រង់ជាអ្នកបង្កើតអ្នកឯង»។

ទ្រង់បានមានព្រះបន្ទូលថា៖

﴿ إِنَّ ٱلشِّرْكَ لَظُلْمٌ عَظِيمٌ ١٣ ﴾ سور لقمان / الآية: ١٣

មានន័យថា៖ «ពិតប្រាកដ អំពើពហុទេពជាអំពើអយុត្តិធម៌ដ៏ធ្ងន់ធ្ងរបំផុត»។ ទ្រង់បានមានព្រះបន្ទូលទៀតថា៖

﴿ وَمَن يُشْرِكْ بِٱللَّهِ فَقَدِ ٱفْتَرَىٰٓ إِثْمًا عَظِيمًا ٤٨ ﴾ سورة النساء / الآية: ٤٨

មានន័យថា៖ «នរណាគោរពពហុទេពជាមួយនឹងអល់ឡោះ ពិតណាស់គេបានប្រព្រឹត្តអំពើបាបដ៏ធ្ងន់ធ្ងរជាទីបំផុត»។

## ទី២ អំពើពហុទេពកម្រិតស្រាល៖

អំពើពហុទេពកម្រិតស្រាល ដូចជាមានចិត្តបន្តិចបន្តួចចង់បានមុខមាត់ សម្ដែងឫកចង់ឱ្យគេសរសើរ មិនមានចិត្តជ្រះថ្លាចំពោះអល់ឡោះក្នុងការគោរពសក្ការៈ។ តាមពិត គេធ្វើដើម្បីប្រយោជន៍ខ្លួន

ឯងផង ដើម្បីប្រយោជន៍លោកីយ៍ផង ជួនកាលដើម្បីអំណាចនិងបុណ្យសក្តិ គេធ្វើដើម្បីខ្លួនឯងមួយចំណែក ដើម្បីអ្នកដទៃមួយចំណែក ។ គេរាប់បញ្ចូលក្នុងបញ្ហាការគោរពពហុទេពកម្រិតស្រាលផងដែរ គឺការស្បថស្បែក្រៅពីអល់ឡោះ ឬនិយាយថា អ្វីដែលអល់ឡោះប្រាថ្នានិងឯងប្រាថ្នាវាត្រូវតែកើត ឬនិយាយថា ខ្ញុំគ្មានសមត្ថភាពអ្វីទេលើកលែងតែអល់ឡោះ និងឯង។

ជួនកាលអ្នកថាដូច្នេះអាចក្លាយជាការគោរពពហុទេពកម្រិតធ្ងន់អាស្រ័យលើបំណងប្រាថ្នារបស់គេ។

ប្រភេទនៃអំពើពហុទេពនេះជាអំពើពហុទេពកម្រិតស្រាល ថ្វីបើមិនធ្វើឱ្យអ្នកប្រព្រឹត្តខ្វាត់បង់ពីសាសនា តែអាចប្រឈមនឹងគ្រោះថ្នាក់ដ៏ធំជាទីបំផុត។ ខាតបង់ផលបុណ្យអស់ច្រើន ជួនកាលអំពើល្អរបស់ខ្លួនក្លាយជាអសារបង់។ ក្នុងសហីហែន អាពូ មូសា បាននិយាយថា មានបុរសម្នាក់មកជួបអ្នកនាំសារ ហើយនិយាយថា បុរសម្នាក់នេះទៅធ្វើសង្គ្រាមដើម្បីទ្រព្យជ័យភ័ណ្ឌ ហើយបុរសនោះចង់បានល្បីឈ្មោះ ហើយម្នាក់ទៀតចង់ឱ្យគេឃើញឋានៈរបស់ខ្លួន ចុះនរណាវិញធ្វើដើម្បីផ្លូវអល់ឡោះ? អ្នកនាំសារលោកបានតបវិញថា៖

عَنْ أَبِي مُوسَى رَضِيَ اللَّهُ عَنْهُ قَالَ جَاءَ رَجُلٌ إِلَى النَّبِيِّ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ فَقَالَ الرَّجُلُ يُقَاتِلُ لِلْمَغْنَمِ وَالرَّجُلُ يُقَاتِلُ لِلذِّكْرِ وَالرَّجُلُ يُقَاتِلُ لِيُرَى مَكَانُهُ فَمَنْ فِي سَبِيلِ اللَّهِ قَالَ : ( مَنْ قَاتَلَ لِتَكُونَ كَلِمَةُ اللَّهِ هِيَ الْعُلْيَا فَهُوَ فِي سَبِيلِ اللَّهِ )

صحيح البخاري

មានន័យថា៖ «នរណាទៅធ្វើសង្គ្រាមដើម្បីលើកកម្ពស់ពាក្យរបស់អល់ឡោះគឺក្នុងផ្លូវអល់ឡោះ»។ ក្នុងសៀវភៅសហីហែន អ្នកនាំសារលោកនិទានអំពីព្រះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖

عَنْ أَبِي هُرَيْرَةَ قَالَ قَالَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ : ( قَالَ اللَّهُ تَبَارَكَ وَتَعَالَى أَنَا أَغْنَى الشُّرَكَاءِ عَنْ الشِّرْكِ مَنْ عَمِلَ عَمَلًا أَشْرَكَ فِيهِ مَعِي غَيْرِي تَرَكْتُهُ وَشِرْكَهُ ) رواه مسلم

មានន័យថា៖ «យើងពុំត្រូវការដៃគូជាដាច់ខាត។ នរណាប្រតិបត្តិអំពើល្អអ្វីមួយដោយយកអ្នកផ្សេងមកចូលរួមជាមួយនឹងយើងនោះ យើងបោះបង់រូបគេ និងអំពើពហុទេពរបស់គេចោល»។

ក្នុងសៀវភៅ អាល់មុសស្នាត់ អ្នកនាំសារមូហាំមាត់លោកបានមានប្រសាសន៍ថា៖

عَنْ مَحْمُودِ بْنِ لَبِيدٍ أَنَّ رَسُولَ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ قَالَ : ( إِنَّ أَخْوَفَ مَا أَخَافُ عَلَيْكُمْ الشِّرْكُ الْأَصْغَرُ قَالُوا وَمَا الشِّرْكُ الْأَصْغَرُ يَا رَسُولَ اللَّهِ قَالَ الرِّيَاءُ ) مسند أحمد

មានន័យថា៖ «ពិតប្រាកដអ្វីដែលខ្ញុំបារម្ភខ្លាចចំពោះពួកអ្នកបំផុតនោះគឺអំពើពហុទេពកម្រិតស្រាល។ ពួកគេសួរថា បពិត្រអ្នកនាំសាររបស់ព្រះ តើអំពើពហុទេពកម្រិតស្រាលនោះជាអ្វី? លោកតបវិញថា៖ ការចង់បានមុខមាត់(الرياء)»។ ក្នុងសៀវភៅ ស្សាក់ពុលអ៊ីម៉ាន អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៅកាន់ពួកគេនៅថ្ងៃ ដែលទ្រង់តបស្នងដល់មនុស្សលោកតាមអំពើរបស់ពួកគេថា៖ «ចូរនាំគ្នាទៅរកនរណាដែលពួកអ្នកចង់ឱ្យគេសរសើរកាលនៅលោកីយ៍ មើលមើល៍ តើពួកគេមានអ្វីតបស្នងឱ្យពួកអ្នកទេ?»។

ទាក់ទងនឹងការហាមមិនឱ្យប្រព្រឹត្តអំពើពហុទេព ទ្រង់បានមានព្រះបន្ទូលថា៖

﴿ فَمَن كَانَ يَرْجُواْ لِقَآءَ رَبِّهِۦ فَلْيَعْمَلْ عَمَلًا صَٰلِحًا وَلَا يُشْرِكْ بِعِبَادَةِ رَبِّهِۦٓ أَحَدًۢا ﴿١١٠﴾ ﴾

سورة الكهف / الآية: ١١٠

មានន័យថា៖ «ដូច្នេះ នរណាសង្ឃឹមចង់ជួបព្រះជាម្ចាស់របស់គេ ចូរអ្នកនោះខិតខំធ្វើអំពើល្អ ហើយកុំយកនរណាម្នាក់មកចូលរួមក្នុងការគោរពសក្ការៈចំពោះព្រះជាម្ចាស់របស់គេឱ្យសោះ»